# វិទ្យាសាស្ត្រ

# គីមីវិទ្យា



លោហៈអាល់កាឡាំង ( លោហៈសកម្មជាងគេ)



កាំជ្រួចហោះដោយចំហេះអ៊ីដ្រូសែនរាវ

មេរៀនសង្ខេប និងលំហាត់ ថ្នាក់ទី៩

រៀបរៀងដោយ : លោកគ្រូ ឈាង សុភា

អ្នកគ្រូ លី សុខណៃ

ឆ្នាំ ២០១០

ដែកឡើងច្រែះ

# អារម្ភកថា

ដោយសារតែភាពកង្វះខាតនូវសៀវភៅគីមីវិទ្យាជាភាសាខ្មែរ យើងខ្ញុំបានតាក់តែងសៀវភៅសង្ខេបមេរៀន និង លំហាត់គីមីវិទ្យាថ្នាក់ទី៩នេះឡើង ដើម្បីបំពេញនូវតម្រូវការរបស់សិស្ស និងគ្រូ ក្នុងការរៀន និង បង្រៀន ស្របតាមកម្មវិធី សិក្សាថ្មី។

ខ្លឹមសារដែលមាននៅក្នុងឯកសារនេះមានដូចជា ទ្រឹស្តីផ្សេងៗនៃប្រតិកម្មគីមី របៀបហៅឈ្មោះសមាសធាតុ គីមីមួយចំនួន មេរៀនសង្ខេប លំហាត់ និងគន្លឹះដោះស្រាយលំហាត់។ ជាងនេះទៅទៀតតាមមេរៀនសង្ខេបនីមួយៗ យើងខ្ញុំបានបន្ថែមនូវលក្ខណៈគីមី ( ប្រតិកម្មគីមី) ច្រើនជាងនៅក្នុងសៀវភៅរដ្ឋ ដើម្បីជាជំនួយដល់ការបង្កើតលំហាត់ផងដែរ។

ទោះបីជាការខិតខំប្រឹងប្រែងរិះរកនូវពត៌មានមកដាក់បញ្ចូលនៅក្នុងសៀវភៅនេះឱ្យបានច្រើនយ៉ាងណាក៏ដោយ កង្វះខាត និងការឆ្គាំឆ្គងនៅតែអាចកើតមានឡើងទាំងផ្នែកខ្លឹមសារ និងគរុកោសល្យ។ យើងខ្ញុំរង់ចាំទទួលនូវការរិះគន់ស្ថាបនាពីសំណាក់លោកគ្រូ អ្នកគ្រូ ក៏ដូចជាអ្នកអានផ្សេងទៀងចំពោះឯកសារនេះ ដើម្បីជួយកែលម្អវាឱ្យរិតតែប្រសើរឡើង។



# បញ្ជីអត្ថបទ

# រំលឹក

-***ធាតុគីមី*** ជារូបធាតុដែលមិនអាចបំបែកបានជាអង្គធាតុងាយពីរ ឬច្រើនតាមវិធីគីមី ។ ធាតុគីមីត្រូវបានតាងដោយ ***និមិត្តសញ្ញាគីមី***។ ធាតុគីមីមួយមានម៉ាសអាតូមរបស់វាមួយ តាងដោយខ្នាត ***ខ.អ (ខ្នាតម៉ាសអាតូម)*** ។

ឧទាហរណ៍ : **ដែក** តាងដោយនិមិត្តសញ្ញា **"Fe"** មានម៉ាសអាតូម **56 ខ.អ** ។

-***ម៉ូលេគុល*** កើតឡើងពីការផ្សំនៃអាតូមចាប់ពី ពីរឡើងទៅ ។ មូលេគុលនៃអង្គធាតុមួយត្រូវបានតាងដោយ ***រូបមន្តគីមី*** ។

ឧទាហរណ៍ : $Ca(OH)_2$ ជារូបមន្តនៃកាល់ស្យូមអ៊ីដ្រុកស៊ីត ។ វាកើតពីការផ្សំនៃធាតុ Ca = 1 ; O = 2 និង H = 2 ។

-***វិធីគណនាម៉ាសម៉ូលនៃម៉ូលេគុល ឬសមាសធាតុមួយ :*** ត្រូវបូកបញ្ចូលគ្នានូវម៉ាសអាតូមនៃធាតុនីមួយៗ ដែលបង្កជាម៉ូលេគុល ឬសមាសធាតុនោះ ។ ក្នុងការអនុវត្តលំហាត់ គេតែងតែសំដែងខ្នាតរបស់ធាតុ ឬម៉ូលេគុលជាក្រាម (*g*) ។

ឧទាហរណ៍ : $CaCO_3$ មានម៉ាសម៉ូល = ម៉ាសអាតូម Ca + ម៉ាសអាតូម C + 3(ម៉ាសអាតូម O )

= 40 + 12 + 3(16) = 52 + 48 = 100g ឬ 100 ខ.អ

***ជាទូទៅម៉ាសអាតូមនៃធាតុត្រូវបានប្រាប់ក្នុងប្រធានលំហាត់ ។***

❋ការតាក់តែងរូបមន្តគួរត្រូវបង្ហាញក្នុងពេលនេះ (ជំពូក៣ , មេរៀនទី១) ។

***កាលណាធាតុពីរចូលផ្សំគ្នា ឬការចូលផ្សំរវាងធាតុ និងរ៉ាឌីកាល់ ធាតុ ឬរ៉ាឌីកាល់ទាំងនោះត្រូវប្តូរវ៉ាឡង់គ្នា ដើម្បីឱ្យវ៉ាឡង់សរុបនៃធាតុ ឬរ៉ាឌីកាល់នីមួយៗស្មើគ្នា ។***

ឧទាហរណ៍ :

- Al មានវ៉ាឡង់ 3 និង O មានវ៉ាឡង់ 2 កាលណាធាតុទាំងពីរចូលផ្សំគ្នា

យើងបាន : $\overset{III}{Al}\ \overset{II}{O} \Longrightarrow Al_2O_3$

- Zn មានវ៉ាឡង់ 2 និង O មានវ៉ាឡង់ 2 កាលណាធាតុទាំងពីរចូលផ្សំគ្នា

យើងបាន : $\overset{II}{Zn}\ \overset{II}{O} \Longrightarrow ZnO$

- Mg មានវ៉ាឡង 2 និងរ៉ាឌីកាល់អ៊ីដ្រុកស៊ីត $OH^-$ មានវ៉ាឡង់1 កាលណាធាតុទាំងពីរចូលផ្សំគ្នា

យើងបាន : $\overset{II}{Mg}\ \overset{I}{OH} \Longrightarrow Mg(OH)_2$

- Na មានវ៉ាឡង 1 និងរ៉ាឌីកាល់អ៊ីដ្រុកស៊ីត $OH^-$ មានវ៉ាឡង់1 កាលណាធាតុទាំងពីរចូលផ្សំគ្នា

យើងបាន : $\overset{I}{Na}\ \overset{I}{OH} \Longrightarrow NaOH$

***ចំណាំ :*** *កាលណាធាតុគីមីចូលផ្សំជាមួយរ៉ាឌីកាល់ដែលបង្កចាប់ពីអាតូមពីរឡើងទៅត្រូវដាក់រ៉ាឌីកាល់នោះក្នុងរង្វង់ក្រចក ហើយដាក់លេខសន្ទស្សន៍ បើវាមានតម្លៃចាប់ពី 2 ឡើងទៅ (គេមិនសរសេរទេចំពោះលេខសន្ទស្សន៍ដែលមានតម្លៃស្មើ 1) ។*



# ជំពូក១ អុកស៊ីសែន និង អ៊ីដ្រូសែន

## មេរៀនទី១ អុកស៊ីសែន

ក្នុងខ្យល់មានអុកស៊ីសែន 1/5 គិតជាមាឌ និង 21ភាគរយ គិតជាម៉ាស ។ បរិមាណនេះអាចប្រែប្រួលទៅតាមតំបន់ ។

យើងបានរូបមន្ត $V_{ខ្យល់} = 5V_{O_2}$ ; V : គិតជា L ឬ ml ។

ឧទាហរណ៍ : ១-ចូរគណនាមាឌខ្យល់ដែលត្រូវយកមកប្រើ (គិតជា ml និង L) កាលណាគេប្រើអុកស៊ីសែនអស់ 120ml ។

**ចម្លើយ** : ១-គណនាមាឌខ្យល់

តាមរូបមន្ត $V_{ខ្យល់} = 5V_{O_2}$ ដោយ $V_{O_2} = 120ml$

នោះ $V_{ខ្យល់} = 5 \times 120 =$ <u>600ml</u>

ដោយ $1L = 1000ml$ ឬ $1ml = \frac{1}{1000}L$ យើងបាន $V_{ខ្យល់} = 600 \times \frac{1}{1000} =$ <u>0,6L</u>

> ❈ចំណាំ : $1L = 1000ml$ ឬ $10^3ml$
> $1dm^3 = 1000cm^3$ ឬ $10^3cm^3$
> $1L = 1dm^3$ និង $1ml = 1cm^3$

២-គេដឹងថានៅក្នុងបន្ទប់មួយមានមាឌ 2 500 000L មានខ្យល់ពេញនៅក្នុងនោះ ។ គណនាមាឌអុកស៊ីសែនដែលមាននៅក្នុងបន្ទប់គិតជា L និង ml ។ ចំ. 500 000L និង 500 000 000ml

### ១.លក្ខណៈរូបរបស់អុកស៊ីសែន

ជាឧស្ម័នគ្មានក្លិន គ្មានពណ៌ ធ្ងន់ជាងខ្យល់បន្តិច ពុះនៅសីតុណ្ហភាព $-183^oC$ កកនៅសីតុណ្ហភាព $-218^oC$ ។

### ២.លក្ខណៈគីមី

ក.<u>អំពើជាមួយលោហៈ</u>

ប្រតិកម្មរវាងអុកស៊ីសែន និងលោហៈ ទទួលបានអុកស៊ីតលោហៈ ឬអុកស៊ីតបាស ។

❈ ចំណាំ : លោហៈ + អុកស៊ីសែន ⟶ អុកស៊ីតលោហៈ (ឈ្មោះអុកស៊ីតលោហៈ គឺ ឈ្មោះលោហៈ+អុកស៊ីត)

ឧទាហរណ៍ :

$4Na + O_2 \rightarrow 2Na_2O$ សូដ្យូមអុកស៊ីត

$2Cu + O_2 \rightarrow 2CuO$ ទង់ដែងអុកស៊ីត

$2Mg + O_2 \rightarrow 2MgO$ ម៉ាញ៉េស្យូមអុកស៊ីត

$4Al + 3O_2 \rightarrow 2Al_2O_3$ អាលុយមីញ៉ូមអុកស៊ីត

$2Zn + O_2 \rightarrow 2ZnO$ ស័ង្កសីអុកស៊ីត

កាលណាដែកទុកហាលខ្យល់ និងរងសំណើម គេទទួលបានអុកស៊ីតម៉ាញ៉េទិច (magnetite) ដែលមានរូបមន្ត $Fe_3O_4$ ។

សមីការ: $3Fe + 2O_2 \rightarrow Fe_3O_4$ ($Fe_3O_4$ បានមកពីបន្សំនៃ $FeO$ និង$Fe_2O_3$)

ខ.<u>អំពើជាមួយអលោហៈ</u>

ប្រតិកម្មរវាងអុកស៊ីសែន និងអលោហៈ ទទួលបានអុកស៊ីតអលោហៈ ឬអុកស៊ីតអាស៊ីត ។

❈ ចំណាំ : អលោហៈ + អុកស៊ីសែន ⟶ អុកស៊ីតអលោហៈ (ឈ្មោះអុកស៊ីតអលោហៈ គឺ ឈ្មោះអលោហៈ+អុកស៊ីត)

ឧទាហរណ៍ :

$4P + 5O_2 \rightarrow 2P_2O_5$ អានីឌ្រីតផូស្វរិច ឬ ឌីផូស្វ័រប៉ង់តាអុកស៊ីត

$S + O_2 \rightarrow SO_2$ ស្ពាន់ធ័រឌីអុកស៊ីត

$2C + O_2 \rightarrow 2CO$ កាបូនម៉ូណូអុកស៊ីត (ចំហេះមិនសព្វ )

❈ <u>សម្គាល់</u>

+ ឈ្មោះអុកស៊ីតលោហៈ កើតពីការចូលផ្សំនៃលោហៈដែលមានវ៉ាឡង់ប្រែប្រួលត្រូវហៅ :

***ឈ្មោះលោហៈ+ចំនួនវ៉ាឡង់+អុកស៊ីត*** ។

ឧទាហរណ៍ : $FeO$ : ដែក(II)អុកស៊ីត , $Fe_2O_3$ : ដែក(III)អុកស៊ីត

+ឈ្មោះអុកស៊ីតអលោហៈ ដែលអលោហៈតែមួយ អាចចូលផ្សំជាមួយអុកស៊ីសែន បង្កើតជាអុកស៊ីតលោហៈពីរ ឬច្រើន :

***ចំនួនអលោហៈ+ ឈ្មោះអលោហៈ+ ចំនួនអុកស៊ីសែន+ អុកស៊ីត*** ឬ ***ហៅតាមឈ្មោះធ្លាប់ប្រើ***។ **ចំនួន** 1:ម៉ូណូ 2:ឌី 3:ទ្រី 4:តេត្រា 5:ប៉ង់តា 6: អិចសា 7: អិបតា 8:អុកតា 9:ណូណា 10: ដេកា។ បើអលោហៈទី១មានចំនួន១ មិនចាំបាច់ដាក់**ម៉ូណូ**ទេ។

ឧទាហរណ៍ : $P_2O_3$ : ឌីផូស្វរទ្រីអុកស៊ីត $CO$ : កាបូនម៉ូណូអុកស៊ីត មិនមែនម៉ូណូកាបូនម៉ូណូអុកស៊ីតទេ

$CO_2$ : កាបូនឌីអុកស៊ីត $N_2O_5$ : ឌីអាសូតបង់តាអុកស៊ីត ឬអានីឌ្រីតនីទ្រិច

+ចំពោះឈ្មោះនៃម៉ូលេគុលដែលកើតពីការចូលផ្សំរវាងអលោហៈ និង អលោហៈផ្សេងទៀតក៏អាចហៅតាមរបៀប ស្រដៀងដូចខាងលើដែរ : ***ចំនួនអលោហៈ+ ឈ្មោះអលោហៈទី1+ ចំនួនអលោហៈទី2+ ឈ្មោះអលោហៈទី2***

*(អលោហៈទី១មានចំនួន១មិនប្រើបុព្វបទ ម៉ូណូទេ)*

ឧទាហរណ៍ : $PCl_5$ : ផូស្វរប៉ង់តាក្លរួ $CF_4$ : កាបូនតេត្រាភ្លុយអរួ $N_2H_4$ : ឌីអាសូតតេត្រាអ៊ីដ្រួ ឬ អ៊ីដ្រាស៊ីន

## ៣.ឧទ្ទេីអុកស៊ីសែន

-ពីខ្យល់រាវតាមវិធីបំណិត

-ពីអ៊ីដ្រូសែនពែរអុកស៊ីត ឬទឹកអុកស៊ីសែន ($H_2O_2$)។ សមីការ : $2H_2O_2 \xrightarrow{MnO_2} 2H_2O + O_2$

-ពីទឹក តាមរយៈអគ្គិសនីវិភាគទឹកក្នុងមជ្ឈដ្ឋានសូលុយស្យុងអាស៊ីត។ សមីការ : $2H_2O \rightarrow O_2 + 2H_2$

-តាមរស្មីសំយោគ (លំនាំដែលរុក្ខជាតិបង្កើតអាហារ : ការបម្លែង ឧស្ម័នកាបូនិច និងទឹកក្រោមអំពើនៃពន្លឺព្រះអាទិត្យ ឱ្យជាគ្លុយកូស និង ឧស្ម័នអុកស៊ីសែន)។ សមីការ : $6CO_2 + 6H_2O \xrightarrow{\text{ពន្លឺ}} \underset{\text{គ្លុយកូស}}{C_6H_{12}O_6} + 6O_2$

-ពីប៉ូតាស្យូមក្លរ៉ាត ($KClO_3$) : $2KClO_3 \xrightarrow{MnO_2} 2KCl + 3O_2$

-ពីចំហាយទឹកដោយប្រតិកម្មជាមួយឧស្ម័នក្លរ : $2H_2O(g) + 2Cl_2(g) \rightarrow 4HCl(g) + O_2(g)$ ; g = gas = ឧស្ម័ន

-ពីប្រតិកម្មបំបែកអុកស៊ីតលោហៈដោយកម្ដៅ :


$2HgO \xrightarrow{\text{កម្ដៅ}} 2Hg + O_2$


$2Ag_2O \xrightarrow{\text{កម្ដៅ}} 4Ag + O_2$


$3MnO_2 \xrightarrow{\text{កម្ដៅ}} Mn_3O_4 + O_2$


$2BaO_2 \xrightarrow{\text{កម្ដៅ}} 2BaO + O_2$ ; $BaO_2$ : បារ្យូមស៊ុបពែអុកស៊ីត


$2Pb_3O_4 \xrightarrow{\text{កម្ដៅ}} 6PbO + O_2$


$2PbO_2 \xrightarrow{\text{កម្ដៅ}} 2PbO + O_2$


$2MnO_2 + 2H_2SO_{4\,\text{ខាប់}} \xrightarrow{\text{កម្ដៅ}} 2MnSO_4 + 2H_2O + O_2$

-ពីប្រតិកម្មបំបែកអំបិលដោយកម្ដៅ :


$KNO_3 \xrightarrow{\text{កម្ដៅ}} 2KNO_2 + O_2$


$2KClO_3 \xrightarrow{360^o C} KCl + 3O_2$ ; $KNO_2$ : ប៉ូតាស្យូមនីទ្រីត


$2KMnO_4 \xrightarrow{240^o C} K_2MnO_4 + MnO_2 + O_2$ ; $KMnO_4$ ប៉ូតាស្យូមពែម៉ង់កាណាត , $K_2MnO_4$ ប៉ូតាស្យូមម៉ង់កាណាត


$4K_2Cr_2O_7 \xrightarrow{\text{កម្ដៅ}} 4K_2CrO_4 + 2Cr_2O_3 + 3O_2$ ; $K_2Cr_2O_7$ ប៉ូតាស្យូមឌីក្រូម៉ាតឬប៊ីក្រូម៉ាត, $K_2CrO_4$ ប៉ូតាស្យូមក្រូម៉ាត

-ពីក្រូមទ្រីអុកស៊ីត($CrO_3$) : $CrO_3 + 6H_2SO_{4\,\text{ខាប់}} \rightarrow 2Cr_2(SO_4)_3 + 6H_2O + 3O_2$ ; $KHSO_4$ ប៉ូតាស្យូមអ៊ីដ្រូសែនស៊ុលផាត

-ពីប៉ូតាស្យូមប៊ីក្រូម៉ាត : $2K_2Cr_2O_7 + 10H_2SO_{4\,\text{ខាប់}} \rightarrow 4KHSO_4 + 2Cr_2(SO_4)_3 + 8H_2O + 3O_2$

❋សន្និដ្ឋាន : អុកស៊ីសែនមានសារៈសំខាន់ចំពោះមនុស្ស សត្វ រុក្ខជាតិ និង ភាវរស់ផ្សេងៗទៀត សម្រាប់ដង្ហើម និងចំហេះ។

**គួរយល់ដឹង :** នៅក្នុងទឹកត្រីដកដង្ហើមស្រូបយកឧស្ម័នអុកស៊ីសែន ($O_2$) នៅចន្លោះម៉ូលេគុលទឹក (អុកស៊ីសែនរលាយ) មិនមែនអាតូមអុកស៊ីសែន (O) ដែលមាននៅក្នុងម៉ូលេគុលទឹក ($H_2O$) ទេ។ កម្ដៅអាចធ្វើឱ្យអុកស៊ីសែនរលាយក្នុងទឹកថយចុះផងដែរ។

## សំណួរ និង លំហាត់

១-ចូរបំពេញ និង ថ្លឹងសមីការខាងក្រោម :



| | | | | | | | | | | | |
|---|---|---|---|---|---|---|---|---|---|---|---|
| ក. | $P$ | + | $O_2$ | $\rightarrow$ | $P_2O_5$ | ខ. | $N_2$ | + | $O_2$ | $\rightarrow$ | $NO$ |
| គ. | $NO$ | + | $O_2$ | $\rightarrow$ | $NO_2$ | ឃ. | $Fe$ | + | $O_2$ | $\rightarrow$ | $Fe_3O_4$ |
| ង. | $K$ | + | $O_2$ | $\rightarrow$ | .................... | ច. | $Ca$ | + | $O_2$ | $\rightarrow$ | ........... |
| ឆ. | $CO_2$ | + | $H_2O$ | $\xrightarrow{ពន្លឺ}$ | ..................... | + | .............. | | | | |

២-ចូរបំពេញឃ្លាខាងក្រោមឱ្យបានត្រឹមត្រូវ

ក.កាបូនឆេះក្នុងអុកស៊ីសែនឱ្យផលជាឧស្ម័ន ........... ។ ដើម្បីផ្ទៀងផ្ទាត់អត្តសញ្ញាណរបស់ឧស្ម័ននោះ គេប្រើ ............... ។

ខ.ក្នុងពេលមានប្រតិកម្មគីមី ធាតុដែលបាត់គឺ ........................ និង........................ ។ ចំណែកអង្គធាតុដែលកើតថ្មីគឺ ............................ ។ អង្គធាតុដែលចូលធ្វើប្រតិកម្មគឺ............................ ហើយអង្គធាតុដែលកកើតគឺ ............................ ។

៣-បើចង់បានអុកស៊ីសែន 64g តើគេត្រូវបំបែកបារតអុកស៊ីតប៉ុន្មានក្រាម? សមីការប្រតិកម្ម: $2HgO \rightarrow 2Hg + O_2$
(Hg = 200 , O = 16)

៤-គេចង់ដុតផូស្វ័រ 15,5g ។ រកម៉ាសអុកស៊ីសែនចាំបាច់ក្នុងចំហេះ និងម៉ាសអានីឌ្រិតផូស្វរិចដែលកកើត ។ (P = 31 , O = 16)

៥-គេដុតស្ពាន់ធ័រ 8g ក្នុងដបដែលមានផ្ទុកអុកស៊ីសែន 4,48L ។ គណនាម៉ាសស្ពាន់ធ័រនៅសល់ក្រោយចំហេះ? គេដឹងថាអុកស៊ីសែន 32g មានមាឌ 22,4L (S = 32 , O = 16) ។ សមីការ $S + O_2 \rightarrow SO_2$

***គ្រប់ឧស្ម័នទាំងអស់មានមាឌម៉ូលនៅលក្ខខ័ណ្ឌធម្មតាគឺ 22,4L ។ លក្ខខ័ណ្ឌធម្មតាគឺនៅ សីតុណ្ហភាព $0^OC$ និងសម្ពាធ1atm ។***

ឧទាហរណ៍ : $H_2$ = 2g មានមាឌ 22,4L ។ 2g ជាម៉ាសម៉ូលនៃម៉ូលេគុលអ៊ីដ្រូសែន ។

$CO_2$ = 44g មានមាឌ 22,4L ។ 44g ជាម៉ាសម៉ូលនៃ $CO_2$ គឺ $12 + 16\times2 = 44$

៦-គេដុតអាលុយមីញ៉ូម 1,89g ក្នុងដបមួយដែលមានអុកស៊ីសែនចំនួន 1,5L ។

ក.សរសេរសមីការតាងប្រតិកម្ម

ខ.គណនាម៉ាស និងមាឌអុកស៊ីសែនដែលនៅសល់ក្រោយប្រតិកម្ម ។ $O_2$ = 32g មានមាឌ 22,4L

គ.គណនាម៉ាសនៃអុកស៊ីតលោហៈដែលទទួលបាន ។ (Al = 27 , O = 16)

៧-ចំហេះដែក(II) ចំនួន 3,36g ជាមួយខ្យល់ 3,3L នៅក្នុងដបមួយ ។

ក.សរសេរសមីការតាងប្រតិកម្ម ។

ខ.គណនាម៉ាសដែកដែលនៅសល់ ។ ក្នុងខ្យល់មានអុកស៊ីសែន 20% គិតជាមាឌ ។

គ.គណនាម៉ាសនៃអុកស៊ីតលោហៈដែលកកើត ។ (Fe = 56 , O = 16)

៨-គេដុតលោហៈកាល់ស្យូមជាមួយអុកស៊ីសែននៃខ្យល់ ។ ក្រោយប្រតិកម្មចប់គេទទួលបានកាល់ស្យូមអុកស៊ីត 7,84g ។

ក.សរសេរសមីការតាងប្រតិកម្ម ។

ខ.គណនាម៉ាសអុកស៊ីសែន ។

គ.គណនាម៉ាសកាល់ស្យូមដែលត្រូវប្រើ ។ (Ca = 40 , O = 16)

៩-គណនាម៉ាសខ្យល់ដែលត្រូវប្រើ ដើម្បីទទួលបានអុកស៊ីសែន 100L ។ ក្នុងលក្ខខ័ណ្ឌធម្មតាខ្យល់ 1L មានម៉ាស 1,3g ។

១០-គេធ្វើប្រតិកម្មចំហេះសព្វនៃម្សៅកាបូនចំនួន 3,6g ជាមួយអុកស៊ីសែននៃខ្យល់ ក្រោយប្រតិកម្មចប់គេទទួលបានឧស្ម័នកាបូនិច ។

ក.សរសេរសមីការតាងប្រតិកម្ម ។

ខ.គណនាម៉ាសអុកស៊ីសែនដែលត្រូវប្រើ បន្ទាប់មកមាឌរបស់វា ។ ដោយដឹងថា $O_2$ = 32g មានមាឌ 22,4L

គ.គណនាម៉ាសឧស្ម័នកាបូនឌីអុកស៊ីតដែលកកើត បន្ទាប់មកមាឌរបស់វា ។ $CO_2$ = 44g មានមាឌ 22,4L

ឃ.គណនាមាឌខ្យល់ដែលចាំបាច់សម្រាប់ប្រតិកម្មខាងលើ គិតជា L និង ml បន្ទាប់មកម៉ាសរបស់វា ។

ខ្យល់1L មានម៉ាស 1,3g ។ (C = 12 , O = 16)

១១-គេដុតលោហៈម៉ាញ៉េស្យូមឱ្យឆេះសព្វ ដោយត្រូវការអុកស៊ីសែននៃខ្យល់ចំនួន 11,2L ដើម្បីទទួលបានអុកស៊ីតនៃលោហៈ ។

ក.សរសេរសមីការតាងប្រតិកម្ម ។ ប្រាប់ឈ្មោះអុកស៊ីតលោហៈនោះ ។

ខ.គណនាម៉ាសម៉ាញ៉េស្យូមដែលប្រើ ។ ដោយដឹងថា $O_2$ = 32g មានមាឌ 22,4L

គ.គណនាម៉ាសអុកស៊ីតលោហៈដែលកកើត ។

ឃ.គណនាមាឌខ្យល់ដែលត្រូវប្រើ បន្ទាប់មកម៉ាសរបស់វា ។ ខ្យល់1L មានម៉ាស 1,3g ។ (Mg = 24 , O = 16)

## ចម្លើយ

១-បំពេញ និង ថ្លឹងសមីការខាងក្រោម :



ក. $4P + 5O_2 \rightarrow 2P_2O_5$ ខ. $N_2 + O_2 \rightarrow 2NO$

គ. $2NO + O_2 \rightarrow 2NO_2$ ឃ. $3Fe + 2O_2 \rightarrow Fe_3O_4$

ង. $4K + O_2 \rightarrow 2K_2O$ ច. $2Ca + O_2 \rightarrow 2CaO$

ឆ. $6CO_2 + 6H_2O \xrightarrow{\text{ពន្លឺ}} C_6H_{12}O_6 + 6O_2$

២- ក. កាបូនឌីអុកស៊ីត $CO_2$ – ទឹកកំបោរថ្លា $Ca(OH)_2$

ខ.កាបូន-អុកស៊ីសែន-កាបូនឌីអុកស៊ីត-អង្គធាតុប្រតិករ-អង្គធាតុកកើត

***ក្នុងការធ្វើលំហាត់គីមី គឺត្រូវអានប្រធាន ដើម្បីស្វែងរកសំណួរ និងបម្រាប់ បន្ទាប់មកត្រូវគិតរកវិធី ឬរូបមន្តដែលឆ្លើយតបទៅនឹងសំណួរ ។ ភាគច្រើននៃដំណោះស្រាយលំហាត់គីមី គឺពឹងផ្អែកលើសមីការគីមី (សរសេរ និងថ្លឹងសមីការ) ។***

៣-រកម៉ាសបារតអុកស៊ីត HgO



សមីការតាងប្រតិកម្ម : $2HgO \rightarrow 2Hg + O_2$

***ម៉ាសអាតូម ឬម៉ាសម៉ូលេគុល*** ⟶ 2(200+16) ... 2x16

432g ... 32g

***ម៉ាសសួរក ឬម៉ាសស្គាល់*** ⟶ $m_{HgO}$? ... 64g

តាមសមីការ : $O_2$ = 32g ត្រូវការ HgO = 432g

$O_2$ = 64g ត្រូវការ HgO = $\frac{432 \times 64}{32} = 864g$

> ដើម្បីរកម៉ាសរបស់ធាតុ ឬសមាសធាតុ ណាមួយក្នុងសមីការ យើងត្រូវពិនិត្យមើលក្នុងសមីការ ទៅលើធាតុ ឬសមាសធាតុផ្សេងដែលយើងស្គាល់ម៉ាស ឬអាចរកម៉ាសឃើញតាមវិធីផ្សេងទៀត(វាចារតាមមាឌ) ។ បន្ទាប់មក ត្រូវយកវាមកដាក់ក្រោមសមីការដូចគំនូសព្រួញតាមលំដាប់ ។ ហើយវាចារតាមសមីការ ពីធាតុស្គាល់ ទៅធាតុមិនស្គាល់ ។ m : ម៉ាសនៃធាតុ ឬអង្គធាតុគិតជាក្រាម g

៤-•គណនាម៉ាសអុកស៊ីសែន ($O_2$)



សមីការតាងប្រតិកម្ម : $4P + 5O_2 \rightarrow 2P_2O_5$

| | | |
|---|---|---|
| $4 \times 31$ | $5(16 \times 2)$ | $2(2 \times 31 + 16 \times 5)$ |
| 124g | 160g | 284g |
| 15,5g | $m_{O_2}$ ? | $m_{P_2O_5}$ ? |

តាមសមីការ : P = 124g ត្រូវប្រើ $O_2$ = 160g

P = 15,5g ត្រូវប្រើ $O_2 = \frac{160 \times 15,5}{124} = 20g$

•គណនាម៉ាសអានីទ្រិតផូស្វរិច $P_2O_5$

តាមសមីការ : P = 124g ទទួលបាន $P_2O_5$ = 284g

P = 15,5g ទទួលបាន $P_2O_5 = \frac{284 \times 15,5}{124} = 35,5g$ **(ក្នុងករណីរកម៉ាស $P_2O_5$ គេអាចវាចារពី $O_2$ ក៏ឃើញចម្លើយដូចគ្នាដែរ)**

៥-គណនាម៉ាសស្ពាន់ធ័រនៅសល់ (S)

តាមទំនាក់ទំនង : $m_{S\ ដើម} = m_{S\ ចូលរួមប្រតិកម្ម} + m_{S\ សល់}$ នាំឱ្យ $m_{S\ សល់} = m_{S\ ដើម} - m_{S\ ចូលរួមប្រតិកម្ម}$

ដោយ : $m_{S\ ដើម} = 8g$ , $m_{S\ ចូលរួមប្រតិកម្ម}$ = មិនស្គាល់ (តែអាចរកឃើញតាមសមីការ)

សមីការ : $S + O_2 \rightarrow SO_2$



| | | |
|---|---|---|
| 32g | 32g | |
| $m_S$? | 6,4g | |

តាមសម្មតិកម្ម : $O_2$ = 22,4L មានម៉ាស 32g

$O_2$ = 4,48L មានម៉ាស $\frac{32\times 4,48}{22,4} = 6,4g$

តាមសមីការ : $O_2$ = 32g ត្រូវការ S = 32g

$O_2$ = 6,4g ត្រូវការ S = $\frac{32\times 6,4}{32} = 6,4g$

យើងបាន $m_{S\ សល់} = 8 - 6,4 = 1,6g$

៦-ក.សរសេរសមីការតាងប្រតិកម្ម



| 4Al + | 3O$_2$ → | 2Al$_2$O$_3$ |
|---|---|---|
| $4\times 27$ | $3(16\times 2)$ | $2(27\times 2 + 3\times 16)$ |
| 108g | 96g | 204g |
| 1,89g | $m_{O_2}$? | $m_{Al_2O_3}$? |

ខ.គណនាម៉ាស $O_2$សល់

តាមទំនាក់ទំនង : $m_{O_2\ ដើម} = m_{O_2\ ចូលរួមប្រតិកម្ម} + m_{O_2\ សល់}$ នាំឱ្យ $m_{O_2\ សល់} = m_{O_2\ ដើម} - m_{O_2\ ចូលរួមប្រតិកម្ម}$

-រក $m_{O_2\ ដើម}$

តាមសម្មតិកម្ម : $O_2$ = 22,4L មានម៉ាស 32g

$O_2$ = 1,5L មានម៉ាស $\frac{32\times 1,5}{22,4} = 2,14g$

-រក $m_{O_2\ ចូលរួមប្រតិកម្ម}$

តាមសមីការ : Al = 108g ត្រូវការ $O_2$ = 96g

Al = 1,89g ត្រូវការ $O_2 = \frac{96\times 1,89}{108} = 1,68g$

នោះ $m_{O_2\ សល់} = 2,14 - 1,68 = 0,46g$

គ.គណនាម៉ាស អុកស៊ីតលោហៈ $Al_2O_3$

តាមសមីការ : $O_2$ = 96g ឱ្យផលជា $Al_2O_3$ = 204g

$O_2$ = 1,68g ឱ្យផលជា $Al_2O_3 = \frac{204\times 1,68}{96} = 3,57g$

៧-ក.សរសេរសមីការ : $2Fe + O_2 \rightarrow 2FeO$



| | | |
|---|---|---|
| 112g | 32g | 144g |
| $m_{Fe}$? | 0,94g | $m_{FeO}$? |

ខ.គណនាមាឌដែកសល់ (Fe)

តាមទំនាក់ទំនង $m_{Fe\ សល់} = m_{Fe\ ដើម} - m_{Fe\ ប្រតិកម្ម}$ , ដោយ $m_{Fe\ ដើម} = 3,36g$

តាមសម្មតិកម្ម ខ្យល់ 100L មាន $O_2$ = 20L

ខ្យល់ 3,3L មាន $O_2 = \frac{20\times 3,3}{100} = 0,66L$

ឬអាចធ្វើតាមរូបមន្ត $V_{O_2} = \frac{1}{5} V_{ខ្យល់}$

ដោយ $O_2 = 22,4L$ មានម៉ាស 32g

$O_2 = 0,66g$ មានម៉ាស $\frac{32 \times 0,66}{22,4} = 0,94g$

តាមសមីការ: $O_2 = 32g$ ចូលផ្សំជាមួយ $Fe = 112g$

$O_2 = 0,94g$ ចូលផ្សំជាមួយ $Fe = \frac{112 \times 0,94}{32} = 3,29g$

យើងបាន $m_{Fe សល់} = 3,36 - 3,29 = 0,07g$

គ.គណនាម៉ាសនៃអុកស៊ីត (FeO)

តាមសមីការ $O_2 = 32g$ ឱ្យផលជា $FeO = 144g$

$O_2 = 0,94g$ ឱ្យផលជា $FeO = \frac{144 \times 0,94}{32} = 4,23g$



៨-ក.សរសេរសមីការតាងប្រតិកម្ម : $2Ca + O_2 \rightarrow 2CaO$

| | | | |
|---|---|---|---|
| | 2Ca | $O_2$ | 2CaO |
| | 80g | 32g | 112g |
| | $m_{Ca}$? | $m_{O_2}$? | 7,84g |

ខ.គណនាម៉ាសអុកស៊ីសែន ($O_2$)

តាមសមីការ: $CaO = 112g$ ត្រូវការ $O_2 = 32g$

$CaO = 7,84g$ ត្រូវការ $O_2 = \frac{32 \times 7,84}{112} = 2,24g$

គ.គណនាម៉ាសកាល់ស្យូម (Ca)

តាមសមីការ: $CaO = 112g$ ត្រូវប្រើ $Ca = 80g$

$CaO = 7,84g$ ត្រូវប្រើ $Ca = \frac{80 \times 7,84}{112} = 5,6g$

៩-គណនាម៉ាសខ្យល់

តាមរូបមន្ត $V_{ខ្យល់} = 5V_{O_2}$ តែ $V_{O_2} = 100L$

នោះ $V_{ខ្យល់} = 5 \times 100 = 500L$

ដោយ ខ្យល់ 1L មានម៉ាស 1,3g

ខ្យល់ 500L មានម៉ាស $\frac{1,3 \times 500}{1} = 650g$



១០-ក.សរសេរសមីការ : $C + O_2 \rightarrow CO_2$

| | | |
|---|---|---|
| C | $O_2$ | $CO_2$ |
| 12g | 32g | 44g |
| 3,6g | $m_{O_2}$? | $m_{CO_2}$? |

ខ.គណនាម៉ាស និងមាឌអុកស៊ីសែន ($O_2$)

តាមសមីការ $C = 12g$ ត្រូវការ $O_2 = 32g$

$C = 3,6g$ ត្រូវការ $O_2 = \frac{32 \times 3,6}{12} = 9,6g$

ដោយ $O_2 = 32g$ មានមាឌ 22,4L

$O_2 = 9,6g$ មានមាឌ $\frac{22,4 \times 9,6}{32} = 6,72L$

គ.គណនាម៉ាស និងមាឌឧស្ម័នកាបូនិច ($CO_2$)

តាមសមីការ $C = 12g$ ត្រូវការ $CO_2 = 44g$

$C = 3,6g$ ត្រូវការ $CO_2 = \frac{44 \times 3,6}{12} = 13,2g$

ដោយ $CO_2 = 44g$ មានមាឌ 22,4L

$CO_2 = 13,2g$ មានមាឌ $\frac{22,4 \times 13,2}{44} = 6,72L$

ឃ.គណនាមាឌខ្យល់

តាមរូបមន្ត $V_{ខ្យល់} = 5V_{O_2}$ តែ $V_{O_2} = 6,72L$

នោះ $V_{ខ្យល់} = 5 \times 6,72 = 33,6L$ ឬ 33600ml (ព្រោះ 1L = 1000ml)

ដោយ ខ្យល់ 1L មានម៉ាស 1,3g

ខ្យល់ 33,6L មានម៉ាស $\frac{1,3 \times 33,6}{1} = 43,68g$



១១- ក.សរសេរសមីការ $2Mg + O_2 \rightarrow 2MgO$ ម៉ាញ៉េស្យូមអុកស៊ីត

| | | |
|---|---|---|
| 48g | 32g | 80g |
| $m_{Mg}$? | 16g | $m_{MgO}$? |

ដោយ $O_2 = 22,4L$ មានម៉ាស 32g

$O_2 = 11,2L$ មានម៉ាស $\frac{32 \times 11,2}{22,4} = 16g$ *ខ.* $m_{Mg} = 24g$ *គ.*$m_{MgO} = 40g$ *ឃ.*$V_{ខ្យល់} = 56L$ , $m_{ខ្យល់} = 73,8g$

## មេរៀនទី២ ចំហេះ និងអនុវត្តន៍អុកស៊ីសែន

### ១.ចំហេះ

ជាប្រតិកម្មរវាងធាតុ ឬសមាសធាតុណាមួយជាមួយអុកស៊ីសែន ដោយបំភាយកម្តៅ ។



ឧទាហរណ៍ : $C + O_2 \rightarrow CO_2$

ចំហេះមានពីរគឺ ចំហេះច្រាល និងចំហេះងំ ។

**ក.ចំហេះច្រាល :** ជាប្រតិកម្មសម្រេចឡើងយ៉ាងរហ័សដោយបញ្ចេញកម្តៅ និងអណ្តាតភ្លើង ។

**ខ.ចំហេះងំ :** ជាប្រតិកម្មយឺតដោយមិនបញ្ចេញអណ្តាតភ្លើង ។

ឧទាហរណ៍ : - ចំហេះច្រាល : ចំហេះធ្យូងឧស ចំហេះនៃទៀន .... ។

- ចំហេះងំ : ចំហេះនៃសាំង ឬ ឧស្ម័ន (gas = ហ្គាស)ក្នុងម៉ាស៊ីន ចំហេះនៃគ្លុយកូសក្នុងសារពាង្គកាយ ... ។

### ២.ចំហេះក្នុងម៉ាស៊ីន

សាំង ($C_8H_{18}$ = អុកតាន) ជាអ៊ីដ្រូកាបួឆ្អែត ដែលត្រូវបានប្រើជាឥន្ធនៈ ក្នុងម៉ាស៊ីនដើម្បីបង្កើតជាថាមពល ។

❈ អ៊ីដ្រូកាបួ ជាអង្គធាតុសមាសដែលផ្សំឡើងដោយកាបូន និងអ៊ីដ្រូសែន ។ វាមានរូបមន្តទូទៅ $C_xH_y$ ។

-ចំហេះសព្វនៃអ៊ីដ្រូកាបួ ទទួលបានកាបូនឌីអុកស៊ីត ($CO_2$) និងទឹក ($H_2O$) ។

-ចំហេះមិនសព្វរបស់វាទទួលបាន កាបូន (C) កាបូនម៉ូណូអុកស៊ីត (CO) និង ទឹក ។ ក្នុងការអនុវត្តន៍លំហាត់ គេសរសេរ ផលិតផលទទួលបានជា $CO + H_2O$ ឬ $C + H_2O$ ។

ចំហេះនៃប្រេងឥន្ធនៈក្នុងម៉ាស៊ីនទទួលបានឧស្ម័នពុលដូចជា : $CO$ , $SO_2$ , $NO$ , $NO_2$ , ... ។



ឧទាហរណ៍ : 1. $C_8H_{18} + 25O_2 \rightarrow 8CO_2 + 9H_2O$ 2. $CH_4 + 2O_2 \rightarrow CO_2 + 2H_2O$

### ៣.ដង្ហើម

ជាប្រតិកម្មចំហេះគ្លុយកូសក្នុងសារពាង្គកាយ ។ តាមសមីការ :



គ្លុយកូស + អុកស៊ីសែន → កាបូនឌីអុកស៊ីត + ទឹក + ថាមពល

$C_6H_{12}O_6 + 6O_2 \rightarrow 6CO_2 + 6H_2O$ + ថាមពល

### ៤.អុកស៊ីតកម្ម និងរេដុកម្ម

-អុកស៊ីតករ ជាធាតុដែលបោះបង់អុកស៊ីសែន ហើយវាទទួលរេដុកម្ម ។

-រេដុករ ជាធាតុដែលចាប់យកអុកស៊ីសែន ហើយវាទទួលអុកស៊ីតកម្ម ។

-អុកស៊ីតកម្ម ជាលំនាំចាប់យកអុកស៊ីសែន ។

-រេដុកម្ម ជាលំនាំបោះបង់អុកស៊ីសែន

ឧទាហរណ៍ :




តាមសមីការ: $CuO$ ជាអុកស៊ីតករ និង $H_2$ ជារេដុករ

### ៥.បម្រើបម្រាស់អុកស៊ីសែន

-ក្នុងវេជ្ជសាស្ត្រ :សង្គ្រោះអ្នកជម្ងឺពិបាកដកដង្ហើម ។

-ក្នុងវិទ្យាសាស្ត្រ : ផ្គត់ផ្គង់ដល់ដំណាកដង្ហើមរបស់ អ្នកមុជទឹក និងអវកាសយានិក ។

-ក្នុងឧស្សាហកម្ម :គេប្រើវាក្នុងចំពុះផ្សា អុកស៊ីអាសេទីឡែន ឬចំពុះផ្សាអុកស៊ីអ៊ីដ្រូសែន ដែលអាចផ្តល់កម្តៅរហូតដល់ $3000^oC$ ។

## សំណួរ និង លំហាត់

១-បើយើងយកភ្លើងទៀនទៅរោលកញ្ចក់ នោះវានឹងឡើងពណ៌ខ្មៅ ។ ចូរពន្យល់ ។

២-ចូរសរសេរសមីការតាងប្រតិកម្ម ទង្វើអុកស៊ីសែនពីទឹកអុកស៊ីសែនេ ។

៣-តើអ្នកយល់យ៉ាងណាចំពោះពាក្យថា "ចំហេះ"?

៤-ចូរពន្យល់ពីភាពដូចគ្នារវាងចំហេះទៀន និងដង្ហើម ។

៥-គេធ្វើប្រតិកម្មរវាងឧស្ម័នកាបូនឌីអុកស៊ីត ជាមួយលោហៈម៉ាញ៉េស្យូម តាមសមីការខាងក្រោម ។ ចូរបំពេញចន្លោះខាងក្រោមៈ




គេថា Mg ជា...................... ព្រោះវា.......................................................... ហើយវារង............................ ។

$CO_2$ជា..................... ព្រោះវា.......................................................... ហើយវារង............................ ។

៦-ដើម្បីដុតស្ពាន់ធ័រ 32g ឱ្យឆេះសព្វគេត្រូវការអុកស៊ីសែនចំនួន 22,4L ។ គណនា :

ក.មាឌអុកស៊ីសែន (ជាL និង$cm^3$) ដែលត្រូវការក្នុងចំហេះស្ពាន់ធ័រ 1,28g ។

ខ.ម៉ាសស្ពាន់ធ័រត្រូវប្រើក្នុងចំហេះជាមួយអុកស៊ីសែន 89,6$cm^3$ ។ $O_2$ = 32g មានមាឌ 22,4L ។ (S = 32 , O = 16)

៧-ដបមួយមានចំណុះ 1L ហើយពេញទៅដោយអុកស៊ីសែន ។ បើគេដុតស្ពាន់ធ័រ 1g ក្នុងដបនេះ តើស្ពាន់ធ័រឆេះអស់ ឬទេ?

៨-គេដុតលោហៈស័ង្កសី 5,2g ជាមួយអុកស៊ីសែន 980$cm^3$ ។

ក.ចូរសរសេរសមីការតាងប្រតិកម្ម ។

ខ.តើស័ង្កសីឆេះអស់ ឬទេ? ចូរបកស្រាយ ។

គ.គណនាម៉ាសនៃផលិតផលដែលទទួលបាន ។ (Zn = 65 , O = 16)

៩-ខ្យល់ 6720ml ត្រូវបានប្រើដើម្បីដុតសំណ ។ ក្រោយប្រតិកម្មចប់គេទទួលបានអង្គធាតុរឹងម្យ៉ាងដែលមានម៉ាស 13,38g ។

ក.សរសេរសមីការតាងប្រតិកម្ម ។

ខ.តើអុកស៊ីសែនប្រើអស់ ឬ ទេ? ចូរបកស្រាយ ។ បើប្រើមិនអស់ តើសល់ប៉ុន្មានក្រាម?

គ.គណនាម៉ាសសំណដែលត្រូវប្រើ ។ (Pb = 207 , O = 16)

១០-គេដុតទង់ដែង 2,56g ជាមួយអុកស៊ីសែននៃខ្យល់ ។ ក្រោយប្រតិកម្មចប់ គេទទួលបានអង្គធាតុរឹងចំនួន 2,6g ។

ក.សរសេរសមីការតាងប្រតិកម្ម ។

ខ.តើទង់ដែងឆេះអស់ ឬទេ? ចូរបកស្រាយ ។

គ.គណនាមាឌខ្យល់ដែលប្រើក្នុងប្រតិកម្មនេះ ។

ឃ.បើទង់ដែងឆេះមិនអស់ទេ ។ តើត្រូវប្រើខ្យល់ប៉ុន្មានលីតទៀតទើបធ្វើឱ្យទង់ដែងឆេះអស់? (Cu = 64 , O = 16)

១១-ចំហេះសព្វនៃស្ពាន់ធ័រ 32g ត្រូវការអុកស៊ីសែនចំនួន 32g ដើម្បីឱ្យផលជាស្ពាន់ធ័រឌីអុកស៊ីត 64g ។

ក.រកម៉ាសស្ពាន់ធ័រដែលត្រូវប្រើដើម្បីដុតឱ្យឆេះសព្វជាមួយអុកស៊ីសែន25g ។ រកម៉ាសស្ពាន់ធ័រឌីអុកស៊ីតកើតពីចំហេះនេះ ។

ខ.រកម៉ាសស្ពាន់ធ័រ និងម៉ាសអុកស៊ីសែន ដែលចូលរួមប្រតិកម្ម ដើម្បីទទួលបានស្ពាន់ធ័រឌីអុកស៊ីត 128g ។

១២-ចំហេះមិនសព្វនៃកាបូន ជាមួយអុកស៊ីសែននៃខ្យល់ គេទទួលបានឧស្ម័នកាបូនម៉ូណូអុកស៊ីតចំនួន 4,48$dm^3$ ។

ក.ចូរសរសេរសមីការតាងប្រតិកម្ម ។

ខ.គណនាម៉ាសកាបូនដែលប្រើ ។ បើគេដឹងថា ឧស្ម័នទទួលបាន 28g មានមាឌ 22,4L

គ.គណនាម៉ាស និងមាឌអុកស៊ីសែនដែលត្រូវប្រើ ។ $O_2$ = 32g មានមាឌ 22,4L

ឃ.គណនាមាឌខ្យល់ដែលត្រូវការក្នុងប្រតិកម្ម បើគេដឹងថានៅក្នុងខ្យល់មានអុកស៊ីសែន 20% គិតជាមាឌ ។

ង.គណនាម៉ាសខ្យល់ ។ ដោយខ្យល់ 1L មានម៉ាស 1,3g ។ (C = 12 , O = 16)

១៣-គេដុតសមាសធាតុកាបូនម្យ៉ាងចំនួន 10kg ដែលមានកាបូន 90% ឱ្យឆេះសព្វក្នុងមជ្ឈដ្ឋានបិទជិតមួយដែលមានខ្យល់ $50m^3$ ។

ក.រកមាឌអុកស៊ីសែនដែលមានក្នុងខ្យល់ខាងលើ គិតជា $m^3$ , L និងml ។

ខ.រកម៉ាសកាបូនដែលមានក្នុងសមាសធាតុនោះ ។

គ.រកមាឌអុកស៊ីសែនចាំបាច់ក្នុងចំហេះសព្វ ។ តើធ្យូងនេះឆេះអស់ ឬទេ? ដោយ $O_2$ = 32g មានមាឌ 22,4L

ឃ.រកមាឌកាបូនឌីអុកស៊ីតដែលកកើត ។ ដោយ $CO_2$ = 44g មានមាឌ 22,4L

១៤-មនុស្សពេញវ័យម្នាក់បញ្ចេញកាបូនឌីអុកស៊ីតពីក្នុងខ្លួន 480L ក្នុងមួយថ្ងៃ ។

ក.តើគេត្រូវយកកាបូនប៉ុន្មានក្រាមទៅដុត ដើម្បីទទួលបានបរិមាណកាបូនឌីអុកស៊ីតដូចខាងលើ?

ខ.តើគេត្រូវប្រើខ្យល់ប៉ុន្មានលីត្រក្នុងដំណុតកាបូននេះ?

## ចម្លើយ

១-កញ្ចក់ឡើងពណ៌ខ្មៅដោយម្រែងភ្លើង (កាបូនC)ដែលកើតពីចំហេះមិនសព្វនៃភ្លើងទៀន ។

២-សមីការទធ្វើអុកស៊ីសែនពី ទឹកអុកស៊ីសែនគឺ $2H_2O_2 \rightarrow O_2 + 2H_2O$

៣-ចំហេះ មានន័យថាមានអុកស៊ីសែនចូលរួម ។

៤-ភាពដូចគ្នារវាងចំហេះទៀន និងដង្ហើមគឺ ផ្តល់ជាឧស្ម័នកាបូនឌីអុកស៊ីត និងទឹក ។

៥-បំពេញចន្លោះ




រេដុករ-ចាប់យកអុកស៊ីសែន-អុកស៊ីតកម្ម ។

អុកស៊ីតករ-បោះបង់អុកស៊ីសែន-រេដុកម្ម ។

៦- ក.គណនាមាឌអុកស៊ីសែន (ជា L ឬ $cm^3$)




តាមសមីការ S = 32g ត្រូវការ $O_2$ =32g

$$S = 1,28g \text{ ត្រូវការ } O_2 = \frac{32 \times 1,28}{32} = 1,28g$$

ដោយ $O_2$ = 32g មានមាឌ 22,4L

$$O_2 = 1,28g \text{ មានមាឌ } \frac{22,4 \times 1,28}{32} = 0,896L$$ ឬ 896ml (ព្រោះ 1L = $1000cm^3$)

ខ.គណនាម៉ាសស្ពាន់ធ័រ S

$$\text{មាឌអុកស៊ីសែន } 89,6cm^3 = \frac{89,6}{1000} = 0,0896L$$

ដោយ $O_2$ = 22,4L មានម៉ាស 32g

$$O_2 = 0,0896L \text{ មានម៉ាស } \frac{32 \times 0,0896}{22,4} = 0,128g$$

តាមសមីការ $O_2$ = 32g ត្រូវការ S = 32g

$$O_2 = 0,128g \text{ ត្រូវការ } S = \frac{32 \times 0,128}{32} = 0,128g$$

៧-បញ្ជាក់ស្ពាន់ធ័រឆេះអស់ ឬអត់


សមីការ : $S + O_2 \rightarrow SO_2$

| | | |
|---|---|---|
| $S$ | $O_2$ | $SO_2$ |
| 32g | 32g | |
| 1g | $m_{O_2}$ ? | |

**រកម៉ាស $O_2$ ត្រូវប្រើ**

តាមសមីការ $S = 32g$ ត្រូវការ $O_2 = 32g$

$S = 1g$ ត្រូវការ $O_2 = \frac{32 \times 1}{32} = 1g$

**រកម៉ាស $O_2$ ក្នុងដប**

ដោយ $O_2 = 22,4L$ មានម៉ាស 32g

$O_2 = 1L$ មានម៉ាស $\frac{32 \times 1}{22,4} = 1,42g$

យើងបាន ម៉ាសអុកស៊ីសែនដែលមានក្នុងដប **ច្រើនជាង** ម៉ាសអុកស៊ីសែនដែលត្រូវការ នោះស្ពាន់ធ័រ S ឆេះអស់។

❋ *ធាតុ ឬសមាសធាតុណាមួយឆេះអស់ជាមួយអុកស៊ីសែន លុះត្រាតែ អុកស៊ីសែន $O_2$ ដែលមាន ច្រើនជាង ឬស្មើ អុកស៊ីសែនត្រូវការក្នុងសមីការ ។ តែបើអុកស៊ីសែនដែលមាន តិចជាង អុកស៊ីសែនដែលត្រូវការក្នុងសមីការ នោះធាតុ ឬសមាសធាតុឆេះមិនអស់ ។*

៨- ក.សរសេរសមីការតាងប្រតិកម្ម


$2Zn + O_2 \rightarrow 2ZnO$

| | | |
|---|---|---|
| 2Zn | $O_2$ | 2ZnO |
| 130g | 32g | 162g |
| 5,2g | $m_{O_2}$ ? | $m_{ZnO}$? |

ខ.បញ្ជាក់ស័ង្កសីឆេះអស់ ឬអត់

**រកម៉ាស $O_2$ ត្រូវប្រើ**

តាមសមីការ $Zn = 130g$ ត្រូវការ $O_2 = 32g$

$Zn = 5,2g$ ត្រូវការ $O_2 = \frac{32 \times 5,2}{130} = 1,28g$

**រកម៉ាស $O_2$ ដែលមាន**

គេមានអុកស៊ីសែន $980cm^3 = \frac{980}{1000} = 0,98L$

ដោយ $O_2 = 22,4L$ មានម៉ាស 32g

$O_2 = 0,98L$ មានម៉ាស $\frac{32 \times 0,98}{22,4} = 1,4g$

យើងបាន ម៉ាសអុកស៊ីសែនដែលមាន **ច្រើនជាង** ម៉ាសអុកស៊ីសែនដែលត្រូវការ នោះស័ង្កសី Zn ឆេះអស់។

គ.គណនាម៉ាស ZnO

តាមសមីការ $Zn = 130g$ ទទួលបាន $ZnO = 162g$

$Zn = 5,2g$ ទទួលបាន $ZnO = \frac{162 \times 5,2}{130} = 6,48g$

៩- ក.សរសេរសមីការតាងប្រតិកម្ម


$2Pb + O_2 \rightarrow 2PbO$

| | | |
|---|---|---|
| 2Pb | $O_2$ | 2PbO |
| 414g | 32g | 446g |
| $m_{Pb}$? | $m_{O_2}$ ? | 13,38g |

ខ.បញ្ជាក់អុកស៊ីសែនអស់ ឬសល់

**រកម៉ាស $O_2$ ត្រូវប្រើ**

តាមសមីការ PbO = 446g ត្រូវការ $O_2$ = 32g

PbO = 13,38g ត្រូវការ $O_2 = \frac{32\times 13,38}{446} = 0,96g$

**រកម៉ាស $O_2$ ដែលមាន**

តាមរូបមន្ត $V_{O_2} = \frac{1}{5}V_{ខ្យល់}$ , $V_{ខ្យល់} = 6720cm^3 = 6,72L$

នោះ $V_{O_2} = \frac{1}{5} \times 6,72 = 1,344L$

ដោយ $O_2$ = 22,4L មានម៉ាស 32g

$O_2$ = 1,344L មានម៉ាស $\frac{32\times 1,344}{22,4} = 1,92g$

យើងបាន ម៉ាសអុកស៊ីសែនដែលមាន **ច្រើនជាង** ម៉ាសអុកស៊ីសែនដែលត្រូវការ នោះអុកស៊ីសែននៅសល់

តាមទំនាក់ទំនង : $m_{O_2\ ដើម} = m_{O_2\ ត្រូវប្រើ} + m_{O_2\ សល់}$ នាំឱ្យ $m_{O_2\ សល់} = m_{O_2\ ដើម} - m_{O_2\ ត្រូវប្រើ}$

$m_{O_2\ សល់} = 1,92 - 0,96 = 0,96g$

គ.គណនាម៉ាសសំណដែលត្រូវប្រើ

តាមសមីការ PbO = 446g ត្រូវការ Pb = 414g

PbO = 13,38g ត្រូវការ Pb = $\frac{414\times 13,38}{446} = 12,42g$

១០- ក.សរសេរសមីការតាងប្រតិកម្ម



| | | | | |
|---|---|---|---|---|
| 2Cu | + | $O_2$ | → | 2CuO |
| 128g | | 32g | | 160g |
| $m_{Cu}$? | | $m_{O_2}$ | | 2,6g |

ខ.បញ្ជាក់ទង់ដែងឆេះអស់ ឬទេ

តាមសមីការ CuO = 160g ត្រូវការ Cu = 128g

CuO = 2,6g ត្រូវការ Cu = $\frac{128\times 2,6}{160} = 2,08g$

ដោយម៉ាសទង់ដែងដើម 2,56g ច្រើនជាងម៉ាសទង់ដែងចូលរួមប្រតិកម្ម 2,08g ដូចនេះទង់ដែងឆេះមិនអស់ទេ។

គ.គណនាមាឌខ្យល់ដែលប្រើ

តាមរូបមន្ត $V_{ខ្យល់} = 5V_{O_2}$

តាមសមីការ CuO = 160g ត្រូវការ $O_2$ = 32g

CuO = 2,6g ត្រូវការ $O_2 = \frac{32\times 2,6}{160} = 0,52g$

ដោយ $O_2$ = 32g មានមាឌ 22,4L

$O_2$ = 0,52g មានមាឌ $\frac{22,4\times 0,52}{32} = 0,364L$

យើងបាន $V_{ខ្យល់} = 5 \times 0,364 = 1,82L$

ឃ.គណនាមាឌខ្យល់ត្រូវបន្ថែម

Cu = 2,08g ត្រូវការខ្យល់ 1,82L

Cu = 2,56g ត្រូវការខ្យល់ $\frac{1,82\times 2,56}{2,08} = 2,24L$

នោះ $V_{ខ្យល់បន្ថែម} = 2,24 - 1,82 = 0,42L$

១១-សរសេរសមីការតាងប្រតិកម្ម



| | | | | |
|---|---|---|---|---|
| S | + | $O_2$ | $\rightarrow$ | $SO_2$ |
| 32g | | 32g | | 64g |
| $m_S$? | | 25g | | $m_{SO_2}$ ? |
| $m_S$? | | $m_{O_2}$ ? | | 128g |

ក.គណនាម៉ាស S និង ម៉ាស $SO_2$

តាមសមីការ $O_2 = 32g$ ត្រូវការ $S = 32g$

$O_2 = 25g$ ត្រូវការ $S = \frac{32 \times 25}{32} = 25g$

តាមសមីការ $S = 32g$ ទទួលបាន $SO_2 = 64g$

$S = 25g$ ទទួលបាន $SO_2 = \frac{64 \times 25}{32} = 50g$

ខ.គណនាម៉ាសS និងម៉ាស $O_2$

តាមសមីការ $SO_2 = 64g$ ត្រូវការ $S = 32g$

$SO_2 = 128g$ ត្រូវការ $S = \frac{32 \times 128}{64} = 64g$

តាមសមីការ $S = 32g$ ត្រូវការ $O_2 = 32g$

$S = 64g$ ត្រូវការ $O_2 = \frac{32 \times 64}{32} = 64g$

១២- ក.សរសេរសមីការតាងប្រតិកម្ម



| | | | | |
|---|---|---|---|---|
| 2C | + | $O_2$ | $\rightarrow$ | 2CO |
| 24g | | 32g | | 56g |
| $m_C$? | | $m_{O_2}$ | | 5,6g |

ខ.គណនាម៉ាសកាបូនដែលប្រើ

ឧស្ម័នកាបូនម៉ូណូអុកស៊ីត $CO = 4,48m^3 = 4,48L$

ដោយ $CO = 22,4L$ មានម៉ាស 28g

$CO = 4,48L$ មានម៉ាស $\frac{28 \times 4,48}{22,4} = 5,6g$

តាមសមីការ $CO = 56g$ ត្រូវការ $C = 24g$

$CO = 5,6g$ ត្រូវការ $C = \frac{24 \times 5,6}{56} = 2,8g$

គ.គណនាម៉ាស និងមាឌអុកស៊ីសែន

តាមសមីការ $CO = 56g$ ត្រូវការ $O_2 = 32g$

$CO = 5,6g$ ត្រូវការ $O_2 = \frac{32 \times 5,6}{56} = 3,2g$

ដោយ $O_2 = 32g$ មានមាឌ 22,4L

$O_2 = 3,2g$ មានមាឌ $\frac{22,4 \times 3,2}{32} = 2,24L$

ឃ.គណនាមាឌខ្យល់ដែលត្រូវប្រើ

តាមសម្មតិកម្ម $O_2 = 20L$ មានក្នុងខ្យល់ 100L

$O_2 = 2,24L$ មានក្នុងខ្យល់ $\frac{100 \times 2,24}{20} = 11,2L$

ង.គណនាម៉ាសខ្យល់

ខ្យល់ 1L មានម៉ាស 1,3g

ខ្យល់ 11,2L មានម៉ាស $\frac{1,3 \times 11,2}{1} = 14,56g$

១៣- ក.រកមាឌអុកស៊ីសែនដែលមានក្នុងខ្យល់

តាមរូបមន្ត $V_{O_2} = \frac{1}{5} V_{ខ្យល់}$ , $V_{ខ្យល់} = 50m^3$

$V_{O_2} = \frac{1}{5} \times 50 = 10m^3 = 10\,000L = 10\,000\,000ml$

ខ.គណនាម៉ាសកាបូនដែលមានក្នុងសមាសធាតុកាបូន

សមាសធាតុកាបូន 100kg មានកាបូន 90kg

សមាសធាតុកាបូន 10kg មានកាបូន $\frac{90 \times 100}{10} = 9kg = 9000g$

គ.គណនាមាឌអុកស៊ីសែនចាំបាច់ក្នុងចំហេះ




តាមសមីការ $C = 12g$ ចូលផ្សំជាមួយ $O_2 = 32g$

$C = 9000g$ ចូលផ្សំជាមួយ $O_2 = \frac{32 \times 9000}{12} = 24000g$

ដោយ $O_2 = 32g$ មានមាឌ 22,4L

$O_2 = 24000g$ មានមាឌ $\frac{22,4 \times 24000}{32} = 16800L$

នោះ មាឌអុកស៊ីសែនដែលចាំបាច់ក្នុងចំហេះ (16800L) ច្រើនជាងមាឌអុកស៊ីសែនដែលមានក្នុងខ្យល់ (10000L) ធ្យូងឆេះមិនអស់ទេ។

ឃ.គណនាមាឌកាបូនឌីអុកស៊ីត $CO_2$

ដោយ $O_2 = 22,4L$ មានម៉ាស 32g

$O_2 = 10000L$ មានម៉ាស $\frac{32 \times 10000}{22,4} = 14285,71g$

តាមសមីការ $O_2 = 32g$ ទទួលបាន $CO_2 = 44g$

$O_2 = 14285,71g$ ទទួលបាន $CO_2 = \frac{44 \times 14285,71}{32} = 19642,85g$

ដោយ $CO_2 = 44g$ មានមាឌ 22,4L

$CO_2 = 19642,85g$ មានមាឌ $\frac{22,4 \times 19642,85}{44} = 9999,99L \approx 10000L$

១៤- ក.គណនាម៉ាសកាបូន




ដោយ $CO_2 = 22,4L$ មានម៉ាស 44g

$CO_2 = 480L$ មានម៉ាស $\frac{44 \times 480}{22,4} = 942,85g$

តាមសមីការ $CO_2 = 44g$ ត្រូវការ $C = 12g$

$CO_2 = 942,85g$ ត្រូវការ $C = \frac{12 \times 942,85}{44} = 257,14g$

ខ.គណនាមាឌខ្យល់ត្រូវប្រើ

តាមរូបមន្ត $V_{ខ្យល់} = 5V_{O_2}$

តាមសមីការ $CO_2 = 44g$ ត្រូវការ $O_2 = 32g$

$CO_2 = 942,85g$ ត្រូវការ $O_2 = \frac{32 \times 942,85}{44} = 685,7g$

ដោយ $O_2 = 32g$ មានមាឌ 22,4L

$O_2 = 685,7g$ មានមាឌ $\frac{22,4 \times 685,7}{32} = 479,99L$

យើងបាន $V_{ខ្យល់} = 5 \times 479,99 = 2399,95L$

## មេរៀនទី៣ អ៊ីដ្រូសែន

### ១.អ៊ីដ្រូសែនក្នុងធម្មជាតិ

អ៊ីដ្រូសែនជាធាតុសំបូរក្នុងធម្មជាតិ តែគេពុំប្រទះវាជាភាពសេរីទេ ($H_2$) ។ ភាគច្រើននៃអ៊ីដ្រូសែនផ្សំជាមួយធាតុដទៃ បង្កើតជាអង្គធាតុសមាស ដូចជាទឹក សាច់ ឈើ អ៊ីដ្រូកាបួ (ប្រេងកាត សាំង ...) ។

អ៊ីដ្រូសែនស្ថិតក្នុងសណ្ឋានជាម៉ូលេគុលនៃអង្គធាតុទោលមានរូបមន្ត $H_2$ ។

### ២.ផលិតអ៊ីដ្រូសែន

ក.អំពើនៃលោហៈសកម្មលើទឹក

❈សម្គាល់ : លោហៈសកម្ម + ទឹក → បាស + អ៊ីដ្រូសែន

លោហៈសកម្មមានដូចជា : Li ; Na ; K ; Cs (ក្រុមIA) ; Ca ; Ba ; Sr (ក្រុមIIA) ។

ឧទាហរណ៍ :



$2Na + 2H_2O \rightarrow 2NaOH + H_2$



$Ca + 2H_2O \rightarrow Ca(OH)_2 + H_2$

❈បាសមានរូបមន្ត : លោហៈ+OH (ឈ្មោះនៃបាស : ឈ្មោះលោហៈ+អ៊ីដ្រុកស៊ីត)

ឧទាហរណ៍: - NaOH សូដ្យូមអ៊ីដ្រុកស៊ីត - $Ca(OH)_2$ កាល់ស្យូមអ៊ីដ្រុកស៊ីត

ខ.អំពើនៃលោហៈលើអាស៊ីតរាវ

❈សម្គាល់ : លោហៈ + អាស៊ីត → អំបិល + អ៊ីដ្រូសែន

គ្រប់លោហៈទាំងអស់មិនសុទ្ធតែមានប្រតិកម្មជាមួយអាស៊ីតទេ លោហៈដែលអាចមានប្រតិកម្ម ជាលោហៈដែលនៅខាងមុខអ៊ីដ្រូសែននៃស៊េរីសកម្មភាពគីមីនៃលោហៈ(ស៊េរីបេកេតូវ)*K, Na, Ca, Mg, Al, Mn, Zn, Fe, Sn, Pb* ***H*** *Cu, Hg, Ag, Pt, Au*

ឧទាហរណ៍ :



$Zn + H_2SO_4 \rightarrow ZnSO_4 + H_2$



$Mg + 2HCl \rightarrow MgCl_2 + H_2$



Cu + HCl → គ្មានប្រតិកម្ម

***❈ អំបិលមានរូបមន្ត : លោហៈ+រ៉ាឌីកាល់អាស៊ីត (ឈ្មោះនៃអំបិល : ឈ្មោះលោហៈ+ឈ្មោះរ៉ាឌីកាល់អាស៊ីត)***

ឧទាហរណ៍ : $ZnSO_4$ ស័ង្កសីស៊ុលផាត , $MgCl_2$ ម៉ាញ៉េស្យូមក្លរួ

គ.ក្នុងឧស្សាហកម្ម

-គេទទួលបានអ៊ីដ្រូសែនពីទឹក តាមអគ្គិសនីវិភាគទឹកក្នុងមជ្ឈដ្ឋានបាស (NaOH) ។ សមីការ $2H_2O \rightarrow 2H_2 + O_2$

-ពីប្រេងកាតឆៅ ឬពីឧស្ម័នមេតាន $CH_4$ ។

សមីការ : $CH_4 + H_2O \rightarrow CO + 3H_2$ ឬ $2CH_4 + O_2 \rightarrow 2\,CO + 4\,H_2$ ឬ $CH_4 \rightarrow C + 2\,H_2$

-ពីកាបូនម៉ូណូអុកស៊ីត និងកាបូន : $CO + H_2O \rightarrow CO_2 + H_2$ និង $C + H_2O \rightarrow CO + H_2$

ឃ.ដំណើរការផ្សេងទៀត

-កំណួតគ្មានខ្យល់នៃដែក ឬដែកថែប និង ដែក(II)អ៊ីដ្រុកស៊ីត ក្នុងទឹកមានអុកស៊ីសែនសេរី ប្រព្រឹត្តទៅសន្សឹមៗ ។

តាមសមីការ : $Fe + 2\,H_2O \rightarrow Fe(OH)_2 + H_2$ និង $3\,Fe(OH)_2 \rightarrow Fe_3O_4 + 2\,H_2O + H_2$

-ប្រតិកម្មរវាងសមាសធាតុអ៊ីដ្រួ ($LiH$ ; $NaH$ ; $CaH_2$) ជាមួយទឹក ។ សមីការ : $NaH + H_2O \rightarrow NaOH + H_2$

### លំហាត់

១-ក្នុងទីពិសោធគេទទួលបានអ៊ីដ្រូសែនដោយប្រតិកម្ម រវាងអាស៊ីតក្លរីឌ្រិច និងស័ង្កសី ។ គណនាមាឌអ៊ីដ្រូសែនដែលកកើត បើគេប្រើ

ក.ស័ង្កសី 6,5g

ខ.អាស៊ីតក្លរីឌ្រិច 3,65g ។ គេដឹងថា $H_2 = 2g$ មានមាឌ 22,4L ។ (Zn = 65 , H = 1 , Cl = 35,5)

២-គេបង់សូដ្យូម 4,6g ទៅក្នុងទឹក ។ គណនាម៉ាសអ៊ីដ្រូសែន និងម៉ាសសូដកាត់ ដែលទទួលបានក្រោយប្រតិកម្ម ។ គេឱ្យ Na = 23

៣-គេចាក់អាស៊ីតស៊ុលផួរិចសុទ្ធចំនួន 4,9g ទៅលើស័ង្កសី ។

ក.សរសេរសមីការតាងប្រតិកម្ម ។

ខ.គណនាម៉ាសអ៊ីដ្រូសែនភាយឡើង និងម៉ាសអំបិលកកើត ។

គ.គណនាម៉ាសស័ង្កសីដែលមាននៅក្នុងអំបិលទទួលបានខាងលើ ។ (Zn = 65 , S = 32 , H = 1 , O = 16)

៤-គេបង់កាល់ស្យូមទៅក្នុងទឹក ក្រោយប្រតិកម្មចប់គេទទួលបានឧស្ម័នអ៊ីដ្រូសែនចំនួន 1792ml ។

ក.សរសេរសមីការតាងប្រតិកម្ម ។

ខ.គណនាម៉ាសកាល់ស្យូមដែលត្រូវប្រើ ។

គ.គណនាម៉ាសកាល់ស្យូមអ៊ីដ្រុកស៊ីតដែលទទួលបាន ។ (Ca = 40 , H = 1 , O = 16)

៥-គេចាក់អាស៊ីតនីទ្រិច $HNO_3$ សុទ្ធចំនួន 25,2g ទៅលើអាលុយមីញ៉ូម 5,4g ។

ក.សរសេរសមីការតាងប្រតិកម្ម ។

ខ.គណនាម៉ាសអាលុយមីញ៉ូមដែលនៅសល់ ។

គ.គណនាម៉ាស និងមាឌអ៊ីដ្រូសែនដែលទទួលបាន ។ $H_2$ = 2g មានមាឌ 22,4L

ឃ.គណនាម៉ាសអំបិលដែលកកើត ។ (Al = 27 , N = 14 , O = 16 , H = 1)

**<u>ចម្លើយ</u>**

១-គណនាមាឌអ៊ីដ្រូសែន $H_2$ ដែលកកើត

សមីការតាងប្រតិកម្ម



$$Zn + 2HCl \rightarrow ZnCl_2 + H_2$$

| Zn | 2HCl | $ZnCl_2$ | $H_2$ |
|---|---|---|---|
| 65g | 73g | | 2g |
| 6,5g | | | $m_{H_2}$ ? |
| | 3,65g | | $m_{H_2}$ ? |

ក.ករណី Zn = 6,5g

តាមសមីការ Zn = 65g ទទួលបាន $H_2$ = 2g

Zn = 6,5g ទទួលបាន $H_2 = \frac{2\times 6,5}{65} = 0,2g$

ដោយ $H_2$ = 2g មានមាឌ 22,4L

$H_2$ = 0,2g មានមាឌ $\frac{22,4\times 0,2}{2} = 2,24L$

ខ.ករណី HCl = 3,65g

តាមសមីការ HCl = 73g ទទួលបាន $H_2$ = 2g

HCl = 3,65g ទទួលបាន $H_2 = \frac{2\times 3,65}{73} = 0,1g$

ដោយ $H_2$ = 2g មានមាឌ 22,4L

$H_2$ = 0,1g មានមាឌ $\frac{22,4\times 0,1}{2} = 1,12L$

២-គណនាម៉ាសអ៊ីដ្រូសែន $H_2$ និងមាឌស៊ូតកាត់ NaOH

សមីការ



$$2Na + 2H_2O \rightarrow 2NaOH + H_2$$

| 2Na | $2H_2O$ | 2NaOH | $H_2$ |
|---|---|---|---|
| 46g | | 80g | 2g |
| 4,6g | | $m_{NaOH}$? | $m_{H_2}$ ? |

តាមសមីការ Na = 46g ទទួលបាន $H_2$ = 2g

Na = 4,6g ទទួលបាន $H_2 = \frac{2\times 4,6}{46} = 0,2g$

តាមសមីការ $Na = 46g$ ទទួលបាន $NaOH = 80g$

$Na = 4{,}6g$ ទទួលបាន $NaOH = \frac{80 \times 4{,}6}{46} = 8g$

៣- ក.សរសេរសមីការតាងប្រតិកម្ម



| | | | | | | |
|---|---|---|---|---|---|---|
| Zn | + | $H_2SO_4$ | $\rightarrow$ | $ZnSO_4$ | + | $H_2$ |
| | | 98g | | 161g | | 2g |
| | | 4,9g | | $m_{ZnSO_4}$? | | $m_{H_2}$? |

ខ.ណណនាម៉ាសអ៊ីដ្រូសែន $H_2$ និងម៉ាសអំបិល $ZnSO_4$

តាមសមីកាតរ $H_2SO_4 = 98g$ ទទួលបាន $H_2 = 2g$

$H_2SO_4 = 4{,}9g$ ទទួលបាន $H_2 = \frac{2 \times 4{,}9}{98} = 0{,}1g$

តាមសមីការ $H_2SO_4 = 98g$ ទទួលបាន $ZnSO_4 = 161g$

$H_2SO_4 = 4{,}9g$ ទទួលបាន $ZnSO_4 = \frac{161 \times 4{,}9}{98} = 8{,}05g$

គ.គណនាម៉ាសស័ង្កសី (Zn) មានក្នុង ($ZnSO_4$)

ក្នុង $ZnSO_4 = 161g$ មាន $Zn = 65g$

ក្នុង $ZnSO_4 = 8{,}05g$ មាន $Zn = \frac{65 \times 8{,}05}{161} = 3{,}25g$

៤- ក.សរសេរសមីការតាងប្រតិកម្ម



| | | | | | | |
|---|---|---|---|---|---|---|
| Ca | + | $2H_2O$ | $\rightarrow$ | $Ca(OH)_2$ | + | $H_2$ |
| 40g | | | | 74g | | 2g |
| $m_{Ca}$? | | | | $m_{Ca(OH)_2}$? | | 0,16g |

ខ.គណនាម៉ាសកាល់ស្យូម Ca

ដោយ $H_2 = 1792ml = 1{,}792L$

នោះ $H_2 = 22{,}4L$ មានម៉ាស 2g

$H_2 = 1{,}792L$ មានម៉ាស $\frac{2 \times 1{,}792}{22{,}4} = 0{,}16g$

តាមសមីការ $H_2 = 2g$ ត្រូវការ $Ca = 40g$

$H_2 = 0{,}16g$ ត្រូវការ $Ca = \frac{40 \times 0{,}16}{2} = 3{,}2g$

គ.គណនាម៉ាសកាល់ស្យូមអ៊ីដ្រុកស៊ីត $Ca(OH)_2$

តាមសមីការ $H_2 = 2g$ ត្រូវការ $Ca(OH)_2 = 74g$

$H_2 = 0{,}16g$ ត្រូវការ $Ca(OH)_2 = \frac{74 \times 0{,}16}{2} = 5{,}92g$

៥- ក.សរសេរសមីការតាងប្រតិកម្ម



| | | | | | | |
|---|---|---|---|---|---|---|
| 2Al | + | $6HNO_3$ | $\rightarrow$ | $2Al(NO_3)_3$ | + | $3H_2$ |
| 54g | | 378g | | 426g | | 6g |
| $m_{Al}$? | | 25,2g | | $m_{Al(NO_3)_3}$? | | $m_{H_2}$? |

ខ.គណនាម៉ាស Al សល់

តាមសមីការ $HNO_3 = 378g$ ត្រូវការ $Al = 54g$

$HNO_3 = 25{,}5g$ ត្រូវការ $Al = \frac{54 \times 25{,}2}{378} = 3{,}6g$

យើងបាន ម៉ាស Al សល់ = ម៉ាស Al ដើម-ម៉ាស Al ប្រើ = 5,4 – 3,6 = 1,8g

***ដោះស្រាយខ្លួនឯង :*** គ. $m_{H_2} = 0{,}4g$ , $V_{H_2} = 4{,}48L$ ឃ. $m_{Al(NO_3)_3} = 28{,}4g$

## មេរៀនទី៤ លក្ខណៈ និងអនុវត្តន៍អ៊ីដ្រូសែន

### ១.លក្ខខណៈរូប

ជាឧស្ម័នគ្មានពណ៌ គ្មានក្លិន រលាយក្នុងទឹកតិចជាងអុកស៊ីសែន ស្រាលជាងឧស្ម័នផ្សេងទៀត (ស្រាលជាងខ្យល់ 14,5ដង) ។

### ២.លក្ខណៈគីមី

ក.អ៊ីដ្រូសែនជាឧស្ម័នឆេះ : វាអាចឆេះជាមួយអុកស៊ីសែនកាលណា ឧស្ម័នទាំងពីរនេះជួបគ្នានៅកន្លែងឆេះ ដោយប៉ះនឹងអណ្តាតភ្លើង។



តាមសមីការ : $2H_2 + O_2 \rightarrow 2H_2O$ + កម្តៅ

បើគេលាយល្បាយអ៊ីដ្រូសែនជាមួយអុកស៊ីសែន ($H_2$ = 2 មាឌ និង $O_2$ = 1 មាឌ) ពេលប៉ះនឹងអណ្តាតភ្លើង ប្រតិកម្មនឹងកើតមានយ៉ាងរហ័សបំផុត (ផ្ទុះ) ។

ខ.អំពើរបស់អ៊ីដ្រូសែនជាមួយអុកស៊ីតលោហៈ

ឧស្ម័នអ៊ីដ្រូសែន $H_2$ មានប្រតិកម្មជាមួយអុកស៊ីតលោហៈជាច្រើន (លោហៈផ្សំជាមួយអុកស៊ីសែន) ដូចជា $CuO$ ; $PbO$ ; $Fe_2O_3$ ; $HgO$ ; $ZnO$ ; $SnO_2$ ; $CdO$ ; $MgO$ ; $ZrO_2$ ; $HfO_2$ ; $La_2O_3$ ; $Y_2O_3$ ; $TiO_2$ ; $Al_2O_3$ ;... លើកលែងអុកស៊ីតនៃលោហៈសកម្មខ្លាំងដូចជា Li ; Na ; K ; Ca ; ... ។



សម្គាល់ : អុកស៊ីតលោហៈ + $H_2$ → លោហៈ + ទឹក



ឧទាហរណ៍ : $PbO + H_2 \rightarrow Pb + H_2O$

គ.អំពើរបស់អ៊ីដ្រូសែនជាមួយលោហៈសកម្ម (Li ; Na ; Ca)



ឧទាហរណ៍ : $H_2 + 2Na \rightarrow 2NaH$ សូដ្យូមអ៊ីដ្រួ $H_2 + Ca \rightarrow CaH_2$ កាល់ស្យូមអ៊ីដ្រួ

ឃ.អំពើរបស់អ៊ីដ្រូសែនជាមួយអលោហៈសកម្ម ($F_2$ ; $Cl_2$)



ឧទាហរណ៍ : $H_2 + F_2 \rightarrow 2HF$ ឧស្ម័នអ៊ីដ្រូសែនភ្លុយអរួ $H_2 + Cl_2 \rightarrow 2HCl$ ឧស្ម័នអ៊ីដ្រូសែនក្លរួ

### ៣.អនុវត្តន៍

ក.វិស័យកសិកម្ម : អ៊ីដ្រូសែនជាវត្ថុធាតុដើមក្នុងទធ្វើជីសម្រាប់ដំណាំ។ វាជាវត្ថុធាតុដើមក្នុងផលិតកម្មអាម៉ូញ៉ាក់។



តាមសមីការ : អ៊ីដ្រូសែន + អាសូត → អាម៉ូញ៉ាក់

$$3H_2 + N_2 \rightarrow 2NH_3$$

ខ.វិស័យឧស្សាហកម្ម

-ជាឥន្ទនៈប្រើក្នុងកាំជ្រួច យន្តហោះ និងក្នុងចំពុះផ្សាអុកស៊ី-អ៊ីដ្រូសែន។

-ធ្វើយោបកលោហៈ (ដកលោហៈចេញពីអុកស៊ីតរបស់វា) ដោយរេដុកម្មអុកស៊ីតលោហៈ ។

## សំណួរ និងលំហាត់

១-ចូរបំពេញចន្លោះខាងក្រោឱ្យបានត្រឹមត្រូវ :

ក.ដើម្បីផលិតអ៊ីដ្រូសែន គេត្រូវដាក់ស័ង្កសីឱ្យធ្វើប្រតិកម្មលើ.......................... ។

ខ.អ៊ីដ្រូសែនឆេះក្នុងខ្យល់ឱ្យ ....................ប្រតិកម្មនេះបំភាយ ............................យ៉ាងខ្លាំង។ ធាតុឆេះគឺ.........ធាតុទ្រទ្រង់ចំហេះគឺ .................. ។

គ.ចូរសរសេរសមីការតាងប្រតិកម្មទាំងពីរខាងលើ ។ តើប្រតិកម្មក្នុងសំណួរ "ខ" មានគ្រោះថ្នាក់ដល់បរិស្ថាបដែរ ឬទេ?

២-គេធ្វើពិសោធខាងក្រោម

ក.ដាក់ដែកឱ្យធ្វើប្រតិកម្មលើអាស៊ីតក្លរីឌ្រិច។

ខ.ដាំទឹករហូតដល់ពុះ ។

គ.ដុតអ៊ីដ្រូសែនក្នុងខ្យល់ ។

a-តើប្រតិកម្មគីមីកើតឡើងក្នុងពិសោធណាខ្លះ? ហើយផលនៃប្រតិកម្មមានអ្វីខ្លះ?

b-តើប្រតិកម្មណាមួយជាចំហេះ?

c-តើបម្លាស់ប្តូរភាពរូប កើតឡើងក្នុងពិសោធណា?

៣-គេឱ្យអ៊ីដ្រូសែនឆ្លងកាត់ទង់ដែងអុកស៊ីតកំពុងដុតកម្តៅចំនួន 12,5g គេទទួលបានអង្គធាតុរឹង និងទឹក ។

ក.សរសេរសមីការតាងប្រតិកម្ម ។

ខ.គណនាមាឌអ៊ីដ្រូសែនចាំបាច់សម្រាប់ធ្វើប្រតិកម្ម ។

គ.គណនាម៉ាសអង្គធាតុរឹងដែលកកើតក្រោយប្រតិកម្ម ។ បើគេដឹងថា $H_2$ = 2g មានមាឌ 22,4L ។ (Cu = 64 , O = 16)

៤-ក.បើគេដាក់បំណែកកាល់ស្យូមទៅក្នុងទឹក តើអ្នកសង្កេតឃើញមានអ្វីភាយឡើង?

ខ.ចូរសរសេរសមីការតាងប្រតិកម្ម និងប្រាប់ឈ្មោះអង្គធាតុកើតក្រោយប្រតិកម្ម ។

គ.គណនាមាឌឧស្ម័នដែលកកើត បើគេប្រើកាល់ស្យូម 0,1g ឱ្យធ្វើប្រតិកម្មជាមួយទឹក ។ (Ca = 40 , $H_2$ =2g មានមាឌ22,4L)

៥-ក.សរសេរសមីការតាងប្រតិកម្មចំហេះអ៊ីដ្រូសែនជាមួយអុកស៊ីសែន ។

ខ.គណនាមាឌអ៊ីដ្រូសែនចាំបាច់សម្រាប់ចំហេះសព្វអុកស៊ីសែន 48g 28g និង 16g ។

៦-គេឱ្យអាស៊ីតក្លរីឌ្រិចមានអំពើលើស័ង្កសី គេទទួលបានឧស្ម័នអ៊ីដ្រូសែន 5g ។ គណនាម៉ាសអាស៊ីតដែលចូលរួមប្រតិកម្ម ។ (H = 1 , Cl = 35,5 , Zn = 65)

៧-គេដាក់សូដ្យូម 0,69g ទៅក្នុងទឹក ។

ក.គណនាម៉ាសបាស និងម៉ាសអ៊ីដ្រូសែនដែលកកើត ។

ខ.គេយកអ៊ីដ្រូសែនដែលទទួលបានទាំងអស់ខាងលើ ដាក់ឱ្យមានប្រតិកម្មជាមួយទង់ដែង II អុកស៊ីតកំពុងដុតកម្តៅ ។

a-ចូរសរសេរសមីការតាងប្រតិកម្ម ។

b-គណនាម៉ាសអុកស៊ីតលោហៈត្រូវប្រើ និងម៉ាសលោហៈដែលកកើត ។ (Cu = 64 , Na = 23)

៨-គេដាក់ម្សៅលោហៈវ៉ាឡង់ II ចំនួន16,8g ទៅក្នុងអាស៊ីតក្លរីឌ្រិចសុទ្ធ 21,9g ។

ក.ចូរសរសេរសមីការតាងប្រតិកម្ម

ខ.ហៅឈ្មោះ និងឱ្យនិមិត្តសញ្ញានៃលោហៈវ៉ាឡង់IIនោះ ។

គ.គណនាមាឌឧស្ម័នអ៊ីដ្រូសែនកកើត ។ ដោយដឹងថា អ៊ីដ្រូសែន 2g មានមាឌ 22,4L ។ (Cl = 35,5 , H = 1)

៩-គេបង់លោហៈវ៉ាឡង់ I ចំនួន1,95g ទៅក្នុងទឹក ក្រោយប្រតិកម្មចប់គេទទួលបានឧស្ម័នអ៊ីដ្រូសែន 560ml ។

ក.សរសេរសមីការតាងប្រតិកម្ម

ខ.ហៅឈ្មោះ និងឱ្យនិមិត្តសញ្ញាលោហៈវ៉ាឡង់ I ។ គេដឹងថា $H_2$ = 2g មានមាឌ 22,4L

គ.គណនាម៉ាសនៃបាសទទួលបាន ។

១០-គេដាក់លោហៈវ៉ាឡង់ I ចំនួន 3,68g ឱ្យមានប្រតិកម្មជាមួយអាស៊ីតស៊ុលផួរិច ។ ក្រោយប្រតិកម្មគេទទួលបានអំបិលម្យ៉ាង មានម៉ាស 11,36g និង អ៊ីដ្រូសែន ។ កំណត់ឈ្មោះលោហៈវ៉ាឡង់ I នោះ ។

## **ចម្លើយ**

១-បំពេញចន្លោះ

ក. អាស៊ីត ខ.ចំហាយទឹក-កម្តៅ ។ អ៊ីដ្រូសែន-អុកស៊ីសែន

គ.សមីការ $Zn + H_2SO_4 \rightarrow ZnSO_4 + H_2$

$2H_2 + O_2 \rightarrow 2H_2O$ : ប្រតិកម្មនេះមិនគ្រោះថ្នាក់ដល់បរិស្ថានទេ ព្រោះអង្គធាតុកកើតជាទឹក $H_2O$ មិនពុល ។

២-a. ប្រតិកម្មគីមីកើតមានក្នុងសមីការ "ក និង គ" ។ ផលនៃប្រតិកម្មគឺ ដែក IIក្លរួ ($FeCl_2$) ឧស្ម័នអ៊ីដ្រូសែន ($H_2$) និងចំហាយទឹក ។

b. ប្រតិកម្មក្នុងករណី "គ" ជាប្រតិកម្មចំហេះ ។

c. បម្លាស់ប្តូរភាពរូបកើតមានក្នុងករណី "ខ" ។

៣-ក. សរសេរសមីការតាងប្រតិកម្ម




ខ. គណនាមាឌអ៊ីដ្រូសែន $H_2$

តាមសមីការ CuO = 80g ត្រូវការ $H_2$ = 2g

CuO = 12,5g ត្រូវការ $H_2 = \frac{2 \times 12,5}{80} = 0,31g$

ដោយ $H_2$ = 2g មានមាឌ 22,4L

$H_2$ = 0,31g មានមាឌ $\frac{22,4 \times 0,31}{2} = 3,47g$

គ. គណនាម៉ាសអង្គធាតុរឹងដែលកកើត

តាមសមីការ CuO = 80g ត្រូវការ Cu = 64g

CuO = 12,5g ត្រូវការ Cu = $\frac{64 \times 12,5}{80} = 10g$

៤-ក. បើគេដាក់កាល់ស្យូមចូលក្នុងទឹកគេសង្កេតឃើញ កាល់ស្យូមរលាយ និងមានបំភាយឧស្ម័ន ។

ខ. សមីការតាងប្រតិកម្ម




អង្គធាតុដែលកកើត មាន កាល់ស្យូមអ៊ីដ្រុកស៊ីត $Ca(OH)_2$ និងឧស្ម័នអ៊ីដ្រូសែន $H_2$

គ. គណនាមាឌឧស្ម័នអ៊ីដ្រូសែន $H_2$

តាមសមីការ Ca = 40g ទទួលបាន $H_2$ = 2g

Ca = 0,1g ទទួលបាន $H_2 = \frac{2 \times 0,1}{40} = 0,005g$

ដោយ $H_2$ = 2g មានមាឌ 22,4L

$H_2$ = 0,005g មានមាឌ $\frac{22,4 \times 0,005}{2} = 0,056L$

៥-ក. សមីការតាងប្រតិកម្ម




ខ. ករណី $O_2$ = 48g

តាមសមីការ $O_2$ = 32g ត្រូវការ $H_2$ = 4g

$O_2$ = 48g ត្រូវការ $H_2 = \frac{4 \times 48}{32} = 6g$

ដោយ $H_2$ = 2g មានមាឌ 22,4L

$H_2$ = 6g មានមាឌ $\frac{22,4 \times 6}{2} = 67,2L$ ***ចំ. :*** *$O_2$ = 28g នាំឲ្យ* $V_{H_2} = 39,2L$ , *$O_2$ = 16g នាំឲ្យ* $V_{H_2} = 22,4L$

៦-គណនាម៉ាស HClចូលរួមប្រតិកម្ម



សមីការ $2HCl + Zn \rightarrow ZnCl_2 + H_2$

| | | | | | |
|---|---|---|---|---|---|
| | 73g | | | | 2g |
| | $m_{HCl}$? | | | | 5g |

តាមសមីការ $H_2 = 2g$ ត្រូវការ HCl = 73g

$H_2 = 5g$ ត្រូវការ $HCl = \frac{73\times 5}{2} = 182{,}5g$

៧-សមីការតាងប្រតិកម្ម



$2Na + 2H_2O \rightarrow 2NaOH + H_2$

| | | | |
|---|---|---|---|
| 46g | | 80g | 2g |
| 0,69g | | $m_{NaOH}$? | $m_{H_2}$ ? |

ក.គណនាម៉ាសបាស NaOH និងម៉ាសអ៊ីដ្រូសែន $H_2$

តាមសមីការ Na = 46g ទទួលបាន NaOH = 80g

Na = 0,69 ទទួលបាន $NaOH = \frac{80\times 0{,}69}{46} = 1{,}2g$

តាមសមីការ Na = 46g ទទួលបាន $H_2 = 2g$

Na = 0,69 ទទួលបាន $H_2 = \frac{2\times 0{,}69}{46} = 0{,}03g$

ខ.a.សរសេរសមីការ



$CuO + H_2 \rightarrow Cu + H_2O$

| | | | |
|---|---|---|---|
| 80g | 2g | 64g | |
| $m_{CuO}$? | 0,03g | $m_{Cu}$ ? | |

b.គណនាម៉ាសអុកស៊ីតលោហៈ CuO និង លោហៈ Cu

តាមសមីការ $H_2 = 2g$ ត្រូវការ CuO = 80g

$H_2 = 0{,}03g$ ត្រូវការ $CuO = \frac{80\times 0{,}03}{2} = 1{,}2g$

តាមសមីការ CuO = 80g ទទួលបាន Cu = 64g

CuO = 1,2g ទទួលបាន $Cu = \frac{64\times 1{,}2}{80} = 0{,}96g$

❋ ***ចំណាំ : ដើម្បីស្គាល់ឈ្មោះ ឬនិមិត្តសញ្ញានៃធាតុណាមួយ យើងត្រូវស្គាល់ម៉ាសអាតូមរបស់វា*** *(ឬលេខអាតូម ឬ ចំនួនប្រូតុង ថ្នាក់ទី១០)* ។

៨- តាង A ជាលោហៈវ៉ាឡង់ II មាន $M_A$ ជាម៉ាសអាតូម

ក.សរសេរសមីការតាងប្រតិកម្ម



$A + 2HCl \rightarrow ACl_2 + H_2$

| | | | |
|---|---|---|---|
| $M_A$? | 73g | | 2g |
| 16,8g | 21,9g | | $m_{H_2}$ ? |

ខ.ហៅឈ្មោះ និងឱ្យនិមិត្តសញ្ញាលោហៈ

តាមសមីការ HCl = 73g ត្រូវការ $A = M_A$

HCl = 21,9g ត្រូវការ A = 16,8g

តាមសមាមាត្រ $\frac{73}{21{,}9} = \frac{M_A}{16{,}8}$ ឬ $M_A = \frac{73\times 16{,}8}{21{,}9} = 56$

ដោយ ម៉ាសអាតូមនៃ A = 56 គឺ "លោហៈដែក" មាននិមិត្តសញ្ញា "Fe"

គ.គណនាមាឌ $H_2$

តាមសមីការ $HCl = 73g$ ឱ្យផលជា $H_2 = 2g$

$HCl = 21,9g$ ឱ្យផលជា $H_2 = \frac{2 \times 21,9}{73} = 0,6g$

ដោយ $H_2 = 2g$ មានមាឌ $22,4L$

$H_2 = 0,6g$ មានមាឌ $\frac{22,4 \times 0,6}{2} = 6,72L$

៩- តាង A ជាលោហៈក្រុមទី I មាន $M_A$ ជាម៉ាសអាតូម

ក.សរសេរសមីការតាងប្រតិកម្ម



| | | | | |
|---|---|---|---|---|
| $2A$ | + | $2H_2O \rightarrow$ | $2AOH$ + | $H_2$ |
| $2M_A$ | | | $112g$ | $2g$ |
| $1,95g$ | | | $m_{AOH}?$ | $0,05g$ |

ខ.ហៅឈ្មោះ និងឱ្យនិមិត្តសញ្ញាលោហៈ

ដោយ $H_2 = 22,4L$ មានម៉ាស $2g$

$H_2 = 560ml = 0,56L$ មានម៉ាស $\frac{2 \times 0,56}{22,4} = 0,05g$

តាមសមីការ $H_2 = 2g$ ត្រូវការ $A = 2M_A$

$H_2 = 0,05g$ ត្រូវការ $A = 1,95g$

តាមសមាមាត្រ $\frac{2}{0,05} = \frac{2M_A}{1,95}$ នោះ $M_A = \frac{2 \times 1,95}{0,05 \times 2} = 39$

ដោយ ម៉ាសអាតូមនៃ A = 39 គឺ "លោហៈប៉ូតាស្យូម" មាននិមិត្តសញ្ញា "K"

គ.គណនាម៉ាសនៃបាស AOH ឬ KOH

តាមសមីការ $H_2 = 2g$ ត្រូវនឹង $AOH = 112g$

$H_2 = 0,05g$ ត្រូវនឹង $AOH = \frac{112 \times 0,05}{2} = 2,8g$

១០-កំណត់ឈ្មោះលោហៈក្រុមទី I

តាង X ជាលោហៈក្រុមទី I មាន $M_X$ ជាម៉ាសអាតូម

សមីការតាងប្រតិកម្ម



| | | | | |
|---|---|---|---|---|
| $2X$ | + | $H_2SO_4 \rightarrow$ | $X_2SO_4$ | + $H_2$ |
| $2M_X$ | | | $2M_X + 96$ | |
| $3,68g$ | | | $11,36g$ | |

តាមសមីការ $X = 2M_X$ ទទួលបាន $X_2SO_4 = 2M_X + 96$

$X = 3,68g$ ទទួលបាន $X_2SO_4 = 11,36g$

យើងបានសមាមាត្រ $\frac{2M_X}{3,68} = \frac{2M_X + 96}{11,36}$

ឬ $11,36 \times 2M_X = 3,68 \times (2M_X + 96)$

$22,72M_X = 7,36M_X + 353,28$

$22,72M_X - 7,36M_X = 353,28$

$15,36M_X = 353,28$

នោះ $M_X = \frac{353,28}{15,36} = 23$

ដោយលោហៈ X មានម៉ាសអាតូម 23 ជាលោហៈសូដ្យូម "Na"

## ជំពូក២ ទឹក និង សូលុយស្យុង

### មេរៀនទី១ ទឹក

**១.ទឹក និងភាវៈរស់**

ទឹកមានរូបមន្តគីមី $H_2O$ ។ វាជាអង្គធាតុដែលមានសារៈសំខាន់ ហើយសំបូរជាងគេនៅលើផែនដី និង ក្នុងភាវៈមានជីវិត។ ទឹកគ្របដណ្តប់ប្រហែល 70% នៃផ្ទៃដី និងក្នុងខ្លួនមនុស្សមានទឹក 65% ។

**២.វដ្តនៃទឹក**

ទឹកដែលយើងបញ្ចេញពីគេហដ្ឋាននោះ មិនបានបាត់បង់ទេ។ វាហូរតាម លូ ប្រឡាយ ចាក់ទៅក្នុងទន្លេ សមុទ្រ ហើយហួតជាចំហាយទឹក វិលវល់ក្នុងបរិយាកាស។ ទឹកសាបភាគច្រើនបានមកពីរំហួតទឹកសមុទ្រ។ ចំហាយទឹកក្លាយជាភ្លៀង ហើយហូរចាក់ទៅក្នុងស្ទឹង ទន្លេ សមុទ្រ ... និង ត្រូវប្រើប្រាស់ជាថ្មី។

**៣.ទឹកស្អាត**

ជាតម្រូវការសម្រាប់ប្រើប្រាស់ក្នុងគេហដ្ឋាន និងឧស្សាហកម្ម។ គេបានទឹកស្អាត បន្ទាប់ពីគេធ្វើប្រព្រឹត្តកម្មទឹក គឺយកទឹកធម្មជាតិទៅច្រោះយកកករចេញ ដោយប្រើសាច់ជូរ ($Al_2(SO_4)_3$) និង កំបោរងាប់ ($Ca(OH)_2$) ហើយធ្វើឱ្យទឹកអស់កករ ដោយប្រើអាងច្រោះដែលមានស្រទាប់ជា ថ្មធំៗ ថ្មតូចៗ និងខ្សាច់។ បន្ទាប់មកគេសម្លាប់មេរោគដោយប្រើក្លរ (អាចជា ទឹកសាវ៉ែល $NaCl.NaClO.H_2O$ ឬ ក្នុងទម្រង់ជាឧស្ម័ន $Cl_2$) ។ ពេលមេរោគត្រូវបានសម្លាប់ហើយ គេទទួលបានទឹកស្អាតគ្មានមេរោគ ហើយអ្នកវិភាគក្នុងទីពិសោធបានយកទឹកនោះទៅវិភាគ ដើម្បីបញ្ជាក់ឱ្យច្បាស់ថាទឹកពិតជាគ្មានមេរោគ និងសាធាតុគីមីពុលប្រាកដមែន។ ម្យ៉ាងវិញទៀតគេអាចបង់ធាតុមានប្រយោជន៍ផ្សេងទៀតចូលក្នុងទឹកនោះ ដើម្បីជួយដល់សុខភាពមនុស្ស ដូចជា ភ្លុយអរ (F) ជាដើម ដែលវាអាចការពារធ្មេញកុំឱ្យពុក។ $NaClO$ : សូដ្យូមអ៊ីប៉ូក្លរីត

**៤.កខ្វក់ទឹក**

ទឹកកង្វក់ជាទឹកដែលសល់ពីបម្រើបម្រាស់តាមផ្ទះ និងរោងចក្រ (ទឹកសម្អុយមានផ្ទុកមេរោគ និងជាតិពុលគីមី)។ វាធ្វើឱ្យរុក្ខជាតិរលួយ និងសត្វដែលរស់នៅក្នុងទឹកងាប់ ។

**៥.តំហែទាំទឹក**

-ត្រូវសម្អាតទឹកសម្អុយសិនមុននឹងបញ្ចេញវាចោលទៅក្នុងទន្លេ ឬសមុទ្រ។

-ត្រូវមានច្បាប់តឹងរឹងចំពោះប្រជាពលរដ្ឋណាដែលបោះចោលសម្រាមនៅទីសាធារណៈ ឬ ក្នុងទន្លេ ព្រោះសកម្មភាពនេះបណ្តាកឱ្យទឹកកខ្វក់។

### សំណួរ និង លំហាត់

១-ដើម្បីសម្អាតទឹក គេប្រើសមាសធាតុក្លរ។ តើវាមាននាទីជាអ្វី? បើគេពុំបានដាក់វាទៅក្នុងទឹក តើមានអ្វីកើតឡើង?

២-ចូរសរសេរ និងថ្លឹងសមីការគីមីតាងប្រតិកម្មរវាងអង្គធាតុខាងក្រោម :

ក.ម៉ាញ៉េស្យូម និងអាស៊ីតស៊ុលផួរិច (រាវ) ខ. ប៉ូតាស្យូម និងទឹក

៣-តើគេអាចប្រើសារធាតុណាខ្លះ ដើម្បីធ្វើឱ្យទឹកថ្លា?

៤-ដូចម្តេចដែលហៅថាទឹកសម្អុយ? តើវាមានផលប៉ះពាល់ដូចម្តេច ចំពោះរុក្ខជាតិរុក្ខជាតិ និងសត្វទឹក?

### ចម្លើយ

១-ក្លរមាននាទីសម្លាប់មីក្រូសារពាង្គកាយ។ បើពុំបានដាក់វាទៅក្នុងទឹក នឹងមានមីក្រូសារពាង្គកាយនៅក្នុងនោះ ដែលបណ្តាលឱ្យគ្រោះថ្នាក់ដល់សុខភាពអ្នកប្រើប្រាស់។

២-សរសេរ និងថ្លឹងសមីការតាងប្រតិកម្មខាងក្រោម :

ក. $Mg + H_2SO_4 \rightarrow MgSO_4 + H_2$ ខ. $2K + 2H_2O \rightarrow 2KOH + H_2$

៣-ដើម្បីធ្វើឱ្យទឹកថ្លា គេត្រូវប្រើ សាច់ជូរ $Al_2(SO_4)_3$ និង កំបោរងាប់ $Ca(OH)_2$ ។

៤-ទឹកសម្អុយជាទឹកដែលផ្ទុកជាតិពុលគីមី និងមេរោគ ។

## មេរៀនទី២ សមាសភាពទឹក

ទឹកជាអង្គធាតុរាវគ្មានពណ៌ ពុះនៅសីតុណ្ហភាព 100°C ហើយកកនៅសីតុណ្ហភាព 0°C ។ នៅសីតុណ្ហភាព 4°C ទឹកមានម៉ាសមាឌ $1kg/dm^3$ ឬ 1kg/L ។ មានន័យថាទឹក $1dm^3$ មានម៉ាស 1kg ឬទឹក 1L មានម៉ាស 1kg ។

### ១.ម៉ូលេគុលទឹក

ទឹកគឺជាអង្គធាតុដែលមានរូបមន្ត $H_2O$ ។ ម៉ូលេគុលទឹកបង្កដោយអាតូមអ៊ីដ្រូសែន H ពីរ និងអាតូមអុកស៊ីសែន O មួយ ។

### ២.អគ្គិសនីវិភាគទឹក (បំបែកម៉ូលេគុលទឹក)

-ទឹកសុទ្ធ ឬទឹកបិត (សូលុយស្យុងដែលមានតែម៉ូលេគុលទឹក $H_2O$) មិនរងអគ្គិសនីវិភាគទេ ។

-អគ្គិសនីវិភាគ : ជាលំនាំនៃការបំបែកម៉ូលេគុលដោយប្រើចរន្តអគ្គិសនី (ប្រតិកម្មកើតឡើងដោយហាបង្ខំ) ។

ដូចនេះ ដើម្បីឱ្យទឹករងអគ្គិសនីវិភាគលុះត្រាតែគេបន្ថែមសមាសធាតុអ៊ីយ៉ុង (សមាសធាតុដែលមានបន្ទុកអគ្គិសនី) ទៅក្នុងទឹកនោះ ។




ឧទាហរណ៍ : អគ្គិសនីវិភាគទឹកក្នុងមជ្ឈដ្ឋានសូលុយស្យុងស៊ូត (NaOH) ។

ពេលគេបិទកុងតាក់ធ្វើឱ្យចរន្តអគ្គិសនីឆ្លងកាត់ផើងវិភាគ ដែលមានអាំងតង់ស៊ីតេខ្លាំង ធ្វើឱ្យមានពពុះឧស្ម័នភាយឡើងនៅលើអេឡិចត្រូតទាំងពីរ ។ គេទទួលបានឧស្ម័នអ៊ីដ្រូសែន $H_2$ នៅខាងកាតូត និងឧស្ម័នអុកស៊ីសែន $O_2$ នៅខាងអាណូត ដែលមាឌអ៊ីដ្រូសែន ស្មើពីរដងមាឌអុកស៊ីសែន ($V_{H_2} = 2V_{O_2}$) ។

គេអាចផ្ទៀងផ្ទាត់អត្តសញ្ញាណកម្មឧស្ម័នដែលកកើតដោយភ្លើងឈើគូស ។ បើឧស្ម័នធ្វើឱ្យភ្លើងឈើគូសឆេះច្រាល នោះវាជា ឧស្ម័នអុកស៊ីសែន តែបើវាធ្វើឱ្យមានបន្ទុះ នោះវាជាឧស្ម័នអ៊ីដ្រូសែន ។ អាណូតជា អេឡិចត្រូតដែលភ្ជាប់ទៅនិងប៉ូលវិជ្ជមាននៃជនិតា ហើយកាតូតជា អេឡិត្រូតដែលភ្ជាប់ទៅនិងប៉ូលអវិជ្ជមាននៃជនិតា ។



សមីការតុល្យការ : $2H_2O \rightarrow 2H_2 + O_2$

### ៣.សំយោគទឹក

កើតពីការឆេះរវាងឧស្ម័នអ៊ីដ្រូសែន និងឧស្ម័នអុកស៊ីសែន បង្កើតឱ្យមានអណ្តាតភ្លើង ។



សមីការតុល្យការ : $2H_2 + O_2 \rightarrow 2H_2O$

❋ប្រតិកម្មនេះអាចផ្ទុះកាលណាគេដុតល្បាយឧស្ម័នអ៊ីដ្រូសែន និងអុកស៊ីសែន ។

## សំណួរ និង លំហាត់

១-ក.ចូរឱ្យនិយមន័យម៉ាសមាឌ?

ខ.អង្គធាតុរាវមួយមានម៉ាស 30g មានមាឌ $30cm^3$ នៅ4°c ។ តើអង្គធាតុនេះជាអ្វី?

គ.ចូរបម្លែងតម្លៃនៃម៉ាសមាឌឱ្យទៅជាខ្នាត g/ml ឬ $kg/dm^3$ គឺ 27kg/ml , $35,5g/dm^3$ , $15,2kg/cm^3$ , 58,6g/L ។

២-ចូរបំពេញល្បះខាងក្រោមដោយប្រើពាក្យ : អេឡិចត្រូត បំបែក អុកស៊ីសែន x4 អ៊ីដ្រូសែន x3 សំយោគ ទឹក កាតូត អាណូត ។

ក.ក្នុងផើងវិភាគ អាណូតគឺជា .............................ដែលភ្ជាប់ទៅនឹងប៉ូលវិជ្ជមាននៃជនិតា ។

ខ.ក្នុងពេលអគ្គិសនីវិភាគ ទឹក................ជាអង្គធាតុទោលពីរគឺ .....................និង...................... ។ ឧស្ម័ន................. ភាយនៅខាង.............ឯឧស្ម័ន.................ភាយនៅខាង.............. ។ មាឌឧស្ម័ន..................ធំជាងមាឌឧស្ម័ន................ពីរដង

គ.អ៊ីដ្រូសែនឆេះក្នុង...................នៃខ្យល់ បង្កើតបាន................ ។ ប្រតិកម្មគីមីនេះហៅថា ......................ទឹក ។

៣-ក្នុងពេលធ្វើអគ្គិសនីវិភាគទឹក គេទទួលបានឧស្ម័ននៅខាងអាណូតចំនួន $46cm^3$ ។

ក.រកឈ្មោះ និងមាឌឧស្ម័នដែលភាយឡើងនៅខាងកាតូត?

ខ.តើគេអាចផ្ទៀងអត្តសញ្ញាណឧស្ម័នទាំងនោះតាមវិធីណា?

៤-អគ្គិសនីវិភាគទឹកគេទទួលបានឧស្ម័នភាយនៅខាងកាតូតចំនួន 24ml ។ រកឈ្មោះ និងមាឌឧស្ម័នភាយនៅខាងអាណូត ។

៥-ខ្យល់ជាល្បាយដែលមានអុកស៊ីសែន មួយភាគប្រាំ (1/5) និងអាសូតបួនភាគប្រាំ (4/5) គិតជាមាឌ ។ គណនាមាឌខ្យល់ចាំបាច់សម្រាប់ចំហេះអ៊ីដ្រូសែន $10cm^3$ ។ មាឌឧស្ម័នទាំងអស់ស្ថិតក្នុងសីតុណ្ហភាព និងសម្ពាធដូចគ្នា

៦-ដើម្បីសំយោគឧស្ម័នអាម៉ូញាក់ $NH_3$ ប្រើក្នុងផលិតកម្មជី គេត្រូវប្រើឧស្ម័នអាសូត $N_2$ $50dm^3$ ឱ្យមានប្រតិកម្មជាមួយឧស្ម័នអ៊ីដ្រូសែន $H_2$ ។

ក.សរសេរសមីការតាងប្រតិកម្មសំយោគអាម៉ូញាក់ ។

ខ.គណនាមាឌឧស្ម័នអ៊ីដ្រូសែនដែលត្រូវប្រើ និងមាឌឧស្ម័នអាម៉ូញាក់ដែលកកើត ។ ឧស្ម័នទាំងអស់ស្ថិតក្នុងលក្ខខ័ណ្ឌដូចគ្នា

៧-គេសំយោគឧស្ម័នអ៊ីដ្រូសែន $H_2$ ពីឧស្ម័នមេតាន $CH_4$ ចំនួន $15m^3$ ។ តាមសមីការ : $CH_4 + H_2O \rightarrow CO + H_2$

ក.ថ្លឹងសមីការខាងលើ ។

ខ.គណនាមាឌអ៊ីដ្រូសែនដែលកកើត ។

៨-គេដុតអ៊ីដ្រូសែនក្នុងអុកស៊ីសែន ។

ក.សរសេរសមីការតាងប្រតិកម្មចំហេះនេះ ។

ខ.តើចំហេះនេះត្រូវការអុកស៊ីសែនប៉ុន្មានម៉ូលេគុល? បើបរិមាណអ៊ីដ្រូសែនដែលយកមកប្រើមានចំនួន $3.10^{22}$ ម៉ូលេគុល ។

គ.តើទឹកដែលទទួលបានមានប៉ុន្មានម៉ូលេគុល?

៩-ក្នុងប្រតិកម្មសំយោគទឹក អ៊ីដ្រូសែន 2g ត្រូវចូលធ្វើប្រតិកម្មជាមួយអុកស៊ីសែន 16g ។ គណនាម៉ាសឧស្ម័នដែលត្រូវចូលធ្វើប្រតិកម្ម :

ក.អ៊ីដ្រូសែន 1g ។

ខ.អុកស៊ីសែន 2g ។

១០-គេបង់លោហៈស័ង្កសីទៅក្នុងសូលុយស្យុងអាស៊ីតស៊ុលផួរិច ។ ក្រោយប្រតិកម្មចប់ គេយកឧស្ម័នអ៊ីដ្រូសែនទទួលបាន ដាក់ឱ្យមានប្រតិកម្មជាមួយអុកស៊ីសែននៃខ្យល់ដើម្បីសំយោគទឹក ។

ក.សរសេរសមីការតាងប្រតិកម្មដែលកើតមាន

ខ.គណនាម៉ាសលោហៈស័ង្កសីដែលត្រូវប្រើ បើគេដឹងថាចំហេះនៃអ៊ីដ្រូសែន ប្រើខ្យល់អស់ $22400cm^3$ ។

១១-គេបង់លោហៈសូដ្យូម 1,61g ទៅក្នុងទឹក ។

ក.ចូរសរសេរសមីការតាងប្រតិកម្ម ។

ខ.គណនាម៉ាស និងមាឌអ៊ីដ្រូសែនដែលកកើត ។

គ.គេយកឧស្ម័នអ៊ីដ្រូសែនទទួលបានខាងលើ 70% ជាម៉ាស ដាក់ឱ្យមានប្រតិកម្មជាមួយដែកII អុកស៊ីត $FeO$ ។

a-សរសេរសមីការតាងប្រតិកម្ម

b-គណនាម៉ាសដែកII អុកស៊ីតដែលត្រូវប្រើ ។

c-គណនាម៉ាសអង្គធាតុរឹងដែលកកើត ។ (Na = 23 , H = 1 , O = 16 , Fe = 56)

## ចម្លើយ

១-ក.ម៉ាសមាឌជាម៉ាសនៃធាតុមួយក្នុងមួយខ្នាតមាឌ ។

ខ.អង្គធាតុនោះជាទឹក ។

គ.បម្លែងខ្នាតនៃម៉ាសមាឌ : 27kg/ml = $27.10^3$kg/dm$^3$ ; 35,5g/dm$^3$ = $35,5.10^{-3}$kg/dm$^3$ ; 15,2kg/cm$^3$ = $15,2.10^3$kg/L ; 58,6g/L = $58,6.10^{-3}$g/ml ។

២-ក.អេឡិចត្រូត ។ ខ.បំបែក-អុកស៊ីសែន-អ៊ីដ្រូសែន-អុកស៊ីសែន-អាណូត-អ៊ីដ្រូសែន-កាតូត-អ៊ីដ្រូសែន-អុកស៊ីសែន ។

គ.អុកស៊ីសែន-ទឹក-សំយោគ ។

៣-ក.រកឈ្មោះ និងមាឌឧស្ម័នដែលភាយឡើងខាងកាតូត

ក្នុងអគ្គិសនីវិភាគទឹក ឧស្ម័នដែលភាយឡើងនៅខាងកាតូតគឺ ឧស្ម័នអ៊ីដ្រូសែន $H_2$ ។ តាមទ្រឹស្តីមាឌឧស្ម័នភាយខាងកាតូតស្មើនិង២ដង មាឌឧស្ម័ន ភាយខាងអាណូត (ឬ$V_{H_2} = 2V_{O_2}$ ) ។ យើងបាន $V_{H_2} = 2\times 46 = 92cm^3$ ។

ខ.ដើម្បីរកអត្តសញ្ញាណឧស្ម័នអ៊ីដ្រូសែន $H_2$ គេប្រើអណ្តាភ្លើង (មានសម្លេងផ្ទុះ) និងឧស្ម័នអុកស៊ីសែន $O_2$ គេប្រើរងើកភ្លើង (មានចំហេះច្រាល) ។

៤-ក្នុងអគ្គិសនីវិភាគទឹក ឧស្ម័នភាយឡើងនៅខាងអាណូតជា ឧស្ម័នអុកស៊ីសែន $O_2$ ដែល $V_{O_2} = \frac{1}{2}V_{H_2}$ ដោយ $V_{H_2} = 24ml$

នោះ $V_{O_2} = \frac{1}{2}\times 24 = 12ml$

***❈វិធីដោះស្រាយលំហាត់ទី៥ខាងក្រោមនេះមាន២របៀបគឺ ដោះស្រាយតាមសមាមាត្រមាឌ និងម៉ាសធម្មតា ។ ចំពោះសមាមាត្រតាមមាឌអាចវាចារបានតែរវាងឧស្ម័ន និងឧស្ម័នទេ ហើយត្រូវស្ថិតក្នុងល័ក្ខខ័ណ្ឌដូចគ្នា (សីតុណ្ហភាព និង សម្ពាធ) ។***

៥-គណនាមាឌខ្យល់សម្រាប់ចំហេះអ៊ីដ្រូសែន

តាមរូបមន្ត V$_{ខ្យល់}$ = $5V_{O_2}$




តាមសមីការ $H_2$ = 2cm$^3$ ត្រូវការ $O_2$ = 1cm$^3$

$H_2$ = 10cm$^3$ ត្រូវការ $O_2$ = $\frac{1\times 10}{2} = 5cm^3$

នោះ V$_{ខ្យល់}$ = 5 x 5 = 25cm$^3$




ដោយ $H_2$ = 22,4L មានម៉ាស 2g

$H_2$ = 10cm$^3$ = $10.10^{-3}$L មានម៉ាស $\frac{2\times 10.10^{-3}}{22,4} = 0,89.10^{-3}g$

តាមសមីការ $H_2$ = 4g ត្រូវការ $O_2$ = 32g

$H_2$ =$0,89.10^{-3}$g ត្រូវការ $O_2$ = $\frac{32\times 0,89.10^{-3}}{4} = 7,12.10^{-3}g$

ដោយ $O_2$ = 32g មានមាឌ 22,4L

$O_2$ = $7,12.10^{-3}$g មានមាឌ $\frac{22,4\times 7,12.10^{-3}}{32} = 4,98.10^{-3}L$

យើងបាន $V_{ខ្យល់} = 5 \times 4{,}98.10^{-3} = 24{,}9.10^{-3}L$ តែ $1L = 10^3cm^3$

$= 24{,}9cm^3 \approx 25cm^3$

៦-ក.សរសេសមីការតាងប្រតិកម្មសំយោគអាម៉ូញ៉ាក់ $NH_3$



| $N_2$ | + | $3H_2$ | $\rightarrow$ | $2NH_3$ |
|---|---|---|---|---|
| $1dm^3$ | | $3dm^3$ | | $2dm^3$ |
| $50dm^3$ | | $V_{H_2}$ ? | | $V_{NH_3}$ ? |

ខ.គណនាមាឌឧស្ម័ន $H_2$ និង មាឌឧស្ម័ន $NH_3$

តាមសមីការ $N_2 = 1dm^3$ ត្រូវការ $H_2 = 3dm^3$

$N_2 = 50dm^3$ ត្រូវការ $H_2 = \frac{3 \times 50}{1} = 150dm^3$

តាមសមីការ $H_2 = 3dm^3$ ឱ្យផលជា $NH_3 = 2dm^3$

$H_2 = 150dm^3$ ឱ្យផលជា $NH_3 = \frac{2 \times 150}{3} = 100dm^3$

៧-ក.ថ្លឹងសមីការ



$CH_4 + H_2O \rightarrow CO + 3H_2$

$1m^3$ — $3m^3$

$15m^3$ — $V_{H_2}$ ?

ខ.គណនាមាឌឧស្ម័ន $H_2$

តាមសមីការ $CH_4 = 1m^3$ ទទួលបាន $H_2 = 3m^3$

$CH_4 = 15m^3$ ទទួលបាន $H_2 = \frac{3 \times 15}{1} = 45m^3$

❈***វិធីដោះស្រាយលំហាត់ទី៨ ត្រូវដោះស្រាយតាមសមាមាត្រជាម៉ូលេគុល តាមលេខមេគុណនៃសមីការ ។***

៨-ក.សរសេរសមីការតាងប្រតិកម្មចំហេះ



| $2H_2$ | + | $O_2$ | $\rightarrow$ | $2H_2O$ | n : ចំនួនម៉ូលេគុល |
|---|---|---|---|---|---|
| 2 *ម៉ូលេគុល* | | 1 *ម៉ូលេគុល* | | 2 *ម៉ូលេគុល* | |
| $3.10^{22}$ *ម៉ូលេគុល* | | $n_{O_2}$ ? | | $n_{H_2O}$ ? | |

ខ.គណនាចំនួនម៉ូលេគុល $O_2$ ដែលត្រូវប្រើ

តាមសកីការ $H_2 = 2$ *ម៉ូលេគុល* ត្រូវការ $O_2 = 1$ *ម៉ូលេគុល*

$H_2 = 3.10^{22}$ *ម៉ូលេគុល* ត្រូវការ $O_2 = \frac{1 \times 3.10^{22}}{2} = 1{,}5.10^{22}$ *ម៉ូលេគុល*

គ. គណនាចំនួនម៉ូលេគុល $H_2O$ ដែលកកើត

តាមសមីការ $H_2 = 2$ *ម៉ូលេគុល* ទទួលបាន $H_2O = 2$ *ម៉ូលេគុល*

$H_2 = 3.10^{22}$ *ម៉ូលេគុល* ទទួលបាន $H_2O = \frac{2 \times 3.10^{22}}{2} = 3.10^{22}$ *ម៉ូលេគុល*

៩-សមីការតាងប្រតិកម្ម



$2H_2 + O_2 \rightarrow 2H_2O$

ក.គណនាម៉ាស $O_2$

ដោយ $H_2 = 2g$ ធ្វើប្រតិកម្មជាមួយ $O_2 = 16g$

$H_2 = 1g$ ធ្វើប្រតិកម្មជាមួយ $O_2 = \frac{16 \times 1}{2} = 8g$

ខ.គណនាម៉ាស $H_2$

តាមសម្មតិកម្ម $O_2 = 16g$ ត្រូវការ $H_2 = 2g$

$O_2 = 2g$ ត្រូវការ $H_2 = \frac{2\times 2}{16} = 0,25g$

១០-ក.សរសេរសមីការតាងប្រតិកម្ម



| | | | | | | |
|---|---|---|---|---|---|---|
| Zn | + | $H_2SO_4$ | $\rightarrow$ | $ZnSO_4$ | + | $H_2$ (1) |
| 65g | | | | | | 2g |
| $m_{Zn}$? | | | | | | 0,8g |



| | | | | | |
|---|---|---|---|---|---|
| $2H_2$ | + | $O_2$ | $\rightarrow$ | $2H_2O$ | (2) |
| 4g | | 32g | | | |
| $m_{H_2}$ ? | | 6,4g | | | |

ខ.គណនាម៉ាសស័ង្កសី Zn ត្រូវប្រើ

***រកមាឌ*** $O_2$

តាមរូបមន្ត $V_{O_2} = \frac{1}{5}V_{ខ្យល់}$ ដោយ $V_{ខ្យល់} = 22400cm^3 = 22,4L$

នោះ $V_{O_2} = \frac{1}{5}\times 22,4 = 4,48L$

***រកម៉ាស*** $O_2$

ដោយ $O_2 = 22,4L$ មានម៉ាស 32g

$O_2 = 4,48g$ មានម៉ាស $\frac{4,48\times 32}{22,4} = 6,4g$

***រកម៉ាស*** $H_2$ (***ព្រោះ*** $H_2$ ***មានក្នុងសមីការ ទី១ និង២ដែលអាចឱ្យយើងរកឃើញម៉ាសស័ង្កសី*** Zn)

តាមសមីការ (2) : $O_2 = 32g$ ត្រូវការ $H_2 = 4g$

$O_2 = 6,4g$ ត្រូវការ $H_2 = \frac{4\times 6,4}{32} = 0,8g$

តាមសមីការ (1) : $H_2 = 2g$ ត្រូវការ $Zn = 65g$

$H_2 = 0,8g$ ត្រូវការ $Zn = \frac{65\times 0,8}{2} = 26g$

១១-ក.សរសេរសមីការតាងប្រតិកម្ម



| | | | | | | |
|---|---|---|---|---|---|---|
| 2Na | + | $2H_2O$ | $\rightarrow$ | 2NaOH | + | $H_2$ (1) |
| 46g | | | | | | 2g |
| 1,61g | | | | | | $m_{H_2}$ ? |

ខ.គណនាម៉ាស និងមាឌអ៊ីដ្រូសែន $H_2$

តាមសមីការ (1) : $Na = 46g$ ទទួលបាន $H_2 = 2g$

$Na = 1,61g$ ទទួលបាន $H_2 = \frac{2\times 1,61}{46} = 0,07g$

ដោយ $H_2 = 2g$ មានមាឌ 22,4L

$H_2 = 0,07g$ មានមាឌ $\frac{22,4\times 0,07}{2} = 0,784g$

គ.គេយក $H_2$ ខាងលើ 70% ជាម៉ាស ឱ្យមានប្រតិកម្មជាមួយ FeO

មានន័យថា $H_2 = 100g$ ត្រូវបានយកមកប្រើ 70g

បើ $H_2 = 0,784g$ ត្រូវបានយកមកប្រើ $\frac{70\times 0,784}{100} = 0,55g$

a.សរសេរសមីការតាងប្រតិកម្ម



$H_2 + FeO \rightarrow Fe + H_2O$

| | | |
|---|---|---|
| 2g | 72g | 56g |
| 0,55g | $m_{FeO}$? | $m_{Fe}$? |

b.គណនាម៉ាស FeO

តាមសមីការ $H_2 = 2g$ ប្រតិកម្មជាមួយ FeO = 72g

$H_2 = 0,55g$ ប្រតិកម្មជាមួយ FeO = $\frac{72 \times 0,55}{2} = 19,8g$

c.គណនាម៉ាសអង្គធាតុរឹង Fe

តាមសមីការ $H_2 = 2g$ ទទួលបាន Fe = 56g

$H_2 = 0,55g$ ទទួលបាន Fe = $\frac{56 \times 0,55}{2} = 15,4g$

# មេរៀនទី៣ សូលុយស្យុង

## ១.និយមន័យ

ជាល្បាយស្មើសាច់ដែលកើតឡើងពីធាតុរលាយ និងធាតុរំលាយ។ ធាតុរលាយ ជាសារធាតុដែលរលាយ ឯធាតុរំលាយជាសារធាតុសម្រាប់រំលាយធាតុរលាយ។ ធាតុរំលាយដែលគេនិយមប្រើគឺទឹក។

## ២.ប្រភេទនៃសូលុយស្យុង

សូលុយស្យុងមានបីគឺ សូលុយស្យុងរាវ សូលុយស្យុងរឹង (សំលោហៈ) និង សូលុយស្យុងឧស្ម័ន។

ឧទាហរណ៍ :

| ឈ្មោះសូលុយស្យុង | ធាតុរលាយ | ធាតុរំលាយ | ប្រភេទសូលុយស្យុង |
|---|---|---|---|
| ទឹកស្ករ | ស្ករ | ទឹក | រាវ |
| តាំងតួអ៊ីយ៉ូត | អ៊ីយ៉ូត | អាល់កុល | រាវ |
| ខ្យល់ | អុកស៊ីសែន | អាសូត | ឧស្ម័ន |
| ស្ពាន់ | ស័ង្កសី | ទង់ដែង | រឹង |

-លក្ខណៈសម្គាល់នៃសូលុយស្យុងគឺ ជាល្បាយស្មើសាច់ មិនអាចញែកធាតុរលាយ និងធាតុរំលាយតាមវិធីច្រោះបានឡើយ។

-កករវិលវល់ជា ល្បាយមិនស្មើសាច់ អាចញែកចេញពីគ្នាតាមវិធីច្រោះបាន។

## ៣.កម្រិតរលាយ

ជាបរិមាណនៃធាតុរលាយ ដែលអាចរលាយនៅក្នុងបរិមាណកំណត់នៃធាតុរំលាយក្នុងល័ក្ខខ័ណ្ឌមួយច្បាស់លាស់ (ប្រភេទនៃធាតុរលាយ ធាតុរំលាយ និង សីតុណ្ហភាព)។

ឧទាហរណ៍ : - ឌីអ៊ីយ៉ូត $I_2$ រលាយក្នុងអាល់កុលច្រើនជាងរលាយក្នុងទឹក។

- នៅសីតុណ្ហភាព $20^oc$ ទឹក 100g អាចរំលាយអំបិលសំល NaCl បាន 36g តែនៅសីតុណ្ហភាព $80^oc$ ទឹកអាចរំលាយអំបិលនេះបានដល់ទៅ 38,4g។

## ៤.ទន្ទឹសូលុយស្យុង

-សូលុយស្យុងរាវ ជាសូលុយស្យុងដែលបរិមាណនៃធាតុរលាយតិចនៅក្នុងធាតុរំលាយ។

-សូលុយស្យុងខាប់ ជាសូលុយស្យុងដែលមានបរិមាណនៃធាតុរលាយច្រើននៅក្នុងធាតុរំលាយ។

-សូលុយស្យុងឆ្អែត ជាសូលុយស្យុងដែលក្នុងនោះធាតុរលាយ មិនអាចរលាយតទៅទៀតបាននៅសីតុណ្ហភាពកំណត់មួយ។

## ៥.កំហាប់ជាភាគរយ (C%)

ជាចំនួនក្រាមនៃធាតុរលាយដែលមានក្នុងសូលុយស្យុង 100g។

**រូបមន្ត :** $C\% = \frac{m_1 \times 100}{m}$ ; C% : កំហាប់ជាភាគរយ គិតជា % ; $m_1$ : ម៉ាសធាតុរលាយ គិតជា g

m : ម៉ាសសូលុយស្យុង គិតជា g ; ដែល $m = m_1 + m$(ធាតុរំលាយ) ឬ ម៉ាសសូលុយស្យុង = ម៉ាសធាតុរលាយ + ម៉ាសធាតុរំលាយ

❈សម្គាល់ : -ក្នុងសូលុយស្យុង បើគេមិនបញ្ជាក់ធាតុរំលាយទេនោះ គេសន្មត់យកទឹកសុទ្ធជាធាតុរំលាយ។

-កាលណាគេបន្ថែមទឹកទៅក្នុងសូលុយស្យុងមួយ ធ្វើឱ្យកំហាប់ភាគរយនៃសូលុយស្យុងប្រែប្រួលថយចុះ និងម៉ាសសូលុយស្យុងប្រែប្រួលកើនឡើង ($m_{ថ្មី} = m_{ដើម} + m_{ទឹក}$) តែម៉ាសនៃធាតុសុទ្ធ ឬធាតុរលាយ $m_1$ មិនប្រែប្រួលទេ។

ឧទាហរណ៍ : បើគេរំលាយអំបិលសំល NaCl 5g ក្នុងទឹក 95g គេនឹងបានសូលុយស្យុង 100g។ គេថាសូលុយស្យុងនេះមានកំហាប់ជាភាគរយ 5%។

មានន័យថា $m_1 = 5g$ ហើយទឹកជាធាតុរំលាយមានម៉ាស 95g នោះ $m = m_1 + m$(ធាតុរំលាយ) $= 5 + 95 = 100g$

តាមរូបមន្ត $C\% = \frac{m_1 \times 100}{m} = \frac{5 \times 100}{100} = 5\%$

## ៦.បម្រើបម្រាស់សូលុយស្យុង

សូលុយស្យុង និងធាតុរំលាយមានសារៈសំខាន់ណាស់ក្នុងជីវភាពប្រចាំថ្ងៃ ក្នុងឧស្សាហកម្ម ក្នុងកសិកម្ម និងក្នុងវិជ្ជសាស្ត្រ ។ ធាតុរំលាយសំខាន់ៗមានដូចជា ទឹក អាសេតូន សាំង ប្រេងរុក្ខជាតិ (តេរេបង់ទីន) អាល់កុល....... ។

ឧទាហរណ៍ : -គេប្រើអាសេតូនសម្រាប់ជម្រះថ្នាំលាបក្រចក ឬថ្នាំលាបផ្សេងៗ ។ សេតូនមានរូបមន្តទូទៅ R-CO-R'

-ទឹកភ្លៀងរំលាយជីបង្កើតជាសូលុយស្យុងដែលរុក្ខជាតិអាចស្រូបយកដើម្បីចិញ្ចឹមសារពាង្គកាយរបស់វា ។

-ឱសថដែលយើងប្រើប្រាស់រាល់ថ្ងៃភាគច្រើនជាសូលុយស្យុង ដូចជាថ្នាំចាក់ផ្សេងៗ..... ។

## សំណួរ និងលំហាត់

១-ចូរគូសសញ្ញា (√) ក្នុងប្រអប់ខាងដើមឈ្មោះរូបធាតុណាដែលជាសូលុយស្យុងស្មើសាច់ :

☐ក.ស្រាបៀ ☐ខ.ទឹកអប់ ☐គ.ទឹកល្អក់ ☐ឃ.ទឹកដមផ្លែឈើ

២-ចូរគូសសញ្ញា (√) ក្នុងប្រអប់ខាងដើមឈ្មោះរូបធាតុណាដែលមិនរលាយក្នុងទឹក :

☐ក.អំបិលសំល ☐ខ.ប្រេងកាត ☐គ.អាល់កុល ☐ឃ.ខ្លាញ់ ☐ង.ទង់ដែងស៊ុលផាត

៣-ចូរគូសសញ្ញា (√) ក្នុងប្រអប់ខាងដើមឈ្មោះរូបធាតុណាដែលអាចរលាយក្នុងទឹកបង្កើតជាសូលុយស្យុង :

☐ក.ទង់ដែងស៊ុលផាត ☐ខ.អំបិល ☐គ.ដី ☐ឃ.ម្រេច

៤-ចូរបំពេញចន្លោះខាងក្រោមឱ្យបានត្រឹមត្រូវ :

ក.វត្ថុដែលបង្កដោយសារធាតុច្រើនយ៉ាងគឺជា ............................ ។

ខ.បើគេទុកល្បាយមិនស្មើសាច់មួយឱ្យរង ធាតុបង្កណាដែលធ្ងន់ជាងគេ ត្រូវស្ថិតនៅ...................... ។

គ.ចម្រោះអាចឱ្យគេញែក ......................ចេញពី.......................... ។

ឃ.កាលណាគេចាក់អំបិលសំលក្នុងទឹក វានឹង................គេទទួលបាន......................មួយ ហៅថាទឹកអំបិល ។ អំបិលគឺជា .......................ហើយទឹកគឺជា........................ ។ ទឹកលាយជាមួយប្រេងមិនមែនជា........................ទេ ។

ង.ទឹកជាធាតុ.......................សាប៊ូ បង្កើតបានជា........................ប្រើសម្រាប់លាងជម្រះភាព......................... ។

៥-ចូរសរសេរពាក្យ "ខុស ឬ ត្រូវ" នៅក្នុងប្រអប់ខាងដើមល្បះខាងក្រោម :

☐ ក.ទឹកភ្លៀងបានរំលាយជីបង្កើតបានជាសូលុយស្យុងដែលរុក្ខជាតិអាចស្រូបដើម្បីចិញ្ចឹមសារពាង្គការរបស់វា ។

☐ ខ.ឱសថដែលយើងប្រើប្រាស់ភាគច្រើនជាអង្គធាតុទោល ។

☐ គ.ទឹកមិនមែនជាធាតុរំលាយដ៏សំខាន់ និងចាំបាច់ក្នុងជីវភាពទេ ។

☐ ឃ.សូលុយស្យុង និងធាតុរំលាយមានសារៈប្រយោជន៍ក្នុងគេហដ្ឋាន ឧស្សាហកម្ម កសិកម្ម និងក្នុងវិជ្ជសាស្ត្រ ។

☐ ង.កាលណាគេអាចញែកសម្គាល់ធាតុបង្កពីរនៃល្បាយមួយ ល្បាយនោះជាល្បាយមិនស្មើសាច់ ។

☐ ច.ចម្រោះអាចញែកធាតុបង្កផ្សេងៗនៃល្បាយស្មើសាច់ ។

☐ ឆ.គេអាចប្រើវិធីបំណិត ដើម្បីញែកធាតុបង្កផ្សេងៗ នៃល្បាយស្មើសាច់ ។

៦-ក.នៅក្នុងទឹកសមុទ្រ តើអ្វីជាធាតុរំលាយ?

ខ. ចូររាប់ធាតុរលាយដែលមានក្នុងទឹកសមុទ្រ ឱ្យបានពីរ ។

៧-ពេលយើងកូរទង់ដែងស៊ុលផាត $CuSO_4$ ក្នុងទឹក យើងនឹងទទួលបានល្បាយពណ៌ខៀវ ។ ចូរបកស្រាយតាមរបៀបពីរយ៉ាង ដើម្បី

បញ្ជាក់ថាល្បាយនេះជាសូលុយស្យុង។
៨-គេចាក់ប្រេងរុក្ខជាតិ និងទឹកខ្មេះ រួចទុកឱ្យរង។
ក.តើនេះជាល្បាយស្មើសាច់ ឬ ទេ?
ខ.តើអង្គធាតុរាវណាមួយស្ថិតនៅបាតកែវ?
គ.តើប្រេងធ្ងន់ជាងទឹកខ្មេះ ឬ ទេ?
៩-ដូចម្តេចដែលហៅថាកំហាប់ភាគរយនៃសូលុយស្យុង?
១០-ចូររកឧទាហរណ៍ធាតុរលាយ ដែលអ្នកប្រើប្រាស់ក្នុងជីវភាពឱ្យបានប្រាំ។
១១-ចូររាប់ឈ្មោះធាតុរំលាយដែលអ្នកស្គាល់ឱ្យបានបី។
១២-តើធាតុរំលាយដែលចាំបាច់ និងសំខាន់ជាងគេក្នុងជីវភាពគឺអ្វី? តើគេប្រើវាសម្រាប់រំលាយអង្គធាតុណាខ្លះ ក្នុងគេហដ្ឋាន ក្នុងកសិកម្ម ក្នុងឧស្សាហកម្ម និងក្នុងវេជ្ជសាស្ត្រ?
១៣-គេថាសូលុយស្យុងអាស៊ីតក្លរីឌ្រិច HCl មួយមានកំហាប់ 8% តើមានន័យដូចម្តេច?
១៤-គណនាកំហាប់ជាភាគរយ នៃសូលុយស្យុងអំបិលសំល NaCl ដោយដឹងថាទឹក 60g បានរំលាយអំបិល 5g ។
១៥-គណនាកំហាប់ជាភាគរយនៃសូលុយស្យុងស្ករកាត់ ដោយដឹងថាក្នុងនោះមានទឹក 40g និងស្ករកាត់ 10g ។
១៦-គេមានសូលុយស្យុងអាស៊ីតស៊ុលផួរិចចំនួន 456g ។ តើសូលុយស្យុងនេះមានកំហាប់ប៉ុន្មានភាគរយ បើក្នុងសូលុយស្យុងមានអាស៊ីតស៊ុលផួរិចសុទ្ធ រលាយចំនួន 22,8g ។
១៧-គេយកសូលុយស្យុងសូដ្យូមក្លរួ 15% ចំនួន 160g ទៅលាយជាមួយទឹក 40g ។ គណនាកំហាប់ជាភាគរយ របស់សូលុយស្យុងដែលទើបកកើត។
១៨-សូលុយស្យុងអំបិលសំលមួយមានម៉ាស 800g និងមានកំហាប់ 5% ។ គណនាម៉ាសអំបិលសំល និងម៉ាសទឹកដែលប្រើសម្រាប់ធ្វើសូលុយស្យុងខាងលើ។
១៩-គេរំលាយអំបិលសំល 20g ក្នុងទឹក 80g ។គណនាកំហាប់ជាភាគរយនៃសូលុយស្យុង។
២០-គណនាម៉ាសអាស៊ីតស៊ុលផួរិចសុទ្ធ ដែលមានក្នុងសូលុយស្យុងអាស៊ីតស៊ុលផួរិច 34% ចំនួន 342g ។
២១-គណនាម៉ាសសូលុយស្យុងអំបិល 25% ដែលទទួលបាន កាលណាគេបន្តក់សូលុយស្យុងសូត 35% ចំនួន 300g ឱ្យធ្វើប្រតិកម្មជាមួយអាស៊ីតស៊ុលផួរិច។
២២-គេបន្ថែមទឹក 1L ចូលក្នុងសូលុយស្យុងអាស៊ីតនីទ្រិច $HNO_3$ ចំនួន 600g ដែលមានកំហាប់ 32% ។ តើសូលុយស្យុងថ្មីនេះមានកំហាប់ប៉ុន្មានភាគរយ? ទឹកសុទ្ធ 1L មានម៉ាស 1kg
២៣-គេចាក់អាស៊ីតក្លរីឌ្រិច HCl ដែលមានកំហាប់ 40% ចំនួន 273,75g ទៅលើស័ង្កសី។ ចូរសរសេរសមីការតាងប្រតិកម្ម និងគណនាម៉ាសអ៊ីដ្រូសែនដែលកកើត។
២៤-គេដាក់លោហៈសូដ្យូមចំនួន 0,92g ឱ្យមានប្រតិកម្មជាមួយទឹក។ ក្រោយប្រតិកម្មចប់គេទទួលបានសូលុយស្យុងមួយ ដែលមានកំហាប់ 20% ។
ក.សរសេរសមីការតាងប្រតិកម្ម។
ខ.គណនាម៉ាសសូលុយស្យុងបាសដែលទទួលបានខាងលើ។
គ.គណនាមាឌឧស្ម័នអ៊ីដ្រូសែនដែលកកើត។ (Na = 23 , H = 1 , O = 16)
២៥-គេបង់លោហៈដែក II ឱ្យមានប្រតិកម្មជាមួយសូលុយស្យុងអាស៊ីតក្លរីឌ្រិច HCl 27% ចំនួន 250g ។

ក.សរសេរសមីការតាងប្រតិកម្ម ។

ខ.គណនាម៉ាសដែកដែលប្រើ ។

គ.គណនាម៉ាស និងមាឌឧស្ម័នអ៊ីដ្រូសែនដែលកកើត ។ (Fe = 56 , H = 1 , Cl = 35,5)

## ចម្លើយ

១-ក.√ ខ.√ ២-ខ.√ ឃ.√ ៣-ក.√ ខ.√

៤-បំពេញចន្លោះ

ក.ល្បាយ ។ ខ.ខាងក្រោម ។ គ.អង្គធាតុរឹង-ល្បាយ ។

ឃ.រលាយ-សូលុយស្យុង-ធាតុរលាយ-ធាតុរំលាយ-សូលុយស្យុង ។ ង.រំលាយ-សូលុយស្យុង-កង្វក់

៥-សរសេរពាក្យ "ខុស ឬ ត្រូវ"

ក.ត្រូវ ខ.ខុស គ.ខុស ឃ.ត្រូវ ង.ត្រូវ ច.ខុស ឆ.ត្រូវ

៦-ក.នៅក្នុងទឹកសមុទ្រ ធាតុរំលាយ គឺ ទឹក ។

ខ.ធាតុរំលាយដែលមានក្នុងទឹកសមុទ្រមាន សូដ្យូមក្លរួ (NaCl) កាល់ស្យូមក្លរួ ($CaCl_2$) ឧស្ម័នអុកស៊ីសែន ($O_2$) ... ។

៧-វិធីពីរយ៉ាងដែលបញ្ជាក់ល្បាយជាសូលុយស្យុង

-ពិនិត្យមើលទិដ្ឋភាពខាងក្រៅ វាជាល្បាយស្មើសាច់ នោះវាជាសូលុយស្យុង ។

-ពេលច្រោះល្បាយ គ្មានអ្វីលើក្រដាសតម្រងទេ នោះវាជាសូលុយស្យុង ។

៨-កាលណាគេចាក់ប្រេងរុក្ខជាតិ និងទឹកខ្មេះ រួចទុកឱ្យរង :

ក.នេះមិនមែនជាល្បាលស្មើសាច់ទេ ។

ខ.អង្គធាតុរាវដែលស្ថិតនៅបាតកែវគឺ ទឹកខ្មេះ ។

គ.ប្រេងស្រាលជាងទឹកខ្មេះ ។

៩-កំហាប់ភាគរយនៃសូលុយស្យុង ជាចំនួនក្រាមនៃធាតុរលាយដែលមានក្នុងសូលុយស្យុង 100g ។

១០-ធាតុរលាយដែលប្រើក្នុងជីវភាពប្រចាំថ្ងៃមានដូចជា អំបិលសំល ស្ករស ជីអ៊ុយរ៉េ ក្រាមអ៊ីយ៉ូត ម្សៅស៊ុប ។

១១-ធាតុរំលាយមានដូចជា ទឹក អាល់កុល សាំង ។

១២-ធាតុរំលាយដែលចាំបាច់ និងសំខាន់ជាងគេក្នុងជីវភាពរស់នៅ គឺទឹក ។ នៅក្នុងគេហដ្ឋានគេប្រើវាសម្រាប់រំលាយ ស្ករ អំបិល ធីក ឬដាំស្ល សម្រាប់រំលាយសាប៊ូ ប្រើក្នុងការបោកគក់សម្លៀកបំពាក់ ។ ក្នុងឧស្សាហកម្ម គេប្រើវាក្នុងការជ្រលក់ពណ៌ ការផលិតទឹកអប់ ។ ក្នុងកសិកម្ម ទឹកត្រូវបានប្រើសម្រាប់ផលិតថ្នាំសម្លាប់សត្វល្អិត និងជីគីមី ។ ក្នុងវេជ្ជសាស្ត្រ គេប្រើទឹកសម្រាប់ផលិតឱសថផ្សេងៗ ដូចជាថ្នាំក្អក ថ្នាំដាក់ភ្នែក ថ្នាំដាក់ច្រមុះ ។

១៣-សូលុយស្យុងអាស៊ីតក្លរីឌ្រិច HCl 8% មានន័យថា ក្នុង 100g នៃសូលុយស្យុងHCl មានអាស៊ីតក្លរីឌ្រិចសុទ្ធ 8g និងទឹក 92g ។

១៤-គណនាកំហាប់ជាភាគរយ(C%) នៃ សូ.NaCl

តាមរូបមន្ត $C\% = \frac{m_1 \times 100}{m}$ ដោយ $m_1 = 5g$

ដោយ $m = m_1 + m_{ទឹក}$ តែ $m_{ទឹក} = 60g$

នោះ $m = 5 + 60 = 65g$

យើងបាន $C\% = \frac{5 \times 100}{65} = 7,69\%$

១៥- គណនាកំហាប់ជាភាគរយ(C%) នៃ សូ.NaOH

តាមរូបមន្ត $C\% = \frac{m_1 \times 100}{m}$ ដោយ $m_1 = 10g$

ដោយ $m = m_1 + m_{ទឹក}$ តែ $m_{ទឹក} = 40g$

នោះ $m = 10 + 40 = 50g$

យើងបាន $C\% = \frac{10 \times 100}{50} = 20\%$

១៦- គណនាកំហាប់ជាភាគរយ(C%) នៃ សូ.$H_2SO_4$

តាមរូបមន្ត $C\% = \frac{m_1 \times 100}{m}$ ដោយ $m_1 = 22,8g$ និង $m = 456g$

យើងបាន $C\% = \frac{22,8 \times 100}{456} = 5\%$

១៧-គណនាកំហាប់សូ.NaCl ថ្មី

តាមរូបមន្ត $C\%_{ថ្មី} = \frac{m_1 \times 100}{m_{ថ្មី}}$

ដោយ $m_{ថ្មី} = m_{ដើម} + m_{ទឹក}$ តែ $m_{ទឹក} = 40g$ , $m_{ដើម} = 160g$

$m_{ថ្មី} = 160 + 40 = 200g$

***កាលណាគេបន្ថែមទឹកទៅក្នុង សូ.NaCl មិនធ្វើឱ្យម៉ាសនៃNaCl សុទ្ធប្រែប្រួលទេ មានន័យថា $m_{1ដើម} = m_{1ថ្មី}$***

រក $m_1$ ក្នុងសូ.NaCl ដើម

តាមរូបមន្ត $C\%_{ដើម} = \frac{m_1 \times 100}{m_{ដើម}}$ នាំឱ្យ $m_1 = \frac{C\%_{ដើម} \times m_{ដើម}}{100}$ ដោយ $C\%_{ដើម} = 15\%$

នោះ $m_1 = \frac{15 \times 160}{100} = 24g$

យើងបាន $C\%_{ថ្មី} = \frac{24 \times 100}{200} = 12\%$

១៨-គណនាម៉ាសអំបិលសំលសុទ្ធ ($m_{NaCl}$)និងម៉ាសទឹកត្រូវប្រើ

តាមរូបមន្ត $C\% = \frac{m_1 \times 100}{m}$ នាំឱ្យ $m_1 = \frac{C\% \times m}{100}$ ដោយ $C\% = 5\%$ , $m = 800g$

នោះ $m_1 = \frac{5 \times 800}{100} = 40g$

ដោយ $m = m_1 + m_{H_2O}$ នាំឱ្យ $m_{H_2O} = m - m_1 = 800-40 = 760g$

១៩-គណនាកំហាប់ជាភាគរយនៃសូ.NaCl

តាមរូបមន្ត $C\% = \frac{m_1 \times 100}{m}$ ដោយ $m_1 = 20g$ , $m = m_1 + m_{H_2O} = 20 + 80 = 100g$

នោះ $C\% = \frac{20 \times 100}{100} = 20\%$

២០-គណនាម៉ាសអាស៊ីតស៊ុលផួរិចសុទ្ធ ($m_1$)

តាមរូបមន្ត $C\% = \frac{m_1 \times 100}{m}$ នាំឱ្យ $m_1 = \frac{C\% \times m}{100}$ ដោយ $C\% = 34\%$ , $m = 342g$

នោះ $m_1 = \frac{34 \times 342}{100} = 116,28g$

២១-គណនាម៉ាសសូលុយស្យុងអំបិល ($Na_2SO_4$)


សមីការតាងប្រតិកម្ម $H_2SO_4 + 2NaOH \rightarrow Na_2SO_4 + 2H_2O$

| | | |
|---|---|---|
| | 80g | 142g |
| | 105g | $m_{Na_2SO_4}?$ |

រកម៉ាសស៊ូតសុទ្ធ ($m_1$)

តាមរូបមន្ត $C\% = \frac{m_1 \times 100}{m}$ នាំឱ្យ $m_1 = \frac{C\% \times m}{100}$ ដោយ C% = 35% , m = 300g

នោះ $m_1 = \frac{35 \times 300}{100} = 105g$

តាមសមីការ NaOH = 80g ទទួលបាន $Na_2SO_4$ = 142g

NaOH = 105g ទទួលបាន $Na_2SO_4 = \frac{142 \times 105}{80} = 186{,}375g$

តាមរូបមន្ត $C\% = \frac{m_1 \times 100}{m}$ នាំឱ្យ $m = \frac{m_1 \times 100}{C\%}$ ដោយ C% = 25%

នោះ $m = \frac{186{,}375 \times 100}{25} = 745{,}5g$

***❈ តាមរយៈសមីការតាងប្រតិកម្ម យើងអាចវាចារ រកឃើញម៉ាសនៃធាតុសុទ្ធ ឬម៉ាសនៃធាតុរលាយ ក្នុងសូលុយស្យុង ។***

២២-គណនាកំហាប់សូ.$HNO_3$ថ្មី

តាមរូបមន្ត $C\%_{ថ្មី} = \frac{m_1 \times 100}{m}$

ដោយ $m_{ថ្មី} = m_{ដើម} + m_{ទឹក}$ តែ $V_{ទឹក}$ = 1L ឬ $m_{ទឹក}$ = 1kg = 1000g , $m_{ដើម}$ = 600g

$m_{ថ្មី}$ = 600 + 1000 = 1600g

***កាលណាគេបន្ថែមទឹកទៅក្នុងសូ.$HNO_3$ មិនធ្វើឱ្យម៉ាស$HNO_3$ សុទ្ធប្រែប្រួលទេ មានន័យថា $m_{1ដើម} = m_{1ថ្មី}$***

រក $m_1$ ក្នុងសូ.$HNO_3$ ដើម

តាមរូបមន្ត $C\%_{ដើម} = \frac{m_1 \times 100}{m_{ដើម}}$ នាំឱ្យ $m_1 = \frac{C\%_{ដើម} \times m_{ដើម}}{100}$ ដោយ $C\%_{ដើម}$ = 32%

នោះ $m_1 = \frac{32 \times 600}{100} = 192g$

យើងបាន $C\%_{ថ្មី} = \frac{192 \times 100}{1600} = 12\%$

២៣-គណនាម៉ាសអ៊ីដ្រូសែនកកើត $H_2$

សរសេរសមីការតាងប្រតិកម្ម


$Zn + 2HCl \rightarrow ZnCl_2 + H_2$

| | | |
|---|---|---|
| | 73g | 2g |
| | 109,5g | $m_{H_2O}?$ |

រកម៉ាសសុទ្ធនៃ HCl

តាមរូបមន្ត $C\% = \frac{m_1 \times 100}{m}$ នាំឱ្យ $m_1 = \frac{C\% \times m}{100}$ ដោយ C% = 40% , m = 273,75g

នោះ $m_1 = \frac{40 \times 273{,}75}{100} = 109{,}5g$

តាមសមីការ HCl = 73g ទទួលបាន $H_2$ = 2g

HCl = 109,5g ទទួលបាន $H_2 = \frac{2 \times 109{,}5}{73} = 3g$

២៤-ក.សរសេរសមីការតាងប្រតិកម្ម



| | | | | |
|---|---|---|---|---|
| 2Na | + | $2H_2O \rightarrow$ | 2NaOH | + $H_2$ |
| 46g | | | 80g | |
| 0,92g | | | $m_{NaOH}$? | |

ខ.គណនាម៉ាសសូ.បាសទទួលបាន (NaOH)

តាមសមីការ  Na = 46g ទទួលបាន NaOH = 80g

Na = 0,92g ទទួលបាន NaOH = $\frac{80\times 0,92}{46}=1,6g$

តាមរូបមន្ត $C\%=\frac{m_1\times 100}{m}$  នាំឱ្យ $m=\frac{m_1\times 100}{C\%}$ ដោយ C% = 20%

នោះ $m=\frac{1,6\times 100}{20}=8g$

គ.គណនាមាឌអ៊ីដ្រូសែនដែលកកើត

តាមសមីការ  Na = 46g ទទួលបាន $H_2$ = 2g

Na = 0,92g ទទួលបាន $H_2=\frac{2\times 0,92}{46}=0,04g$

ដោយ $H_2$ = 2g  មានមាឌ 22,4L

$H_2$ = 0,04g មានមាឌ $\frac{22,4\times 0,04}{2}=0,448L$

២៥-ក.សរសេរសមីការតាងប្រតិកម្ម



| | | | | |
|---|---|---|---|---|
| Fe | + | $2HCl \rightarrow$ | $FeCl_2$ + | $H_2$ |
| 56g | | 73g | | 2g |
| $m_{Fe}$? | | 67,5g | | $m_{H_2}$ ? |

ខ.គណនាម៉ាសដែក Fe

រកម៉ាសសុទ្ធនៃ HCl

តាមរូបមន្ត $C\%=\frac{m_1\times 100}{m}$  នាំឱ្យ $m_1=\frac{C\%\times m}{100}$ ដោយ C% = 27% , m = 250g

នោះ $m_1=\frac{27\times 250}{100}=67,5g$

តាមសមីការ  HCl = 73g ទទួលបាន Fe = 56g

HCl = 67,5g ទទួលបាន Fe = $\frac{56\times 67,5}{73}=51,78g$

គ.គណនាម៉ាស និងមាឌអ៊ីដ្រូសែន

តាមសមីការ  HCl = 73g ទទួលបាន $H_2$ = 2g

HCl = 67,5g ទទួលបាន $H_2=\frac{2\times 67,5}{73}=1,85g$

ដោយ $H_2$ = 2g  មានមាឌ 22,4L

$H_2$ = 1,85g មានមាឌ $\frac{22,4\times 1,85}{2}=20,72L$

## ជំពូក៣ អុកស៊ីត អាស៊ីត បាស អំបិល

### មេរៀនទី១ វ៉ាឡង់គីមី

### ១.និយមន័យ

វ៉ាឡង់នៃធាតុមួយជាចំនួនអាតូមអ៊ីដ្រូសែនដែលភ្ជាប់ជាមួយអាតូមនៃធាតុនោះ ។

អាតូមអ៊ីដ្រូសែន (H) មានវ៉ាឡង់ 1 ជានិច្ច ។ អាតូមអុកស៊ីសែនមានវ៉ាឡង់ 2 ជានិច្ច ។

ឧទាហរណ៍ : - HCl ដោយអាតូមអ៊ីដ្រូសែនមួយ ចូលផ្សំក្នុងរូបមន្តនេះ នោះធាតុ Cl មានវ៉ាឡង់ 1 ។

- $H_2O$ អាតូមអុកស៊ីសែន O មានវ៉ាឡង់ 2 ព្រោះអ៊ីដ្រូសែន H មានសន្ទស្សន៍ 2 ។

### ២.វ៉ាឡង់នៃរ៉ាឌីកាល់

រ៉ាឌីកាល់ជាអាតូម ឬក្រុមអាតូម ដែលចូលរួមក្នុងរូបមន្ត នៃអង្គធាតុសមាសមួយចំនួន ។

ឧទាហរណ៍ : NaOH ផ្សំដោយលោហៈ សូដ្យូម និងរ៉ាឌីកាល់អ៊ីដ្រុកស៊ីត ឬបណ្តុំអ៊ីដ្រុកស៊ីល (-OH) ។

**តារាងវ៉ាឡង់នៃធាតុ និងវ៉ាឡង់នៃរ៉ាឌីកាល់ខ្លះៗ**

| ឈ្មោះ | និមិត្តសញ្ញា | វ៉ាឡង់ | ឈ្មោះរ៉ាឌីកាល់ | រូបមន្ត | វ៉ាឡង់ |
|---|---|---|---|---|---|
| អុកស៊ីសែន | O | 2 | អ៊ីដ្រុកស៊ីត | $-OH$ | 1 |
| ក្លរ | Cl | 1 (3,5,7) | នីត្រាត | $-NO_3$ | 1 |
| ស្ពាន់ធ័រ | S | 2,4,6 | អាសេតាត | $-CH_3CO_2$ | 1 |
| អាសូត | N | 3,5 | អាម៉ូញ៉ូម | $-NH_4$ | 1 |
| ផូស្វរ | P | 3,5 | មេទីល | $-CH_3$ | 1 |
| កាបូន | C | 4 (2) | កាបូណាត | $=CO_3$ | 2 |
| អ៊ីដ្រូសែន | H | 1 | ស៊ុលផាត | $=SO_4$ | 2 |
| សូដ្យូម | Na | 1 | ផូស្វាត | $\equiv PO_4$ | 3 |
| កាល់ស្យូម | Ca | 2 | ក្លរ | $-Cl$ | 1 |

❈លេខក្នុងរង្វង់ក្រចកជាវ៉ាឡង់ដែលគេមិនសូវជួបប្រទះ ។ ដូចនេះ សិស្សត្រូវចងចាំវ៉ាឡង់នៃធាតុ និង រ៉ាឌីកាល់ខាងលើដើម្បីងាយស្រួលសរសេររូបមន្ត និងសមីការគីមី ។

### ៣.ការតាក់តែងរូបមន្ត

កាលណាធាតុពីរចូលផ្សំគ្នា ឬការចូលផ្សំរវាងធាតុ និងរ៉ាឌីកាល់ ធាតុ ឬរ៉ាឌីកាល់ទាំងនោះត្រូវប្តូរវ៉ាឡង់គ្នា ដើម្បីឱ្យវ៉ាឡង់សរុបនៃធាតុ ឬរ៉ាឌីកាល់នីមួយៗស្មើគ្នា ។

ឧទាហរណ៍ : Al មានវ៉ាឡង់ 3 និង O មានវ៉ាឡង់ 2 កាលណាធាតុទាំងពីរចូលផ្សំគ្នា គឺ $Al_2O_3$ ។

Na មានវ៉ាឡង់ 1 និង $SO_4$ វ៉ាឡង់ 2 យើងបានរូបមន្ត $Na_2SO_4$ ។

-បើធាតុចូលផ្សំ មានវ៉ាឡង់ដូចគ្នា នោះត្រូវលុបលេខសន្ទស្សន៍ចោល ។ ដូចជា $Fe_2O_2$ ទៅជា FeO

-ជាទូទៅ គេមិនសរសេរលេខ 1 នៃលេខសន្ទស្សន៍ទេ ។ ដូចជា $Na_2O_1$ ទៅជា $Na_2O$

-ប្រសិនបើធាតុដែលចូលផ្សំបង្កើតជារូបមន្ត មានវ៉ាឡង់អាចសម្រួលបាន គេសម្រួល ។ ដូចជា $C_2O_4$ ទៅជា $CO_2$

-មានករណីលើកលែងខ្លះៗ ដូចជា $Na_2O_2$ សូដ្យូមពែរអុកស៊ីត និង $H_2O_2$ អ៊ីដ្រូសែនពែរអុកស៊ីតជាដើម ។

## សំណួរ និង លំហាត់

ចូរសរសេររូបមន្តសមាសធាតុខាងក្រោម :

១.ប៉ូតាស្យូម វ៉ាឡង់ 1 ចូលផ្សំនិងស្ពាន់ធ័រវ៉ាឡង់ 2
២.សំណ វ៉ាឡង់ 2 ចូលផ្សំនិងអុកស៊ីសែន
៣.អាសូត វ៉ាឡង់ 5 ចូលផ្សំនិងអុកស៊ីសែន
៤.ស្ពាន់ធ័រវ៉ាឡង់ 2 ចូលផ្សំនិងអុកស៊ីសែន
៥.កាបូន វ៉ាឡង់ 4 ចូលផ្សំនិងអ៊ីដ្រូសែន
៦.ម៉ាញ៉េស្យូម វ៉ាឡង់ 2 ចូលផ្សំនិងរ៉ាឌីកាល់ស៊ុលផាត វ៉ាឡង់ 2
៧.ដែក វ៉ាឡង់ 2 ចូលផ្សំនិង រ៉ាឌីកាល់អ៊ីដ្រុកស៊ីត វ៉ាឡង់ 1

## ចម្លើយ

សរសេររូបមន្ត : ១.$K_2S$ ២.$PbO$ ៣.$N_2O_5$ ៤.$SO$ ៥.$CH_4$ ៦.$MgSO_4$ ៧.$Fe(OH)_2$

# <u>មេរៀនទី២</u> <u>អុកស៊ីត</u>

## ១.<u>និយមន័យ</u>

អុកស៊ីតជាសមាសធាតុដែលផ្សំឡើងដោយធាតុពីរយ៉ាង ក្នុងនោះធាតុមួយជាអុកស៊ីសែន។ អុកស៊ីតអាចជាអង្គធាតុរឹង រាវ ឬឧស្ម័ន (ប្រែប្រួលតាមសីតុណ្ហភាព)។

អុកស៊ីតមានពីរគឺ អុកស៊ីតអាស៊ីត និងអុកស៊ីតបាស។

## ២.<u>អុកស៊ីតអាស៊ីត ឬអុកស៊ីតនៃអលោហៈ</u>

កើតពីការចូលផ្សំនៃធាតុអលោហៈជាមួយអុកស៊ីសែន។ ឧទាហរណ៍ : $SO_2$ ស្ពាន់ធ័រឌីអុកស៊ីត

អុកស៊ីតអាស៊ីតមានអំពើជាមួយទឹក ឱ្យផលជាអាស៊ីត។ លើកលែង $SiO_2$


***អុកស៊ីតអាស៊ីត + ទឹក → អាស៊ីត***


ឧទាហរណ៍ : $SO_2 + H_2O \rightarrow H_2SO_3$ អាស៊ីតស៊ុលផ្វូរ៉ុ


$CO_2 + H_2O \rightarrow H_2CO_3$ អាស៊ីតកាបូនិច

ឧស្ម័នស្ពាន់ធ័រឌីអុកស៊ីត $SO_2$ ជាឧស្ម័នដែលបង្កើតឱ្យមានភ្លៀងអាស៊ីត ព្រោះវាចូលផ្សំជាមួយអុកស៊ីសែន និងចំហាយទឹក បង្កើតបានជាអាស៊ីតស៊ុលផ្វួរិច រលាយចូលក្នុងទឹកភ្លៀង។


***អុកស៊ីតអាស៊ីត + បាស → អំបិល + ទឹក***


ឧទាហរណ៍ : $CO_2 + 2NaOH \rightarrow Na_2CO_3 + H_2O$

## ៣.<u>អុកស៊ីតបាស ឬអុកស៊ីតនៃលោហៈ</u>

កើតពីការចូលផ្សំនៃលោហៈ និងអុកស៊ីសែន។ ឧទាហរណ៍ : $CaO$ កាល់ស្យូមអុកស៊ីត

អុកស៊ីតបាសមានអំពើជាមួយអាស៊ីត ឱ្យផលជាអំបិល និងទឹក។


***អុកស៊ីតបាស + អាស៊ីត → អំបិល + ទឹក***


ឧទាហរណ៍ : $CaO + H_2SO_4 \rightarrow CaSO_4 + H_2O$


$MgO + 2HCl \rightarrow MgCl_2 + H_2O$

ដើម្បីបន្សាបជាតិអាស៊ីតដែលមានក្នុងទឹកបឹង ទន្លេ... ដែលបណ្តាលពីភ្លៀងអាស៊ីត គេប្រើកាល់ស្យូមអ៊ីដ្រុកស៊ីត។


តាមសមីការ $CaO + H_2O \rightarrow Ca(OH)_2$


$Ca(OH)_2 + H_2SO_4 \rightarrow CaSO_4 + 2H_2O$

អុកស៊ីតលោហៈសកម្មដូចជា $K_2O$ , $Na_2O$ , $CaO$ មានប្រតិកម្មជាមួយទឹក បង្កើតជា***បាស*** (អ៊ីដ្រុកស៊ីត)។


$Na_2O + H_2O \rightarrow 2NaOH$


***អុកស៊ីតបាស + អុកស៊ីតអាស៊ីត → អំបិល***


$CaO + CO_2 \rightarrow CaCO_3$

## ៤.<u>អុកស៊ីតក្នុងធម្មជាតិ</u>

មានដូចជា ទឹក($H_2O$) កាបូនឌីអុកស៊ីត($CO_2$) ដែកII អុកស៊ីត ($Fe_2O_3$) អុកស៊ីតម៉ាញ៉េទិច($Fe_3O_4$) ស៊ីលីស្យូមឌីអុកស៊ីត ($SiO_2$) អាលុយមីញ៉ូមអុកស៊ីត ($Al_2O_3$) ...។

គេប្រើ ស័ង្កសីអុកស៊ីត $ZnO$ និង សំណអុកស៊ីត ($Pb_3O_4$) សម្រាប់ធ្វើថ្នាំលាប។

## ៥.<u>ផលិតអុកស៊ីត</u>

ក្នុងឧស្សាហកម្មគេធ្វើអុកស៊ីតតាមវិធីពីរយ៉ាងគឺ

-ឱ្យអង្គធាតុទោលចូលផ្សំផ្ទាល់ជាមួយអុកស៊ីសែននៃខ្យល់។



ឧទាហរណ៍ : $2Mg + O_2 \rightarrow 2MgO$ , $2Cu + O_2 \rightarrow 2CuO$

-បំបែកអំបិលតាមវិធីដុតកម្ដៅ (អំបិលដែលមានអុកស៊ីសែនក្នុងនោះ) ។



ឧទាហរណ៍ : $CaCO_3 \xrightarrow{\text{ដុតកម្ដៅ}} CaO + CO_2$

## សំណួរ និង លំហាត់

១-អុកស៊ីតជាអ្វី? ចូរឱ្យឧទាហរណ៍បញ្ជាក់ ។

២-ក្នុងចំណោមអុកស៊ីតខាងក្រោម តើអុកស៊ីតណាខ្លះជាអុកស៊ីតអាស៊ីត? ណាខ្លះជាអុកស៊ីតបាស?

ក.កាបូនឌីអុកស៊ីត $CO_2$ ខ.អាលុយមីញ៉ូមអុកស៊ីត $Al_2O_3$ គ.បារ្យូមអុកស៊ីត BaO

ឃ.ស្ពាន់ធ័រឌីអុកស៊ីត $SO_2$ ង.ស្ពាន់ធ័រទ្រីអុកស៊ីត $SO_3$ ច.សូដ្យូមអុកស៊ីត $Na_2O$

៣-សរសេរសមីការតាងប្រតិកម្មចំហេះនៃធាតុខាងក្រោម :

ក.ស័ង្កសី Zn ខ.កាលស្យូម Ca គ.អាលុយមីញ៉ូម Al ឃ.ទង់ដែង Cu ង.ម៉ាញ៉េស្យូម Mg

៤-សរសេរសមីការតីមីតាងទង្វើអុកស៊ីតដូចជា : $SO_2$ $CO_2$ $P_2O_5$ CuO ។

៥-សរសេរសមីការតាងប្រតិកម្មរវាងទឹក និងអង្គធាតុដូចជា : $K_2O$ $CO_2$ $SO_3$ $Na_2O$ BaO ។

៦-តើគេត្រូវប្រើថ្មកំបោរ $CaCO_3$ ប៉ុន្មានតោន ដើម្បីផលិតកំបោររស់ CaO ចំនួន 5តោន ។

៧-ចូរបំពេញចន្លោះខាងក្រោមឱ្យបានត្រឹមត្រូវ

ក.អុកស៊ីតនៃអលោហៈ ជាអុកស៊ីត ...................... ។ ចំណែកអុកស៊ីតនៃលោហៈភាគច្រើនជាអុកស៊ីត .................... ។

ខ.គេទទួលបានកំបោរងាប់ (កាល់ស្យូមអ៊ីដ្រុកស៊ីត) ដោយប្រតិកម្មរវាង ...............................និង....................... ។

គ.បើកំឡោចថ្មកំបោរ គេទទួលបាន..........................និង ឧស្ម័ន ................................ ។

៨-ក.ចូររាប់ឈ្មោះលោហៈឱ្យបានបួន និងរូបមន្តអុកស៊ីតរបស់វា ។

ខ.ចូររាប់ឈ្មោះអលោហៈឱ្យបានបី និងរូបមន្តអុកស៊ីតរបស់វា ។

៩-ស្ពាន់ធ័រឆេះក្នុងអុកស៊ីសែននៃខ្យល់បង្កើតបានជាស្ពាន់ធ័រឌីអុកស៊ីត ។

ក.តើអង្គធាតុប្រតិករ និងផលិតផលមានអ្វីខ្លះ?

ខ.ចូរសរសេរសមីការតុល្យការនៃប្រតិកម្មនេះ ។

គ.តើត្រូវប្រើខ្យល់អស់ប៉ុន្មានក្រាម បើគេធ្វើប្រតិកម្មចំហេះស្ពាន់ធ័រ 15kg ។

ដោយដឹងថាក្នុងខ្យល់មានអុកស៊ីសែន 21% គិតជាម៉ាស ។

១០-ក្នុងចំហេះសព្វថ្មកំបោរ 100g គេទទួលបានកាល់ស្យូមអុកស៊ីត 56g ។

ក.សរសេរសមីការតាងប្រតិកម្ម ។

ខ.គណនាម៉ាសកាបូនឌីអុកស៊ីតដែលកកើតពីប្រតិកម្ម ។

គ.គណនាម៉ាសថ្មកំបោរដែលប្រើដើម្បីផលិតកាល់ស្យូមអុកស៊ីតមួយតោន ។

## ចម្លើយ

១- អុកស៊ីតជាសមាសធាតុដែលផ្សំឡើងដោយធាតុពីរយ៉ាង ក្នុងនោះធាតុមួយជាអុកស៊ីសែន ។ ឧទាហរណ៍ : $Na_2O$ , $CO_2$

២- បញ្ជាក់អុកស៊ីតអាស៊ីត និង អុកស៊ីតបាស

ក. $CO_2$ អុកស៊ីតអាស៊ីត ខ.$Al_2O_3$ អុកស៊ីតបាស គ.BaO អុកស៊ីតបាស

ឃ.$SO_2$ អុកស៊ីតអាស៊ីត ង.$SO_3$ អុកស៊ីតអាស៊ីត ច.$Na_2O$ អុកស៊ីតបាស

៣-សរសេរសមីការតាងប្រតិកម្មចំហេះ

ក. $2Zn + O_2 \rightarrow 2ZnO$ ខ. $2Ca + O_2 \rightarrow 2CaO$ គ. $4Al + 3O_2 \rightarrow 2Al_2O_3$

ឃ. $2Cu + O_2 \rightarrow 2CuO$ ង. $2Mg + O_2 \rightarrow 2MgO$

៤-សរសេរសមីការតាងប្រតិកម្មទង្វើអុកស៊ីត


ក. $S + O_2 \rightarrow SO_2$


ខ. $C + O_2 \rightarrow CO_2$


គ. $4P + 5O_2 \rightarrow 2P_2O_5$


ឃ. $2Cu + O_2 \rightarrow 2CuO$

៥-សរសេរសមីការតាងប្រតិកម្មរវាងទឹក និងអុកស៊ីត


ក. $K_2O + H_2O \rightarrow 2KOH$


ខ. $CO_2 + H_2O \rightarrow H_2CO_3$


គ. $SO_3 + H_2O \rightarrow H_2SO_4$


ឃ. $Na_2O + H_2O \rightarrow 2NaOH$


ង. $BaO + H_2O \rightarrow Ba(OH)_2$

៦-គណនាម៉ាសថ្មកំបោរត្រូវប្រើ

សមីការតាងប្រតិកម្ម


$CaCO_3 \xrightarrow{\text{ដុតកម្ដៅ}} CaO + CO_2$

100g → 56g

$m_{CaCO_3}$ ? → 5t

តាមសមីការ CaO = 56g ត្រូវការ $CaCO_3$ = 100g

CaO = 5t ត្រូវការ $CaCO_3 = \frac{100\times5}{56} = 8,928t$

៧-បំពេញចន្លោះ

ក. អាស៊ីត-អុកស៊ីតបាស។ ខ.កំបោរស់ (កាល់ស្យូមអុកស៊ីត) និងទឹក។ គ.អង្គធាតុរឹង CaO និង $CO_2$។

៨-ក.សូដ្យូម Na , ម៉ាញ៉េស្យូម Mg , អាលុយមីញ៉ូម Al និង កាល់ស្យូម Mg។ អុកស៊ីតត្រូវនិងលោហៈទាំងនោះមាន $Na_2O$ សូដ្យូមអុកស៊ីត , MgO ម៉ាញ៉េស្យូមអុកស៊ីត , $Al_2O_3$ អាលុយមីញ៉ូមអុកស៊ីត , MgO ម៉ាញ៉េស្យូមអុកស៊ីត។

ខ.C កាបូន , S ស្ពាន់ធ័រ , P ផូស្វ័រ ។ អុកស៊ីតត្រូវនិងអុកស៊ីតទាំងនោះមាន $CO_2$ កាបូនឌីអុកស៊ីត , $SO_2$ ស្ពាន់ធ័រឌីអុកស៊ីត , $P_2O_5$ អានីឌ្រីតផូស្វរិច។

៩-ក.អង្គធាតុប្រតិករជា S និង $O_2$ ហើយផលិតផលជា $SO_2$

ខ.សរសេរសមីការតាងប្រតិកម្ម


$S + O_2 \rightarrow SO_2$

32g, 32g

15kg, $V_{O_2}$ ?

គ.គណនាម៉ាសខ្យល់ត្រូវប្រើ

តាមសមីការ S = 32g ត្រូវការ $O_2$ = 32g

S = 15kg ត្រូវការ $O_2 = \frac{32\times15}{32} = 15kg$ ឬ 15 000g

ដោយ $O_2$ = 21g មានក្នុងខ្យល់ 100g

$O_2$ = 15 000g មានក្នុងខ្យល់ $\frac{100\times15000}{21} = 71428,57g = 71,43kg$

១០-ក.សរសេរសមីការតាងប្រតិកម្ម


$CaCO_3 \xrightarrow{\text{ដុតកម្ដៅ}} CaO + CO_2$

100g → 56g, 44g

$m_{CaCO_3}$ ? → 1t

ខ.គណនាម៉ាសកាបូនឌីអុកស៊ីត $CO_2$

តាមសមីការ $CaCO_3$ = 100g ទទួលបាន $CO_2$ = 44g

គ.គណនាម៉ាសថ្មកំបោរ $CaCO_3$

តាមសមីការ CaO = 56g ត្រូវការ $CaCO_3$ = 100g

CaO = 1t ត្រូវការ $CaCO_3 = \frac{100\times1}{56} = 1,785t$

## មេរៀនទី៣ អាស៊ីត

### ១.និយមន័យ

អាស៊ីតជាអង្គធាតុដែលមានអ៊ីដ្រូសែនក្នុងម៉ូលេគុល ហើយវាមានអំពើជាមួយបាស បានជាអំបិល និងទឹក។ ឬជាសមាសធាតុរលាយក្នុងទឹកបង្កើតជាអ៊ីយ៉ុងអ៊ីដ្រូសែន $H^+$ ។

### ២.ប្រភេទនៃអាស៊ីត

អាស៊ីតមានពីរប្រភេទគឺ អាស៊ីតខ្លាំង និង អាស៊ីតខ្សោយ។ អាស៊ីតខ្លាំងប្រើក្នុងឧស្សាហកម្ម និងអាស៊ីតខ្សោយប្រើក្នុងចំណីអាហារ (មិនបង្កគ្រោះថ្នាក់) ។

ឧទាហរណ៍ :

| អាស៊ីតខ្លាំង | បម្រើបម្រាស់ | អាស៊ីតខ្សោយ | បម្រើបម្រាស់ |
|---|---|---|---|
| អាស៊ីតស៊ុលផួរិច $H_2SO_4$ | ចាក់អាគុយ ធ្វើរូបធាតុប្លាស្ទិច រូបធាតុសរសៃ (សូត្រនិម្មិត) | អាស៊ីតអេតាណូអ៊ិច $CH_3COOH$ | រក្សាម្ហូបអាហារ |
| អាស៊ីតក្លរីឌ្រិច HCl | បញ្ចេញដោយក្រពះ មាននាទីរំលាយអាហារ និងសម្លាប់បាក់តេរី | អាស៊ីតតាកទ្រិច $C_4H_6O_6$ | វិស័យសុខាភិបាល និងទង្វើនំ |
| អាស៊ីតនីទ្រិច $HNO_3$ | ទង្វើជីគីមី និងគ្រឿងផ្ទុះ | អាស៊ីតកាបូនិច $H_2CO_3$ | ប្រើក្នុងទង្វើភេសជ្ជៈ |

### ៣.លក្ខណៈអាស៊ីត

-មានរសជូរ -អាចប្តូរពណ៌ទួណឺសុលពីខៀវទៅក្រហម

-អាស៊ីត (រាវ) មានប្រតិកម្មជាមួយលោហៈមួយចំនួន ឱ្យផលជាអំបិល និងបំភាយអ៊ីដ្រូសែន។













❈ ***អាស៊ីតកាបូនិចមិនឋិតថេរទេ វាអាចបំបែកជាទឹក និងកាបូនឌីអុកស៊ីត***។ អត្តសញ្ញាណកម្មឧស្ម័នកាបូនឌីអុកស៊ីត $CO_2$ គឺត្រូវឱ្យវាឆ្លងកាត់ទឹកកំបោរថ្លា ហើយវាធ្វើឱ្យទឹកកំបោរថ្លាក្លាយជាល្អក់ ។ តាមសមីការ : $CO_2 + Ca(OH)_2 \rightarrow CaCO_{3\downarrow} + H_2O$

❈<u>សម្គាល់</u> : **pH** ជាទំហំមួយដែលធ្វើឱ្យយើងដឹងពីលក្ខណៈអាស៊ីត បាស ណឺតនៃសូលុយស្យុងមួយ (ដោយប្រើក្រដាសpH ឬឧបករណ៍ pHម៉ែត) ។

- $pH < 7$ សូលុយស្យុងអាស៊ីត ( នៅ $25^oC$)
- $pH = 7$ សូលុយស្យុងណឺត ( នៅ $25^oC$)
- $pH > 7$ សូលុយស្យុងបាស ( នៅ $25^oC$)

### សំណួរ និង លំហាត់

១-តើក្រដាសទួណឺសុលប្រែពណ៌ទៅក្រហម នៅពេលដែលគេជ្រលក់វាទៅក្នុងទឹកកំបោរថ្លា ឬទឹកខ្មេះ?

២-ដូចម្តេចដែលហៅថាអាស៊ីត? ចូររកឧទាហរណ៍បញ្ជាក់ ។

៣-ចូរបំពេញ និង ថ្លឹងសមីការខាងក្រោម :





ខ. $ZnCO_3$ + HCl → ................. + ................. + .................

គ. $Fe_2(CO_3)_3$ + $HNO_3$ → ................. + ................. + .................

ឃ. $BaCO_3$ + $H_2SO_4$ → ................. + ................. + .................

៤-ចូររាប់ឈ្មោះផ្លែឈើដែលមានជាតិអាស៊ីតឱ្យបានប្រាំ ។

៥-ចូរបំពេញល្បះខាងក្រោមឱ្យបានត្រឹមត្រូវ :

ក.សូលុយស្យុង ....................មាន pH > 7 ។

ខ.ទឹកសុទ្ធមាន pH ស្មើ ............ជាសូលុយស្យុង .................. ។

គ.ទឹកសាប៊ូមាន pH = 10,1 វាជាសូលុយស្យុង .................... ។

ឃ.សូលុយស្យុងអាស៊ីតមាន pH........... ។

៦-គេវាស់ pH នៃផលិតផលមួយចំនួនដូចជា ទឹកកូកាកូឡា មាន pH > 2,5 ទឹកសុទ្ធ 7 ស្រា 3,2 ទឹកដោះ 6,5 ទឹកសាប៊ូ 10,1 ទឹកដមប៉េងប៉ោះ 3,8 ស៊ុត 7,8 ។ ចូរធ្វើចំណែកថ្នាក់តាមក្រុមអាស៊ីត បាស ណឺត ។

៧-ផើងមួយផ្ទុកសូលុយស្យុងអាស៊ីតក្លរីឌ្រិច 25g ។ គេបន្សាបអាស៊ីតនេះដោយប្រើស៊ូតកាត់ ។ គណនា

ក.ម៉ាសស៊ូតកាត់ដែលត្រូវប្រើ ។

ខ.ម៉ាសអំបិលដែលកកើត ។ (H = 1 , Cl = 35,5 , O = 16 , Na = 23)

៨-ចំហេះលោហៈម៉ាញ៉េស្យូមក្នុងប្រតិកម្មមួយ ត្រូវការខ្យល់ចំនួន $5600cm^3$ ។

ក.គណនាម៉ាសម៉ាញ៉េស្យូមដែលត្រូវប្រើក្នុងចំហេះនេះ ។

ខ.គេយកអុកស៊ីតខាងលើ ដាក់ឱ្យមានប្រតិកម្មជាមួយសូលុយស្យុងអាស៊ីតក្លរីឌ្រិច ដែលមានកំហាប់ភាគរយ 12,5% ។ គណនាម៉ាសសូលុយស្យុងនៃអាស៊ីតនេះ ។

៩-អាស៊ីតនីទ្រិច 25% ត្រូវបានដាក់ឱ្យមានប្រតិកម្មជាមួយ ថ្មកំបោរ $CaCO_3$ ។ គេទទួលបានអំបិលA មានកំហាប់ភាគរយ 16% ចំនួន 307,5g ឧស្ម័នB និងទឹក ។

ក.ចូរសរសេរសមីការតាងប្រតិកម្ម ។

ខ.តើឧស្ម័នB ជាឧស្ម័នអ្វី? តើគេប្រើវិធីណាដើម្បីដឹងពីអត្តសញ្ញាណរបស់វា? ចូរបកស្រាយ ។

គ.គណនាម៉ាស និងមាឌឧស្ម័នB ដែលទទួលបានខាងលើ បើគេដឹងថា 22,4L របស់វាមានម៉ាស 44g ។

ឃ.គណនាម៉ាសសូលុយស្យុង អាស៊ីតនីទ្រិចត្រូវប្រើ ។

១០-គេបង់កំទេចស័ង្កសី 1,3g ទៅក្នុងសូលុយស្យុងអាស៊ីតស៊ុលផួរិចចំនួន 8g ។

ក.គណនាកំហាប់នៃសូលុយស្យុងអាស៊ីតស៊ុលផួរិចដែលប្រើ ។

ខ.គណនាម៉ាស និងមាឌអ៊ីដ្រូសែនទទួលបាន ។ បើគេដឹងថា នៅ $20^oc$ អ៊ីដ្រូសែន 2g មានមាឌ 24L

គ.គេយកអំបិលខាងលើឱ្យមានប្រតិកម្មជាមួយអាស៊ីតក្លរីឌ្រិច ។ គណនាម៉ាសអាស៊ីតក្លរីឌ្រិចដែលត្រូវប្រើ ។

១១-គេលាយបញ្ចូលគ្នានូវសូលុយស្យុងអាស៊ីតនីទ្រិចពីរ ដែលមានកំហាប់ភាគរយ និងម៉ាសសូលុយស្យុងខុសគ្នា គឺ សូ.ទី1 មានកំហាប់ 15% ចំនួន 300g និងសូ.ទី2 មានកំហាប់ 75% ចំនួន 125g ។ គណនាកំហាប់ភាគរយនៃសូលុយស្យុងទទួលបាន ។

## **ចម្លើយ**

១-ក្រដាសទួណឺសុលប្រែពណ៌ទៅក្រហម នៅពេលដែលគេជ្រលក់វាទៅក្នុងទឹកខ្មេះ ។

២- អាស៊ីតជាអង្គធាតុដែលមានអ៊ីដ្រូសែនក្នុងម៉ូលេគុល ហើយវាមានអំពើជាមួយបាស បានជាអំបិល និងទឹក ។ ឧទាហរណ៍: HCl

៣-បំពេញ និងថ្លឹងសមីការ


ក. $Zn + H_2SO_4 \rightarrow ZnSO_4 + H_2$


ខ. $ZnCO_3 + 2HCl \rightarrow ZnCl_2 + H_2O + CO_2$


គ. $Fe_2(CO_3)_3 + 6HNO_3 \rightarrow 2Fe(NO_3)_3 + 3H_2O + 3CO_2$


ឃ. $BaCO_3 + H_2SO_4 \rightarrow BaSO_4 + H_2O + CO_2$

៤-រាប់ផ្លែឈើមានជាតិអាស៊ីតចំនួន៥ : ផ្លែក្រូចឆ្មារ ក្រូចពោធិ៍សាត់ ទំពាំងបាយជូរ អំពិល សន្ទាន់។

៥-បំពេញចន្លោះ ក.បាស ខ. 7 ណឺត គ.បាស ឃ. $< 7$

៦-ធ្វើចំណែកថ្នាក់តាមក្រុម នៃអាស៊ីត បាស ណឺត តាមរយៈតម្លៃ pH

-អាស៊ីត : កូកាកូឡា (pH $>$ 2,5) , ស្រា (pH=3,2) , ទឹកដមប៉េងប៉ោះ (pH=3,8) , ទឹកដោះគោ (pH=6,5) ។

-បាស : ទឹកសាប៊ូ(pH=10,1) , ស៊ុត (pH=7,8)

-ណឺត : ទឹកសុទ្ធ (pH=7)

៧-ក.គណនាម៉ាសស៊ូតកាត់ដែលត្រូវប្រើ



| សមីការតាងប្រតិកម្ម | HCl | + | NaOH | $\rightarrow$ | NaCl | + | $H_2O$ |
|---|---|---|---|---|---|---|---|
| | 36,5g | | 40g | | 58,5g | | |
| | 25g | | $m_{NaOH}$? | | $m_{NaCl}$? | | |

តាមសមីការ HCl = 36,5g ត្រូវការ NaOH = 40g

HCl = 25g ត្រូវការ NaOH = $\frac{40 \times 25}{36,5} = 27,39g$

ខ.គណនាម៉ាសអំបិលកកើត

តាមសមីការ HCl = 36,5g ទទួលបាន NaCl = 58,8g

HCl = 25g ទទួលបាន NaCl = $\frac{58,5 \times 25}{36,5} = 40,06g$

៨-ក.គណនាម៉ាសម៉ាញ៉េស្យូមត្រូវប្រើ



| សមីការតាងប្រតិកម្ម | 2Mg | + | $O_2$ | $\rightarrow$ | 2MgO (1) |
|---|---|---|---|---|---|
| | 48g | | 32g | | 80g |
| | $m_{Mg}$? | | 1,6g | | $m_{MgO}$? |

រកម៉ាស $O_2$

តាមរូបមន្ត $V_{ខ្យល់} = 5 V_{O_2}$ នាំឱ្យ $V_{O_2} = \frac{1}{5} V_{ខ្យល់}$ តែ $V_{ខ្យល់} = 5600cm^3 = 5,6L$

នោះ $V_{O_2} = \frac{1}{5} \times 5,6 = 1,12L$

ដោយ $O_2$ = 22,4L មានម៉ាស 32g

$O_2$ = 1,12L មានម៉ាស $\frac{32 \times 1,12}{22,4} = 1,6g$

តាមសមីការ (1): $O_2$ = 32g ចូលផ្សំជាមួយ Mg = 48g

$O_2$ = 1,6g ចូលផ្សំជាមួយ Mg = $\frac{48 \times 1,6}{32} = 2,4g$

ខ.គណនាម៉ាសូ.HCl

តាមសមីការ (1): $O_2 = 32g$ ទទួលបាន $MgO = 80g$

$O_2 = 1,6g$ ទទួលបាន $MgO = \frac{80\times1,6}{32} = 4g$



សមីការតាងប្រតិកម្ម $MgO + 2HCl \rightarrow MgCl_2 + H_2O$ (2)

| | | | | |
|---|---|---|---|---|
| $MgO$ | $2HCl$ | $MgCl_2$ | $H_2O$ | (2) |
| 40g | 73g | | | |
| 4g | $m_{HCl}$? | | | |

តាមសមីការ(2): $MgO = 40g$ ត្រូវការ $HCl = 73g$

$MgO = 4g$ ត្រូវការ $HCl = \frac{73\times4}{40} = 7,3g$

តាមរូបមន្ត $C\% = \frac{m_1\times100}{m}$ នាំឱ្យ $m = \frac{m_1\times100}{C\%}$ ដោយ C% = 12,5%

នោះ $m = \frac{7,3\times100}{12,5} = 58,4g$

៩-ក.សរសេរសមីការតាងប្រតិកម្ម



$2HNO_3 + CaCO_3 \rightarrow Ca(NO_3)_2 + CO_2 + H_2O$

| | | | | |
|---|---|---|---|---|
| $2HNO_3$ | $CaCO_3$ | $Ca(NO_3)_2$ | $CO_2$ | $H_2O$ |
| 126g | | 164g | 44g | |
| $m_{HNO_3}$ ? | | 49,2g | $m_{CO_2}$ ? | |

ខ.ឧស្ម័ន B ជាឧស្ម័នកាបូនឌីអុកស៊ីត $CO_2$ ។ ដើម្បីផ្ទៀងផ្ទាត់អត្តសញ្ញាណរបស់វាគេត្រូវឱ្យវាឆ្លងកាត់ទឹកកំបោរថ្លា ពេលនោះវាធ្វើឱ្យទឹកកំបោរថ្លាឡើងល្អក់ ។

គ.គណនាម៉ាស និងមាឌឧស្ម័ន $CO_2$

រកម៉ាសនៃអំបិល $Ca(NO_3)_2$សុទ្ធ

តាមរូបមន្ត $C\% = \frac{m_1\times100}{m}$ នាំឱ្យ $m_1 = \frac{C\%\times m}{100}$ ដោយ C% = 16% , m = 307,5g

នោះ $m_1 = \frac{16\times307,5}{100} = 49,2g$

តាមសមីការ $Ca(NO_3)_2 = 164g$ ត្រូវនឹង $CO_2 = 44g$

$Ca(NO_3)_2 = 49,2g$ ត្រូវនឹង $CO_2 = \frac{44\times49,2}{164} = 13,2g$

ដោយ $CO_2 = 44g$ មានមាឌ 22,4L

$CO_2 = 13,2g$ មានមាឌ $\frac{22,4\times13,2}{44} = 6,72L$

ឃ.គណនាម៉ាសសូ.$HNO_3$

តាមសមីការ $Ca(NO_3)_2 = 164g$ ត្រូវការ $HNO_3 = 126g$

$Ca(NO_3)_2 = 49,2g$ ត្រូវការ $HNO_3 = \frac{126\times49,2}{164} = 37,8g$

តាមរូបមន្ត $C\% = \frac{m_1\times100}{m}$ នាំឱ្យ $m = \frac{m_1\times100}{C\%}$ ដោយ C% = 25%

នោះ $m = \frac{37,8\times100}{25} = 151,2g$



១០-សមីការតាងប្រតិកម្ម $Zn + H_2SO_4 \rightarrow ZnSO_4 + H_2$ (1)

| | | | | |
|---|---|---|---|---|
| $Zn$ | $H_2SO_4$ | $ZnSO_4$ | $H_2$ | (1) |
| 65g | 98g | 161g | | |
| 1,3g | $m_{H_2SO_4}$ ? | $m_{ZnSO_4}$ ? | | |

ក.គណនា C% នៃសូ.$H_2SO_4$

រកម៉ាសសុទ្ធនៃ $H_2SO_4$

តាមសមីការ(1) Zn = 65g ត្រូវការ $H_2SO_4$ = 98g

Zn = 1,3g ត្រូវការ $H_2SO_4 = \frac{98 \times 1,3}{65} = 1,96g$

តាមរូបមន្ត $C\% = \frac{m_1 \times 100}{m}$ ដោយ m = 8g

នោះ $C\% = \frac{1,96 \times 100}{8} = 24,5\%$

ខ.គណនាម៉ាស និងមាឌ $H_2$

តាមសមីការ(1) Zn = 65g ទទួលបាន $H_2$ = 2g

Zn = 1,3g ទទួលបាន $H_2 = \frac{2 \times 1,3}{65} = 0,04g$

នៅ $20^oc$ $H_2$ = 2g មានមាឌ 24L

$H_2$ = 0,04g មានមាឌ $\frac{24 \times 0,04}{2} = 0,48L$

គ.គណនាម៉ាស HCl ត្រូវប្រើ



| | | | | | |
|---|---|---|---|---|---|
| សមីការតាងប្រតិកម្ម | $ZnSO_4$ + | 2HCl → | $ZnCl_2$ + | $H_2SO_4$ | (2) |
| | 161g | 73g | | | |
| | 3,22g | $m_{HCl}$? | | | |

តាមសមីការ (1) Zn = 65g ទទួលបាន $ZnSO_4$ = 161g

Zn = 1,3g ទទួលបាន $ZnSO_4 = \frac{161 \times 1,3}{65} = 3,22g$

តាមសមីការ(2) $ZnSO_4$ = 161g ត្រូវការ HCl = 73g

$ZnSO_4$ = 3,22g ត្រូវការ $HCl = \frac{73 \times 3,22}{161} = 1,46g$

***ក្នុងការដោះស្រាយលំហាត់ទី១១ គឺត្រូវរកម៉ាសធាតុរលាយនៃសូ.នីមួយៗ បន្ទាប់មកបូកបញ្ចូលគ្នា ( ម៉ាសរលាយនៃសូ.) ។ ចំណែកម៉ាសម៉ាសសូ. ត្រូវបូកម៉ាសសូ.ទាំងពីរបញ្ចូលគ្នា ។***

១១-គណនាកំហាប់ភាគរយនៃសូ.ទទួលបាន

ក្នុងសូ.$HNO_3$ ទី1 មាន : $C\%_{(1)} = \frac{m_{1(1)} \times 100}{m_{(1)}}$ នាំឱ្យ $m_{1(1)} = \frac{C\%_{(1)} \times m_{(1)}}{100}$ ដោយ $C\%_{(1)}$ = 15% , $m_{(1)}$ = 300g

នោះ $m_{1(1)} = \frac{15 \times 300}{100} = 45g$

ក្នុងសូ.$HNO_3$ ទី2 មាន : $C\%_{(2)} = \frac{m_{1(2)} \times 100}{m_{(2)}}$ នាំឱ្យ $m_{1(2)} = \frac{C\%_{(2)} \times m_{(2)}}{100}$ ដោយ $C\%_{(2)}$ = 75% , $m_{(2)}$ = 125g

នោះ $m_{1(2)} = \frac{75 \times 125}{100} = 93,75g$

ដោយ $m_1 = m_{1(1)} + m_{1(2)}$ = 45 + 93,75 =138,75g

$m = m_{(1)} + m_{(2)}$ = 300 + 125 = 425g

តាមរូបមន្ត $C\% = \frac{m_1 \times 100}{m}$

នោះ $C\% = \frac{138,75 \times 100}{425} = 32,647\%$

## មេរៀនទី៤ បាស

### ១.និយមន័យ

បាសជាសមាសធាតុដែលម៉ូលេគុលបង្កឡើងដោយ អាតូមលោហៈចូលផ្សំជាមួយបង្គុំអ៊ីដ្រុកស៊ីល (OH) មួយ ឬច្រើន ហើយមានអំពើជាមួយអាស៊ីត ឱ្យផលជាអំបិល និងទឹក។

ឧទាហរណ៍ : NaOH សូដ្យូមអ៊ីដ្រុកស៊ីត។ គេប្រើវាសម្រាប់ធ្វើសាប៊ូ សរសៃអំបោះ ភីលថតរូប កញ្ចក់ ...។

### ២.លក្ខណៈ

-បាសមានរសល្វីង

-មានលក្ខណៈរអិលដូចសាប៊ូ

-អាចប្តូរពណ៌ទួណឺសុលពីក្រហមទៅខៀវ

-មានប្រតិកម្មជាមួយអំបិលអាម៉ូញ៉ូម (អាម៉ូញ៉ូមចូលផ្សំជាមួយរ៉ាឌីកាល់អាស៊ីត)ឱ្យផលជាឧស្ម័នអាម៉ូញាក់។




ឧទាហរណ៍ : $NaOH + NH_4Cl \rightarrow NaCl + NH_3 + H_2O$

### ៣.ប្រតិកម្មរវាងអាស៊ីត និងបាស




ឧទាហរណ៍ : $HNO_3 + KOH \rightarrow KNO_3 + H_2O$

❈ គួរចងចាំ : -ពេលឃ្មុំទិច ឬសត្វល្អិតខាំ យើងត្រូវលាងរបួសនោះដោយទឹកក្បុង ឬសាប៊ូ ឬ សូលុយស្យុងអាម៉ូញាក់។

-ដើម្បីការពារធ្មេញពុក យើងត្រូវប្រើថ្នាំដុសធ្មេញដែលមានជាតិបាស។

### សំណួរ និង លំហាត់

១-ចូរឱ្យនិយមន័យបាស ព្រមទាំងឱ្យឧទាហរណ៍បញ្ជាក់ផង?

២-ចូរគូសសញ្ញា (√) ក្នុងប្រអប់ខាងមុខចម្លើយដែលត្រឹមត្រូវ :

ក.ក្នុងចំនោមរូបធាតុខាងក្រោម តើណាមួយជាបាស?

☐a.ទឹកខ្មេះ ☐b.ទឹក ☐c.កំបោរងាប់ ☐d.ទឹកក្រូចឆ្មារ

ខ.គេប្រើទឹកកំបោរថ្លាដើម្បីផ្ទៀងផ្ទាត់អត្តសញ្ញាណ :

☐a.អុកស៊ីសែន ☐b.អ៊ីដ្រូសែន ☐c.អាសូត ☐d.កាបូនឌីអុកស៊ីត

៣-ចូរសរសេរពាក្យ ត្រូវ ឬ ខុស នៅខាងមុខអំណះអំណាងខាងក្រោម :

☐ក.បាសមានរសជូរ។

☐ខ.គេប្រើអាស៊ីតស៊ុលផួរិចក្នុងធុងអាគុយ។

☐គ.បាសប្តូរពណ៌ណទួណឺសុល ពីក្រហមទៅខៀវ។

☐ឃ.អាស៊ីតជាអង្គធាតុសម្រាប់សម្អាតផ្ទះ។

☐ង.បាសមានអំពើលើអាស៊ីត ឱ្យផលជាអំបិល និងទឹក។

៤-ចូរសរសេរ និងថ្លឹងសមីការប្រតិកម្មរវាង :

ក.ប៉ូតាស្យូមអ៊ីដ្រុកស៊ីត និង អាស៊ីតស៊ុលផួរិច ខ.កាល់ស្យូមអ៊ីដ្រុកស៊ីត និងអាម៉ូញ៉ូមនីត្រាត

គ.អាម៉ូញ៉ូមអ៊ីដ្រុកស៊ីត និងអាស៊ីតក្លរីឌ្រិច ឃ.សូដ្យូមអ៊ីដ្រុកស៊ីត និង អាម៉ូញ៉ូមស៊ុលផាត

៥-ចូរសរសេរសមីការបម្លែងពី កាល់ស្យូមទៅកាល់ស្យូមអុកស៊ីត រួចទៅកាល់ស្យូមអ៊ីដ្រុកស៊ីត។

៦-ក្នុងរូបមន្តបាស តើផ្នែកត្រង់ណាដែលជាលក្ខណៈសម្គាល់វា?

៧-សរសេររូបមន្តបាសខាងក្រោម :

ក.សូដ្យូមកាត់ ខ.ប៉ូតាសកាត់ គ.កាល់ស្យូមអ៊ីដ្រុកស៊ីត

ឃ.ទង់ដែង II អ៊ីដ្រុកស៊ីត ង.ស័ង្កសីអ៊ីដ្រុកស៊ីត ច.អាលុយមីញ៉ូមអ៊ីដ្រុកស៊ីត

៨-គេឱ្យសូដ្យូមអុកស៊ីត 31g មានប្រតិកម្មជាមួយទឹក ។ គណនាម៉ាសសូដកាត់ដែលទទួលបានក្រោយប្រតិកម្ម ។

៩-គេដុតប៉ូតាស្យូម 2,34g ជាមួយអុកស៊ីសែននៃខ្យល់ ដើម្បីទទួលបានអុកស៊ីតម្យ៉ាង ។ បន្ទាប់មកគេយកអុកស៊ីតនោះដាក់ឱ្យមានប្រតិកម្មជាមួយទឹក ។

ក.សរសេរសមីការតាងប្រតិកម្ម

ខ.គណនាមាឌ និងម៉ាសខ្យល់ដែលត្រូវប្រើ ។ ខ្យល់ 1L មានម៉ាស 1,3g

គ.គណនាម៉ាសនៃបាសដែលទទួលបាន ។ (K = 39 , O = 16 , H = 1)

១០-ក.គណនាមាឌទឹកដែលត្រូវបន្ថែមទៅក្នុងសូលុយស្យុងកាល់ស្យូមអ៊ីដ្រុកស៊ីត 75% ដើម្បីបានសូលុយស្យុងកាល់ស្យូមអ៊ីដ្រុកស៊ីត 15% ចំនួន 125g ។

ខ.គេចាក់សូលុយស្យុងអាស៊ីតស៊ុលផួរិចចំនួន 49,66g ទៅក្នុងសូលុយស្យុងទទួលបានខាងលើ ។

a.សរសេរសមីការតាងប្រតិកម្ម

b.គណនាកំហាប់ភាគរយនៃសូលុយស្យុងអាស៊ីតស៊ុលផួរិច ។

(Ca = 40 , O = 16 , H = 1 , S = 32)

## ចម្លើយ

១-បាសជាសមាសធាតុដែលម៉ូលេគុលបង្កឡើងដោយ អាតូមលោហៈចូលផ្សំជាមួយបង្គុំអ៊ីដ្រុកស៊ីល (OH) មួយ ឬច្រើន ហើយមានអំពើរជាមួយអាស៊ីត ឱ្យផលជាអំបិល និងទឹក ។ ឧទាហរណ៍ : NaOH សូដ្យូមអ៊ីដ្រុកស៊ីត , $Ca(OH)_2$ កាល់ស្យូមអ៊ីដ្រុកស៊ីត

២-គូសសញ្ញា (√) : ក.c. √ ខ.d. √

៣-សំណួរ ខុស ឬ ត្រូវ : ក. ខុស ខ. ត្រូវ គ. ត្រូវ ឃ. ខុស ង. ត្រូវ

៤-សរសេរ និងថ្លឹងសមីការតាងប្រតិកម្ម :

ក. $2K + H_2SO_4 \rightarrow K_2SO_4 + H_2$

ខ. $Ca(OH)_2 + 2NH_4NO_3 \rightarrow Ca(NO_3)_2 + 2NH_3 + H_2O$

គ. $NH_4OH + HCl \rightarrow NH_4Cl + H_2O$

ឃ. $6NaOH + Al_2(SO_4)_3 \rightarrow 3Na_2SO_4 + 2Al(OH)_3$

៥-សរសេរសមីការបម្លែង

$2Ca + O_2 \rightarrow 2CaO$ , $CaO + H_2O \rightarrow Ca(OH)_2$

៦-ផ្នែកដែលជាលក្ខណៈសម្គាល់របស់បាសគឺ បង្គុំអ៊ីដ្រុកស៊ីល (OH) ។

៧-សរសេររូបមន្តបាស

ក.NaOH ខ.KOH គ.$Ca(OH)_2$ ឃ.$Cu(OH)_2$ ង.$Zn(OH)_2$ ច.$Al(OH)_3$

៨-គណនាម៉ាស NaOH ទទួលបាន

សមីការតាងប្រតិកម្ម $Na_2O + H_2O \rightarrow 2NaOH$

62g 80g

31g $m_{NaOH}$?

តាមសមីការ $Na_2O$ = 62g ទទួលបាន NaOH = 80g

$Na_2O$ = 31g ទទួលបាន NaOH = $\frac{80 \times 31}{62} = 40g$

៩-ក.សរសេរសមីការតាងប្រតិកម្ម

$4K + O_2 \rightarrow 2K_2O$ (1)

156g 32g 188g



$2,34g \qquad m_{O_2}? \qquad m_{K_2O}?$

$K_2O + H_2O \rightarrow 2KOH$ (2)

94g 112g

2,82g $m_{KOH}$?

ខ.គណនាមាឌ និងម៉ាសខ្យល់ត្រូវប្រើ

តាមរូបមន្ត $V_{ខ្យល់} = 5V_{O_2}$

រក$V_{O_2}$

តាមសមីការ(1) K = 156g ត្រូវការ $O_2$ = 32g

K= 2,34g ត្រូវការ $O_2 = \frac{32\times 2,34}{156} = 0,48g$

ដោយ $O_2$ = 32g មានមាឌ 22,4L

$O_2$ = 0,48g មានមាឌ $\frac{22,4\times 0,48}{32} = 0,336L$

នោះ $V_{ខ្យល់} = 5 \times 0,336 = 1,68L$

ដោយ ខ្យល់ 1L មានម៉ាស 1,3g

ខ្យល់ 1,68L មានម៉ាស $\frac{1,3x1,68}{1} = 2,184g$

គ.គណនាម៉ាសបាស KOH ទទួលបាន

តាមសមីការ(1) K = 156g ទទួលបាន $K_2O$ = 188g

K= 2,34g ទទួលបាន $K_2O = \frac{188\times 2,34}{156} = 2,82g$

តាមសមីការ (2) $K_2O$ = 94g ទទួលបាន KOH = 112g

$K_2O$ = 2,82g ទទួលបាន KOH = $\frac{112\times 2,82}{96} = 3,29g$

១០-ក.គណនាមាឌទឹកត្រូវប្រើ

តាមរូបមន្ត $C\%_{ថ្មី} = \frac{m_1\times 100}{m_{ថ្មី}}$ នាំឱ្យ $m_1 = \frac{C\%_{ថ្មី}\times m_{ថ្មី}}{100}$ ដោយ $C\%_{ថ្មី}$ = 15% , $m_{ថ្មី}$ = 125g

នោះ $m_1 = \frac{15\times 125}{100} = 18,75g$

តាមរូបមន្ត $C\% = \frac{m_1\times 100}{m}$ នាំឱ្យ $m = \frac{m_1\times 100}{C\%}$ តែ C% = 75%

យើងបាន $m = \frac{18,75\times 100}{75} = 25g$

ដោយ $m_{ថ្មី} = m + m_{ទឹក}$ នាំឱ្យ $m_{ទឹក} = m_{ថ្មី} - m$ = 125 – 25 = 100g ឬ 100ml

ខ.a.សរសេរសមីការតាងប្រតិកម្ម



$Ca(OH)_2 + H_2SO_4 \rightarrow CaSO_4 + 2H_2O$

74g 98g

18,75g $m_{H_2SO_4}$?

b.គណនាកំហាប់ជាភាគរយនៃសូ.$H_2SO_4$

តាមសមីការ $Ca(OH)_2$ = 74g ត្រូវការ $H_2SO_4$ = 98g

$Ca(OH)_2$ = 18,75g ត្រូវការ $H_2SO_4 = \frac{98\times 18,75}{74} = 24,83g$

តាមរូបមន្ត $C\% = \frac{m_1\times 100}{m}$ ដោយ m = 49,66g

នោះ $C\% = \frac{24,83\times 100}{49,66} = 50\%$

## មេរៀនទី៥ អំបិល

### ១.និយមន័យ

អំបិលជាសមាសធាតុដែលម៉ូលេគុលវាផ្សំឡើងដោយអាតូមលោហៈ និងរ៉ាឌីកាល់អាស៊ីត ។ ឧទាហរណ៍ : NaCl សូដ្យូមក្លរួ

**❈អាស៊ីត និងរ៉ាឌីកាល់របស់វា**

| | | | | |
|---|---|---|---|---|
| អាស៊ីត | HCl អាស៊ីតក្លរីឌ្រិច | $H_2SO_4$ អាស៊ីតស៊ុលផួរិច | $H_3PO_4$ អាស៊ីតផូស្វរិច | $HNO_3$ អាស៊ីតនីទ្រិច |
| រ៉ាឌីកាល់ | Cl រ៉ាឌីកាល់ក្លរួ | $SO_4$ រ៉ាឌីកាល់ស៊ុលផាត | $PO_4$ រ៉ាឌីកាល់ផូស្វាត | $NO_3$ រ៉ាឌីកាល់នីត្រាត |

### ២.លក្ខណៈ

-អំបិលមានអំពើលើអាស៊ីតបង្កើតជាអំបិលថ្មី និងអាស៊ីតថ្មី ។


ឧទាហរណ៍ : $2NaCl + H_2SO_4 \rightarrow Na_2SO_4 + 2HCl$

-អំបិលមានអំពើលើបាសអាល់កាលី (បាសនៃលោហៈសកម្ម ឬបាសរលាយ) បង្កើតជាអំបិលថ្មី និងបាសថ្មី ។


ឧទាហរណ៍ : $MgSO_4 + 2KOH \rightarrow K_2SO_4 + Mg(OH)_2$

-អំបិលអាចមានអំពើលើអំបិល បង្កើតជាអំបិលថ្មីពីរយ៉ាង ។


ឧទាហរណ៍ : $BaCl_2 + Na_2SO_4 \rightarrow BaSO_4 + 2NaCl$

-អំបិលមានអំពើលើលោហៈបង្កើតបានជាអំបិលថ្មី និងលោហៈថ្មី ។


ឧទាហរណ៍ : $CuSO_4 + Fe \rightarrow FeSO_4 + Cu$

❈លោហៈដែលអាចមានអំពើលើអំបិលនៃលោហៈមួយទៀតលុះត្រាតែ លោហៈនោះនៅខាងមុខលោហៈនៃអំបិល តាមសេរីសកម្មភាពនៃលោហៈ (មេរៀនទី៣ ជំពូក១) ។

❈អំបិលដែលយកមកប្រើឱ្យមានប្រតិកម្មក្នុងលក្ខណៈខាងលើ ជាអំបិលរលាយ (តាមរយៈតារាងនៃ អាស៊ីត បាស អំបិល) ។

### ៣.ទទួលអំបិល

-ក្នុងទីពិសោធ : ***អាស៊ីត*** + ***បាស*** → ***អំបិល*** + ***ទឹក***


ឧទាហរណ៍ : $HCl + NaOH \rightarrow NaCl + H_2O$

-ក្នុងឧស្សាហកម្ម :

+អាស៊ីត និងលោហៈ

+អាស៊ីត និងអុកស៊ីតបាស

+អាស៊ីត និងអំបិល

+អំបិល និងអំបិល

### ៤.បម្រើបម្រាស់

-ឧស្សាហកម្ម : ប្រើសម្រាប់ធ្វើភីលថតរូប ទឹកលាងរូបថត ។

-សុខាភិបាល : ប្រើសម្រាប់ធ្វើឱសថ (ម្សៅអូរ៉ាលីត) ។

-កសិកម្ម : ប្រើសម្រាប់ធ្វើជីគីមី ($NH_4NO_3$ អាម៉ូញ៉ូមនីត្រាត ....) ។

-ជីវភាពប្រចាំថ្ងៃ : ប្រើសម្រាប់រក្សាម្ហូបអាហារ ធ្វើឱ្យអាហារមានរសជាតិ .... ។

## សំណួរ និង លំហាត់

១-ដូចម្តេចដែលហៅថាអំបិល? ចូរឱ្យឧទាហរណ៍បញ្ជាក់ ។

២-ចូរសរសេរសមីការតាងប្រតិកម្មរវាងសមាសធាតុខាងក្រោម:

ក.អាស៊ីតក្លរីឌ្រិច និងសូដ្យូមអ៊ីដ្រុកស៊ីត ខ.អាស៊ីតស៊ុលផួរិច និងទង់ដែងអ៊ីដ្រុកស៊ីត

គ.អាស៊ីតស៊ុលផួរិច និងបារ្យូមកាបូណាត ឃ.កាល់ស្យូមក្លរួ និងសូដ្យូមកាបូណាត

ង.ដែក II កាបូណាត និងអាស៊ីតក្លរីឌ្រិច ច.ទង់ដែង និងប្រាក់នីត្រាត

៣-គេចាក់អាស៊ីតក្លរីឌ្រិច 50% ចំនួន 7,3g ឱ្យមានប្រតិកម្មជាមួយសូដ្យូមអ៊ីដ្រុកស៊ីត ។

ក.សរសេរសមីការតាងប្រតិកម្ម ។

ខ.គណនាម៉ាសសូដ្យូមអ៊ីដ្រុកស៊ីតសុទ្ធដែលត្រូវប្រើ ។

គ.គណនាម៉ាសអំបិលទទួលបាន ។ (H = 1 , Cl = 35,5 , Na = 23 , O = 16)

៤-គេបង់លោហៈអាលុយមីញ៉ូម Al 0,27g ក្នុងអាស៊ីតស៊ុលផួរិច $H_2SO_4$ ។ គណនាម៉ាសអំបិល និងមាឌអ៊ីដ្រូសែនដែលកកើត ។

៥-ចូរសរសេរសមីការបម្លែងពី $Cu \rightarrow CuO \rightarrow CuCl_2 \rightarrow Cu(OH)_2 \rightarrow CuO \rightarrow Cu$

៦-គេបង់ល្បាយនៃម្សៅលោហៈទង់ដែង និងស័ង្កសី 10g ក្នុងសូលុយស្យុងអាស៊ីតក្លរីឌ្រិច បរិមាណគ្រប់គ្រាន់ ។ ក្រោយប្រតិកម្មចប់ គេទទួលបានអំបិល ចំនួន 47,6g កំហាប់ 20% ។

ក.សរសេរសមីការតាងប្រតិកម្ម

ខ.គណនាសមាសភាពនៃល្បាយដើម (ម៉ាសទង់ដែង និងម៉ាសស័ង្កសី)

គ.គណនាម៉ាសអាស៊ីតត្រូវប្រើ ។ (Cu = 64 , Zn = 65 , H = 1 , Cl = 35,5)

**ចម្លើយ**

១- អំបិលជាសមាសធាតុដែលម៉ូលេគុលវាផ្សំឡើងដោយអាតូមលោហៈ និងរ៉ាឌីកាល់អាស៊ីត ។ ឧទាហរណ៍ : NaCl សូដ្យូមក្លរួ

២-សរសេរសមីការតាងប្រតិកម្ម

ក.$HCl + NaOH \rightarrow NaCl + H_2O$

ខ. $H_2SO_4 + Cu(OH)_2 \rightarrow CuSO_4 + 2H_2O$

គ.$H_2SO_4 + BaCO_3 \rightarrow BaSO_4 + CO_2 + H_2O$

ឃ.$CaCl_2 + Na_2CO_3 \rightarrow CaCO_3 + 2NaCl$

ង.$FeCO_3 + 2HCl \rightarrow FeCl_2 + CO_2 + H_2O$

ច.$Cu + 2AgNO_3 \rightarrow Cu(NO_3)_2 + 2Ag$

៣-ក.សរសេរសមីការតាងប្រតិកម្ម



| | | | |
|---|---|---|---|
| HCl + | NaOH → | NaCl + | $H_2O$ |
| 36,5g | 40 | 58,5g | |
| 3,65g | $m_{NaOH}$? | $m_{NaCl}$? | |

ខ.គណនាម៉ាស NaOHសុទ្ធ

រកម៉ាសសុទ្ធនៃ HCl

តាមរូបមន្ត $C\% = \frac{m_1 \times 100}{m}$ នាំឱ្យ $m_1 = \frac{C\% \times m}{100}$ ដោយ C% = 50% , m = 7,3g

នោះ $m_1 = \frac{50 \times 7,3}{100} = 3,65g$

តាមសមីការ HCl = 36,5g ត្រូវការ NaOH = 40g

HCl = 3,65g ត្រូវការ NaOH = $\frac{40 \times 3,65}{36,5} = 0,4g$

គ.គណនាម៉ាសអំបិលទទួលបាន NaCl

តាមសមីការ HCl = 36,5g ទទួលបាន NaCl = 58,5g

$HCl = 3,65g$ ទទួលបាន $NaCl = \frac{58,5 \times 3,65}{36,5} = 5,85g$

៤-គណនាម៉ាសអំបិល និងមាឌ $H_2$ កកើត



| សមីការតាងប្រតិកម្ម | $2Al$ | + | $3H_2SO_4$ | $\rightarrow$ | $Al_2(SO_4)_3$ | + | $3H_2$ |
|---|---|---|---|---|---|---|---|
| | 54g | | | | 342g | | 6g |
| | 0,27g | | | | $m_{Al_2(SO_4)_3}$ ? | | $m_{H_2}$ ? |

តាមសមីការ $Al = 54g$ ទទួលបាន $Al_2(SO_4)_3 = 342g$

$Al = 0,27g$ ទទួលបាន $Al_2(SO_4)_3 = \frac{342 \times 0,27}{54} = 1,71g$

តាមសមីការ $Al = 54g$ ទទួលបាន $H_2 = 6g$

$Al = 0,27g$ ទទួលបាន $H_2 = \frac{6 \times 0,27}{54} = 0,03g$

ដោយ $H_2 = 2g$ មានមាឌ 22,4L

$H_2 = 0,03g$ មានមាឌ $\frac{22,4 \times 0,03}{2} = 0,336L$

៥-សរសេរសមីការបម្លែង



ក. $2Cu + O_2 \rightarrow 2CuO$



ខ. $CuO + 2HCl \rightarrow CuCl_2 + H_2O$ ,



គ. $CuCl_2 + 2NaOH \rightarrow Cu(OH)_2 + 2NaCl$ ឃ. $Cu(OH)_2 \xrightarrow{\text{ដុតកម្ដៅ}} CuO + H_2O$



ង. $CuO + H_2 \rightarrow Cu + H_2O$



| ៦-ក.សរសេរសមីការ | $Zn$ | + | $2HCl$ | $\rightarrow$ | $ZnCl_2$ | + | $H_2$ |
|---|---|---|---|---|---|---|---|
| | 65g | | 73g | | 136g | | |
| | $m_{Zn}$? | | $m_{HCl}$? | ` | 9,52g | | |
| | $Cu$ | + | $HCl$ | $\rightarrow$ | គ្មានប្រតិកម្ម | | |

ខ. គណនាសមាសភាពនៃល្បាយដើម

រកម៉ាសសុទ្ធនៃអំបិល $ZnCl_2$

តាមរូបមន្ត $C\% = \frac{m_1 \times 100}{m}$ នាំឱ្យ $m_1 = \frac{C\% \times m}{100}$ ដោយ $C\% = 20\%$ , $m = 47,6g$

នោះ $m_1 = \frac{20 \times 47,6}{100} = 9,52g$

តាមសមីការ $ZnCl_2 = 136g$ ត្រូវការ $Zn = 65g$

$ZnCl_2 = 9,52g$ ត្រូវការ $Zn = \frac{65 \times 9,52}{136} = 4,55g$

ដោយ $m_{\text{ល្បាយ}} = m_{Zn} + m_{Cu}$ នាំឱ្យ $m_{Cu} = m_{\text{ល្បាយ}} - m_{Zn}$ តែ $m_{\text{ល្បាយ}} = 10g$

នោះ $m_{Cu} = 10 - 4,55 = 5,45g$

គ.គណនាម៉ាសអាស៊ីតត្រូវប្រើ

តាមសមីការ $ZnCl_2 = 136g$ ត្រូវការ $HCl = 73g$

$ZnCl_2 = 9,52g$ ត្រូវការ $HCl = \frac{73 \times 9,52}{136} = 5,11g$

## លក្ខណៈរលាយក្នុងទឹករបស់សមាសធាតុមួយចំនួន

| អាញ៉ុង | កាចុង | | | | | | | | | | | | | | | |
|---|---|---|---|---|---|---|---|---|---|---|---|---|---|---|---|---|
| | $H^{+}$ | $K^{+}$ | $Na^{+}$ | $Ag^{+}$ | $NH_4^{+}$ | $Mg^{2+}$ | $Ca^{2+}$ | $Ba^{2+}$ | $Zn^{2+}$ | $Cd^{2+}$ | $Hg^{2+}$ | $Pb^{2+}$ | $Cu^{2+}$ | $Fe^{2+}$ | $Fe^{3+}$ | $Al^{3+}$ |
| $OH^{-}$ | រ | រ | រ | – | រ | ម | ត | រ | ម | ម | – | ម | ម | ម | ម | ម |
| $Cl^{-}$ | រ/ហ | រ | រ | ម | រ | រ | រ | រ | រ | រ | រ | ត | រ | រ | រ | រ |
| $NO_3^{-}$ | រ/ហ | រ | រ | រ | រ | រ | រ | រ | រ | រ | រ | រ | រ | រ | រ | រ |
| $CH_3COO^{-}$ | រ/ហ | រ | រ | រ | រ | រ | រ | រ | រ | រ | រ | រ | រ | រ | រ | ត |
| $S^{2-}$ | រ/ហ | រ | រ | ម | រ | រ | ត | រ | ម | ម | ម | ម | ម | ម | – | – |
| $SO_3^{2-}$ | រ/ហ | រ | រ | ម | រ | ម | ម | ម | ម | ម | ម | ម | ម | ម | – | – |
| $SO_4^{2-}$ | រ/ហ | រ | រ | ត | រ | រ | ត | ម | រ | រ | រ | ម | រ | រ | រ | រ |
| $CO_3^{2-}$ | រ/មហ | រ | រ | ម | រ | ម | ម | ម | ម | ម | ម | ម | ម | ម | ម | – |
| $SiO_3^{2-}$ | រ/មហ | រ | រ | ម | រ | ម | ម | ម | ម | ម | – | ម | ម | ម | ម | ម |
| $PO_4^{3-}$ | រ/មហ | រ | រ | ម | រ | ម | ម | ម | ម | ម | ម | ម | ម | ម | ម | ម |

រ : សមាសធាតុរលាយក្នុងទឹក    ម : សមាសធាតុមិនរលាយក្នុងទឹក    ត : សមាសធាតុរលាយតិច

ហ : សមាសធាតុហើរឬងាយបំបែកជាឧស្ម័នហើរឡើង    មហ : សមាសធាតុមិនហើរ    — : សមាសធាតុដែលពុំកើតមាន

## តារាងម៉ាសអាតូម និង វ៉ាឡង់នៃធាតុមួយចំនួន

| ធាតុគីមីលោហៈ | | | | ធាតុគីមីអលោហៈ និង រ៉ាឌីកាល់ | | | |
|---|---|---|---|---|---|---|---|
| ឈ្មោះ | និមិត្តសញ្ញា | ម៉ាសអាតូម | វ៉ាឡង់ | ឈ្មោះ | និមិត្តសញ្ញា | ម៉ាសអាតូម | វ៉ាឡង់ |
| ប្រាក់ | Ag | 108 | 1 | កាបូន | C | 12 | 2;4 |
| អាលុយមីញ៉ូម | Al | 27 | 3 | ក្លរ | Cl | 35,5 | 1;3;5;7 |
| មាស | Au | 197 | 3 | អ៊ីដ្រូសែន | H | 1 | 1 |
| កាល់ស្យូម | Ca | 40 | 2 | អ៊ីយ៉ូត | I | 127 | 1 |
| ទង់ដែង | Cu | 64 | 1;2 | អាសូត | N | 14 | 3;5 |
| ដែក | Fe | 56 | 2;3 | អុកស៊ីសែន | O | 16 | 2 |
| បារត | Hg | 201 | 1;2 | ផូស្វ័រ | P | 31 | 3;5 |
| ប៉ូតាស្យូ | K | 39 | 1 | ស៊ីលីស្យូម | Si | 28 | 4 |
| ម៉ាញ៉េស្យូម | Mg | 24 | 2 | ស្ពាន់ធ័រ | S | 32 | 2;4;6 |
| ម៉ង់កាណែស | Mn | 55 | 2 | ផូស្វាត | $PO_4$ | | 3 |
| សូដ្យូម | Na | 23 | 1 | អ៊ីដ្រុកស៊ីត | OH | | 1 |
| សំណ | Pb | 207 | 2;4 | នីត្រាត | $NO_3$ | | 1 |
| សំណប៉ាហាំង | Sn | 119 | 2;4 | ស៊ីលីកាត | $SiO_3$ | | 2 |
| ស័ង្កសី | Zn | 65 | 2 | កាបូណាត | $CO_3$ | | 2 |
| ក្រូម | Cr | 52 | 2;3 | ស៊ុលផាត | $SO_4$ | | 2 |
| បារ្យូម | Ba | 137 | 2 | ស៊ុលភីត | $SO_3$ | | 2 |